# ខ្មែរប៉ុស្តិ៍ Khmer Post



KHMER BILINGUAL BIWEEKLY NEWSPAPER
VOLUME 02 ISSUE 07 January 16st - 31th 2008 ADVERTISING (562) 313-2129 WWW.THEKHMERPOST.COM

ព័ត៌មានពិសេស

# ញត្តិសុំហត្ថលេខាប្រឆាំងរដ្ឋាភិបាល ហ៊ុន សែន មកកាន់ក្រុងខ្មែរ

▸រដ្ឋាភិបាលថាមិនរុញរាក្នុងដំណើរទស្សនៈកិច្ច ព្រោះបាតុកម្មនោះទេ :

*Long Beacch,* **មាជ សុវណ្ណារ៉ា**

-ញត្តិមួយពីខ្មែរមួយក្រុម ( តទៅទំព័រទី០៩ )

## Ken ជីវិតក្មេងយុក្កក្លាយជាអ្នកផ្សព្វផ្សាយ វប្បធម៌ខ្មែរតាមតេហាទំព័រ

*Long Beacch,* **មាជ សុវណ្ណារ៉ា**

-វាជាការកម្រ ហើយក៏យើងមិនត្រូវគិតថា មនុស្សមិនអាចកែប្រែជីវិតសារជាថ្មីបាននោះទេដែរ នៅពេលដែលខ្លួនគេត្រូវធ្លាក់ទៅរកផ្លូវខុស ក្នុង ( តទៅទំព័រទី៣០ )

Ken អតីតក្មេងយុក្កនៅតំបន់ Los Angeles, Long Beach (រូបខាងឆ្វេង)

## ក្រុងខ្មែរ Long Beach នឹងអាចមានអគ្គកុងស៊ុល

*Long Beacch,* **មាជ សុវណ្ណារ៉ា**

ពួកអ្នកដឹកនាំក្រុងខ្មែរ Cambodia Town បានអះអាងថា ក្រុងខ្មែរនៃសហគមន៍ភាគខាងលិចនៃប្រទេសអាមេរិក ក្នុងរដ្ឋ California គ្រោងនឹងបើកឱ្យមាន **អគ្គកុង-**ស៊ុលតំណាងស្ថានទូត ឬតំណាងប្រទេសកម្ពុជា សំរាប់ធ្វើការទំនាក់ទំនងការទូតនយោបាយ សេដ្ឋកិច្ច ជួញដូរពាណិជ្ជកម្មរវាងបងប្អូនខ្មែរនៃតំបន់រដ្ឋ California និងប្រទេសកម្ពុជា ក្នុងពេលឆាប់ៗដែលអាចធ្វើទៅបាន បន្ទាប់ពីអគ្គកុងស៊ុល ដែលមានទីតាំងនៅក្រុង

(តទៅទំព័រទី២១)

Photo By Presstelegran

ប្រធានក្រុមប្រឹក្សាក្រុងខ្មែរ & អ្នកប្រធានស្ថាបនិក




# ក្រុមហ៊ុនអង្គរទេសចរណ៍

# Angkor Travel



## ការជ្រើសរើសតែមួយគត់សំរាប់ធ្វើដំណើរទៅកាន់ប្រទេសកម្ពុជា

- ទទួលបំរើកិច្ចការធ្វើដំណើរក្នុងសហរដ្ឋ និងអន្តរជាតិ ។
- តម្លៃសំបុត្រលក់ចុះថ្លៃជាពិសេសសំរាប់ការធ្វើដំណើរក្នុងស្រុកចេញពីចំណតយន្តហោះ LAX ទៅកាន់គ្រប់ទីក្រុងក្នុងសហរដ្ឋអាមេរិក ។
- មានលក់កាតសំរាប់ទូរស័ព្ទជុំវិញពិភពលោក ( លក់ដុំ និងលក់រាយ) ។
- ទទួលធ្វើ Re-Entry Permit លិខិតឆ្លងដែន ។
- ទទួលធ្វើ Re-Entry Permit ប្រញាប់ជូនភ្លាមៗ!!!
- ជួយរកតម្លៃសំបុត្រយន្តហោះថោកជាងគេទៅស្រុកខ្មែរតាមរយៈក្រុមហ៊ុន Eva Air , Cathay Pacific,Malaysia Air , Singapore Air.

**តម្លៃពិសេស $890 សូមអញ្ជើញទាក់ទងនាងខ្ញុំ**

**Tel: (562) 599-0877 , Fax: (562) 599 4758**

1569E, Anaheim St.,C Long Beach ,
CA 90813 (កាច់ជ្រុងផ្លូវ Anaheim & Walnut)

## Cellphonatic

### Wireless Super center

យើងខ្ញុំមានលក់កាតទូរស័ព្ទ ទិញដាក់បញ្ចូលទឹកលុយទៅក្នុងទូរស័ព្ទដៃ និងទូរស័ព្ទនៅផ្ទះបានភ្លាមៗ!!!

*NO CONNECTION FEE !*
*NO EXPIRATION DATE !*

metroPCS
No te limites.

FREE PHONE !!!

តម្លៃត្រឹមតែ $30 ក្នុងមួយខែ !



# ស្នើដាក់លក្ខខ័ណ្ឌជំនួយអាមេរិក ចំពោះសម្តេច សីហនុ ក្នុងតុលាការខ្មែរក្រហម

## ●គួរកុំមានការជ្រៀតជ្រែកមកលើតុលាការខ្មែរក្រហម :

*Long Beach* មាជ សុវណ្ណារ៉ា

ខ្មែរ-អាមេរិកាំងមួយក្រុមពីសហគមន៍ខ្មែរក្នុងរដ្ឋ California បានស្នើញត្តិមួយទៅព្រឹទ្ធសភា រដ្ឋសភា និងរដ្ឋបាលសោតវិមានប្រធានាធិបតី Bush ឱ្យភ្ជាប់លក្ខខ័ណ្ឌចំពោះ


សម្តេច សីហនុ



លោក រាជ សម្បត្តិ

សាលាក្តីជំនុំជំរះទោសពួកមេដឹកនាំខ្មែរក្រហមមុនពេលផ្តល់ជំនួយទៅតុលាការខ្មែរក្រហមនោះ ។

នៅក្នុងញត្តិមួយជាភាសាអង់គ្លេសដែលកាសែតខ្មែរប៉ុស្តិ៍ទទួលបានក្នុងសប្តាហ៍នេះ បានអះអាងថា លក្ខខ័ណ្ឌជំនួយថវិកា គួរត្រូវភ្ជាប់ដើម្បីភាពយុត្តិធម៌ចំពោះជនរងគ្រោះ ដែលពួកគេមិនពេញចិត្តទាំងស្រុងដោយសារសាលាក្តីនេះមិនបានបញ្ជាក់ហេតុផលសមស្របថា តើហេតុដូចម្តេចបានជា គេមិនបានចាប់ ឬឃុំខ្លួនអតីតព្រះមហាក្សត្រខ្មែរ សម្តេចសីហនុ ដែលតាមពិតទៅគឺជាប្រធានស្ថាបនិកមួយរូបដំបូងបំផុត នៃគណៈប្រធានគ្រប់គ្រងរដ្ឋនៃរបបកម្ពុជាប្រជាធិបតេយ្យពីឆ្នាំ១៩៧៥-១៩៧៦ ដែលព្រះអង្គ គឺជាអ្នកបង្កើតឱ្យមានបទឧក្រិដ្ឋកម្មប្រឆាំងមនុស្សជាតិ ហើយថែមទាំងបាននាំសង្គ្រាមពីប្រទេសវៀតណាមមកកម្ពុជា ចាប់ពីឆ្នាំ១៩៧០មក ។ ដោយញត្តិបានចោទប្រកាន់ថា អតីតព្រះមហាក្សត្រគឺជាពិរុទ្ធជនបង្កឱ្យមានវិនាសកម្មស្លាប់មនុស្ស និងសង្គ្រាមនៅកម្ពុជា ។

រដ្ឋាភិបាលសហរដ្ឋអាមេរិកគ្រោងនឹងសម្រេចផ្តល់ជំនួយថវិកាគាំទ្រដល់តុលាការកាត់ទោសខ្មែរ

( តនៅទំព័រទី០៨ )

# ថ្ងៃ ៧ មករា និងការកើតមានជនក្បត់ជាតិ,អ្នកគស៊ីតាមព្រំដែន

## ●៧មករា ការហូរចូលជនអន្តោប្រវេសន៍ និងកិច្ចព្រមព្រៀងក្រុងប៉ារីស

●●●ព្រឹត្តិការណ៍៧មករា ឆ្នាំ១៩៧៩ ដែលអ្នកគាំទ្រថា ជាថ្ងៃរំដោះស្រោចស្រង់ជាតិខ្មែរពីរបបបនប្រល័យពូជសាសន៍ខ្មែរក្រហម ហើយអ្នករិះគន់ថា ជាថ្ងៃឈ្លានពានបរទេសយួនចូលកាន់កាប់ប្រទេសកម្ពុជា ដើម្បីត្រួតត្រាខ្មែរ ក្នុងផែនការមករា ដែលមកដល់ខែមករាឆ្នាំនេះ មានអាយុកាល២៩ឆ្នាំទៅហើយ ដើម្បីឱ្យការិយាល័យនិពន្ធយើងឆ្លើយបំភ្លឺជាមួយការទាក់ទងទៅនឹងដំណើរការរាជរដ្ឋាភិបាលលោក ហ៊ុន សែន ក្នុងការដឹកនាំប្រទេសនោះ ។


សម្តេច សីហនុ


ប៉ុល ពត


សឺន សាន

យុទ្ធសាស្ត្រឥណ្ឌូចិនរបស់ហូជីមិញគ្រប់គ្រងយួន-លាវ-ខ្មែរតែមួយ ។ កាសែតខ្មែរប៉ុស្តិ៍ចាប់តាំងពីដំណើរការផ្សាយរបស់ខ្លួនមករយៈពេលជិត៤ខែការិយាល័យនិពន្ធយើងបានទទួលសំនួរជាច្រើន ទាក់ទងទៅនឹងថ្ងៃ ៧


លោក ហ៊ុន សែន

ខ្មែរប៉ុស្តិ៍បានខិតខំសិក្សាស្រាវជ្រាវក្នុងការបកស្រាយ ប៉ុន្តែជាទិដ្ឋភាពវិជ្ជមាន ឬអវិជ្ជមានយើងនឹងប្រឹងប្រែងបន្ត និងទទួលនូវការរិះគន់កែតម្រូវ ។ តែជំហ៊ានដំបូងការិយាល័យសូម

( តនៅទំព័រទី០៦ )

# ក្រុមពុទ្ធបរិស័ទវត្តអោយរាប់ការ បោះឆ្នោតត្រូវតែធ្វើជាដាច់ខាត

*** គណកម្មការពុទ្ធិកសមាគមខ្មែរលើកពេលបោះឆ្នោត ព្រោះការសែតមូលបន្ទាច់ ?**

***ដោយ : មាជ សុវណ្ណារ៉ា***

●●●ក្រុមពុទ្ធបរិស័ទបានធ្វើញត្តិទៅកាន់តុលាការអាជ្ញាធរ និងសមត្ថកិច្ចក្រុង Long Beach បំណងស្នើសុំការអនុញ្ញាតិ ឬបទ-អន្តរាគមន៍សំរាប់រៀបចំការបោះឆ្នោតជ្រើសរើសគណៈកម្មការវត្តថ្មី នាថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ នេះ ដោយអនុលោមទៅតាមច្បាប់លក្ខន្តិកៈរបស់ពុទ្ធិកសមាគមវត្ត-វិបស្សនារាម បន្ទាប់ពីវត្តខ្មែរមួយនេះបានគ្រប់គ្រងអំណាចមកជាង ១១ ឆ្នាំទៅហើយ ដោយគណៈ-កម្មការបច្ចុប្បន្នមិនបានធ្វើការបោះឆ្នោតនោះ ។

ការធ្វើញត្តិនេះ កើតបន្ទាប់ពីមានការបដិសេធរបស់គណៈកម្ម-ការវត្តបច្ចុប្បន្ន ដែលដឹកនាំដោយលោក ពៅ សាវ៉ន និង ទិត្យ ស៊ីផាន់ ថាមិនអាច ធ្វើទៅបានក្នុងការបោះ

(តទៅទំព័រទី១១)


លោក គាំ សំភ្លិផាន


លី ខៀប


ទិត្យ ស៊ីផាន់


ពៅ ស៊ីវន


អ្នកតំណាងពុទ្ធបរិស័ទ

# លិខិតឆ្លើយតបកែតម្រូវចំពោះលោក ពៅ សាវ៉ន

●●●យោងតាមលិខិតរបស់មេធាវី James T Stroud ចុះថ្ងៃទី២០ ខែធ្នូ ឆ្នាំ២០០៧ ផ្ញើរមកការិយាល័យកាសែតខ្មែរប៉ុស្តិ៍បានសុំឱ្យកាសែតកែតម្រូវនូវ៩ចំណុច ដែលលោក ពៅ សាវ៉ន យល់ឃើញអំពីការសរសេររឿងមិនពិតចោទទាំងបំពានមកលើគណៈកម្មការវត្ត និងថាជាការបង្ខូចកិត្តិ-យសរបស់លោក និងឪពុកលោក ដែលរូបលោកត្រូវតែរកច្បាប់ដើម្បីការពារខ្លួនលោក ដូចជាការជួលមេធាវីដើម្បីឱ្យកាសែតខ្មែរប៉ុស្តិ៍ធ្វើការ កែតម្រូវការសរសេរក្នុងរយៈពេល២១ថ្ងៃ បន្ទាប់ពីការចេញផ្សាយ ។ **ក្នុងនាមកាសែតខ្មែរប៉ុស្តិ៍ យើងសូមធ្វើការសុំទោសនូវកំហុសឆ្គងក្នុងការសរសេររបស់អ្នកយកព័ត៌មានយើង ដែលគ្រាន់តែសរសេរយោងតាមសំដីរបស់ពុទ្ធបរិស័ទចោទប្រកាន់ចំពោះអស់លោកឃើញថា មានកំហុសក្នុងវិជ្ជាជីវៈអ្នកកាសែតដែរនោះ ។ ការិយាល័យនិពន្ធខ្មែរប៉ុស្តិ៍មិនមានយោបល់អ្វីទេ៖ ទុកឱ្យពុទ្ធបរិស័ទ និងមិត្តអ្នកអានវិនិច្ឆ័យចុះ ។** យើងគ្មានចង់ឈ្លោះចាញ់ ក្នុងករណីប្តឹងផ្តល់ណាទេ ក្នុងនាមជាពុទ្ធសាសនិកជន ។ យើងមានការសោកស្តាយក្នុងនាមជាខ្មែរដូចគ្នា ក៏គួរណាមានការនិយាយគ្នា ដើម្បីកែតម្រូវ ឬធ្វើលិខិតឆ្លើយតបបំភ្លឺណាមួយ ។ ប៉ុន្តែ បែរជាដាក់ការគំរាមតាមរយៈលិខិតមេធាវី ចំពោះអ្នកកាសែតទៅវិញ ដែលនាំឱ្យខាតបង់លុយកាក់ ហើយដែលលុយកាក់នោះគេមិនដឹងថា ជាលុយវត្តបច្ច័យរបស់ពុទ្ធបរិស័ទចូលបុណ្យ ឬលុយអស់លោកផ្ទាល់ខ្លួនទេ ក្នុងការជួលមេធាវី ។

**ចំពោះករណីទាំង៩ចំណុច ដែលឱ្យកាសែតខ្មែរប៉ុស្តិ៍កែពាក្យក្នុងការសរសេរក្នុងអត្ថបទមួយ ដែលមានចំណងជើងថា អំណាចលុយនាំភាពវឹក - វរនៅក្នុងវត្តវិបស្សនារាម ដែលចេញផ្សាយនៅថ្ងៃទី ១០-២៥ ខែធ្នូ ឆ្នាំ២០០៧ ដូច្នេះយើងចាត់ទុកជាមោឃៈក្នុងការសរសេរនូវរាល់ចំណុចទាំងអស់នោះ ដោយយើងសូមទោសចំពោះអស់លោក ។**

ក្នុងបញ្ហានេះដែរ យើងសង្ឃឹមថា ពុទ្ធបរិស័ទរាប់សិបនាក់ដែលបានទៅចោទសួរចំពោះបញ្ហារឿងរ៉ាវគណៈកម្មការពុទ្ធសមាគមវត្តវិបស្សនា-រាម ដោយចោទថា រំលោភលក្ខន្តិកមិនបានបោះឆ្នោតមក១១ឆ្នាំ និងបញ្ហារឿងគំរាមកំហែងព្រះ-

(តទៅទំព័រទី១០)

# ថ្ងៃ ៧មករា និងការកើតមានជនភៀសខ្លួន...

ឆ្លើយតបនឹងសំនួរទាំងឡាយដូចខាងក្រោម រួចបន្តស្វែងរកការជួបជាមួយពួកឥស្សរជន អតីតគណបក្សកុម្មុយនិស្តកម្ពុជា ឬអ្នកដឹកនាំគណបក្សប្រជាជនបច្ចុប្បន្ន ក្នុងការឆ្លើយដោះស្រាយពីបញ្ហានៃសំនួរទាំងអស់ខាងក្រោមនេះ បំណងការចោទប្រកាន់ និងស្ដីបន្ទោសណាមួយមកលើកាសែតខ្មែរប៉ុស្តិ៍ដោយភ្ជាប់បញ្ហាទៅនឹងនិន្នាការនយោបាយណាមួយ ឬបង្កភាពវឹកវរក្នុងយថាហេតុណាមួយ ។

**<u>សំណួរមានដូចតទៅ</u> :**

+តើប្រទេសយួន យៀកណាមក្រហមបញ្ជូនកងទ័ពចូលមកវាយលុកលុយប្រទេសខ្មែរ ដោយសារមានសេចក្ដីសុំពីអ្នកណា ?

+តើប្រជាពលរដ្ឋខ្មែរជាអ្នកអំពាវនាវសុំទៅប្រទេសយួនឬទេ ?

+តើកងទ័ពយួន យៀកណាមក្រហម ចូលមកបានធ្វើសកម្មភាពដូចម្ដេចខ្លះ ទៅលើប្រទេស និងប្រជាពលរដ្ឋខ្មែរ ?

-រិបអូសយកធនធានទ្រព្យសម្បត្តិខ្មែរ

-សម្លាប់ខ្មែរស្នេហាជាតិ

-រៀបចំផ្នែករដ្ឋបាល ដើម្បីគ្រប់គ្រងប្រទេសខ្មែរ

-បញ្ចូលជនជាតិយួនអោយមករស់នៅក្នុងប្រទេសខ្មែរ ។ល។

-តើមែនឬទេ ?

+តើកងទ័ពយួនបានប្រកាសគម្រោងផែនការថានឹងដកចេញពីប្រទេសខ្មែរនៅពេលណាពិតប្រាកដឬទេ ? ក្រោយពីបានជ័យជំនះថ្ងៃ៧ ខែមករា ឆ្នាំ១៩៧៩ ?

+តើកងទ័ពយួនបានតែងតាំងមនុស្សប្រភេទណា អោយដឹកនាំប្រទេសខ្មែរ ?

+តើហេតុដូចម្ដេចបានជាលោក ហ៊ុន សែន ចាប់លោក ប៉ែន សុវណ្ណ យកទៅដាក់គុកនៅហាណូយ ប្រទេសយួនក្រហម ម្ដេចមិនដាក់គុកនៅក្នុងប្រទេសខ្មែរ បើរឿងក្បត់បក្សរបស់ ប៉ែន សុវណ្ណ ជាជាតិខ្មែរពិត ?

+តើលោក ហ៊ុន សែន ជាជាតិអ្វី បានជាមានអំណាចចាប់ ប៉ែន សុវណ្ណ យកទៅដាក់គុកងងឹតនៅហាណូយទៅវិញ ? ឬការក្បត់បក្ស ឬដោយសារ ប៉ែន សុវណ្ណ មិនស្ដាប់បញ្ជារបស់កងទ័ពយួនមែនឬទេ ?

+តើដោយសារក្រុមណា ដែលបានបង្ខំឱ្យប្រទេសយួនត្រូវតែដកកងទ័ពចេញពីប្រទេសខ្មែរ ?

+តើកងទ័ពយួន ទីប្រឹក្សា និងជំនាញការ ព្រមទាំងគ្រួសារ និងប្រជាពលរដ្ឋយួនបានដកចេញអស់ពីប្រទេសខ្មែរឬទេ ?

+តើហេតុអ្វីបានជាលោក ហ៊ុន សែន និយាយប្រឆាំងនឹងការបញ្ជូនកងទ័ពរក្សាសន្តិភាពរបស់អង្គការសហប្រជាជាតិមករៀបចំការបោះឆ្នោតសកលនៅក្នុងប្រទេសខ្មែរនាឆ្នាំ ១៩៩០ ?

+តើហេតុអ្វីបានជាលោក ហ៊ុន សែន មិនព្រមទទួលស្គាល់បរាជ័យរបស់ខ្លួន ក្នុងពេលបោះឆ្នោតសកលឆ្នាំ៩៣ រៀបចំឡើងវិញដោយអង្គការសហប្រជាជាតិ ? (ចំណាយថវិកាពីរពាន់លានដុល្លារ)

+តើហេតុអ្វីបានជាលោក ហ៊ុន សែន យល់ព្រមទទួលយកតំណែងជានាយករដ្ឋមន្ត្រីទីពីរ ? ហើយតាំងរដ្ឋាភិបាលចំរុះឆ្នាំ១៩៩៣ ?

+តើហេតុអ្វីបានជាលោក ហ៊ុន សែន ធ្វើរដ្ឋប្រហារទំលាក់នាយករដ្ឋមន្ត្រីទីមួយ រួចហើយប្ដឹងទៅតុលាការអោយចាប់នាយករដ្ឋមន្ត្រីទីមួយយកមកកាត់ទោសពីបទប្រើអំណាចខុសច្បាប់ នាឆ្នាំ១៩៩៧ ?

+តើហេតុអ្វីលោក ហ៊ុន សែន ធ្វើនយោបាយប្រជាប្រិយនិយមខ្លាំងក្លាម្ល៉េះ ទៅលើប្រជា-



ហ៊ុន សែន និងអតីតនាយករដ្ឋមន្ត្រីវៀត វ៉ាត់ ស៊ុង





អតីតជនភៀសខ្លួនក្នុងជំរំខៅអ៊ីដាង នាទសវត្សឆ្នាំ ១៩៨០

ពលរដ្ឋខ្មែរ ?

+តើហេតុអ្វីលោក ហ៊ុន សែន រកចាប់ជនឃាតករសម្លាប់សកម្មជនស្នេហាជាតិខ្មែរ យកទៅកាត់ទោសរកយុត្តិធម៌ឱ្យប្រជាពលរដ្ឋខ្មែរពុំដែលបានដូច្នេះ ?

+តើសេដ្ឋកិច្ចប្រទេសខ្មែរមានការរីកចំរើនល្អលាស់ឬទេ ? សព្វថ្ងៃនេះក្រោមការគ្រប់គ្រងលោក ហ៊ុន សែន ?

+តើហេតុដូចម្ដេចបានជា លុយរៀលខ្មែរចុះថ្លៃខ្លាំងម្ល៉េះកាលពី២០ឆ្នាំមុន ១ដុល្លារតម្លៃជាងពីរពាន់រៀល លុះមកដល់ឥឡូវនេះ ១ដុល្លារតម្លៃជិតប្រាំពាន់រៀលទៅវិញ? តើនេះបង្ហាញថា សេដ្ឋកិច្ចខ្មែររីកលូតលាស់ល្អឬ ?

+តើហេតុដូចម្ដេចបានជានិស្សិតរៀនចប់មហាវិទ្យាល័យ និងប្រជាពលរដ្ឋខ្មែររាប់សែននាក់ ឥតមានការងារធ្វើនៅក្នុងស្រុកត្រឡប់ទៅជាបញ្ជូនឱ្យទៅស៊ីឈ្នួលគេនៅប្រទេសក្រៅទៅវិញ ?

+តើហេតុដូចម្ដេចបានជាមន្ត្រីធំៗ ឧកញ៉ាធំៗ និងនាយទុនធំៗ មានកាន់កាប់សម្បទានដីរាប់រយរហូតដល់រាប់ពាន់ហិកតាច្រើនខ្លាំងម្ល៉េះ ? ចំណែកប្រជាពលរដ្ឋខ្មែរត្រឡប់ទៅជារកដីសង់គេហដ្ឋានមួយយ៉ាងតូចស្នាក់នៅពុំបានផង កុំថាឡើយដីសំរាប់ដាំដំណាំចិញ្ចឹមជីវិត ? ធ្វើឱ្យមានជម្លោះដីធ្លីនេះរវាងប្រជាពលរដ្ឋ និងអ្នកមានអំណាចយ៉ាងខ្លាំងក្លាថែមទៀត នាសព្វថ្ងៃនេះ ។ តើនេះហើយ ឬនយោបាយល្អប្រសើរបំផុតរបស់លោក ហ៊ុន សែន ដើម្បីបន្ធូរភាពក្រីក្ររបស់ប្រជាពលរដ្ឋខ្មែរ ?

**ចម្លើយរបស់សំនួរទាំងនេះនឹងមាននៅក្នុងអត្ថបទបន្តនៅទៀតនេះ សូមអញ្ជើញតាមដានដូចតទៅ :**

***ដោយ : ម៉ម យ៉ាន***

***: មាជ សុវណ្ណារ៉ា***

បើពិនិត្យមើលឃើញមានបញ្ហាធំៗច្រើនណាស់ដែលត្រូវដោះស្រាយ ប៉ុន្តែរដ្ឋាភិបាលខ្មែរក្រោមការដឹកនាំលោក ហ៊ុន សែន ពុំដែលបើកសិទ្ធិសេរីភាពឱ្យបណ្ដាញព័ត៌មាន និងសកម្មជនស្នេហាជាតិពិតប្រាកដឱ្យធ្វើការសិក្សាស៊ើបអង្កេតឱ្យដឹងពីសកម្មភាពអច្ចុរិត ពុករលួយរបស់នាម៉ឺនធំៗ និងនាយទុនធំៗទាំងអស់ទាំងខ្មែរទាំងបរទេសឱ្យបានដឹងពិតប្រាកដសោះហួតដល់ធ្វើការគំរាមកំហែងយ៉ាងធ្ងន់ដល់ជនណាហ៊ានលើកយករឿងអាស្រូវអាក្រក់ និងការឃុបឃិតរវាងមន្ត្រីធំ និងនាយទុនធំៗនោះទៀតផង ។ ដោយហេតុមានការស៊ីគ្រលគ្នារវាងលោក ហ៊ុន សែន មន្ត្រីធំៗ និងនាយទុនទាំងនោះរកស៊ីចូលហ៊ុនជាមួយគ្នាថែមទៀតផង ។

កងទ័ពយួនយៀកណាមក្រហមបានចូលមកវាយលុកលុយរាតត្បាតប្រទេសខ្មែរ នៅចុងឆ្នាំ១៩៧៨ រួចហើយបានទទួលជ័យជំនះ ហើយត្រួតត្រាទីក្រុងធំៗ និងទីក្រុងក្នុងខេត្តទាំងអស់ក្នុងប្រទេសខ្មែរ ។ បន្ទាប់មកប្រកាសយកថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ ទុកជាថ្ងៃមហាជោគជ័យរបស់កងទ័ពយួនក្រហមមកលើប្រទេសខ្មែរ ។

នៅពេលកងទ័ពយួនក្រហមចំនួនម្ភៃម៉ឺននាក់ (២០០.០០០នាក់) បានចូលកាន់កាប់ប្រទេសខ្មែរ ហើយកងទ័ពយួនក្រហមក៏បានដង្ហែរក្រុមខ្មែរ មួយក្រុមមកបន្តឱ្យធ្វើជាអ្នកដឹកនាំអាយ៉ង ពីព្រោះអ្វីៗទាំងអស់នៅក្នុងប្រទេសខ្មែរបានត្រូវកងទ័ពយួនកាន់កាប់ និងចាត់ចែងកិច្ចការងារទាំងអស់តាមគម្រោងផែនការទុកមកនោះដូចតទៅ :

**១**-លើកបន្តុបក្រុមលោក ប៉ែន សុវណ្ណ, ជា ស៊ីម, ហេង សំរិន, ហ៊ុន សែន ឱ្យធ្វើជាមេដឹកនាំប្រទេសខ្មែរជំនួសក្រុមខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត ។

**២**-បញ្ចូលទីប្រឹក្សា និងជំនាញការយួនឱ្យចូលទៅមើល និងធ្វើកិច្ចការទាំងអស់នៅក្នុងរដ្ឋាភិបាលអាយ៉ង ។

**៣**-បញ្ជាឱ្យកងទ័ពយួនចូលទៅកាន់ទីក្រុងទាំងអស់ ដើម្បីប្រមូល និងដឹកជញ្ជូនតាមរថយន្តបន្ទុកធំៗរបស់កងទ័ព មានគ្រឿងម៉ាស៊ីន និងសំភារៈគ្រប់ប្រភេទ ដែលមាននៅក្នុងរោងចក្រធំៗគ្រប់កន្លែងនៅក្នុងឃ្លាំងធំៗរបស់រដ្ឋ និងឯកជន នៅក្នុងហាងលក់ទំនិញធំតូចទាំងអស់ នៅតាមទីក្រុងបន្ទាប់មករបស់ទាំងអស់នោះត្រូវកងទ័ពយួនដឹកជញ្ជូនតាមរថយន្តធំៗទាំងខ្សែៗ ទាំងយប់ទាំងថ្ងៃទៅកាន់ប្រទេសយួនយៀកណាមក្រហមយ៉ាងរំភើយ ។ គ្មានរបស់អ្វីទេដែលកងទ័ពយួនមិនយកនោះ ។

៤-បញ្ជាឱ្យប្រធានបក្សកុម្មុយនិស្តយួនដឹកនាំក្រុមបុគ្គលិកផ្នែករដ្ឋបាលឱ្យចូលទៅរៀបចំប្រជាពលរដ្ឋខ្មែរនៅតាមទីក្រុងគ្រប់ខេត្ត និងតាមស្រុក ឃុំ ភូមិទាំងអស់ក្នុងប្រទេសខ្មែរទាំងមូល ។ មានការធ្វើបញ្ជីជំរឿនប្រជាពលរដ្ឋ ហើយមានអ្នកបកប្រែជាជាតិខ្មែរកម្ពុជាក្រោម ។

ដូច្នេះ កិច្ចការរៀបចំប្រជាពលរដ្ឋទាំងអស់ត្រូវនៅក្រោមអំណាចទីប្រឹក្សា និងជំនាញការទីក្រុង ខេត្ត ស្រុក ឃុំ និងភូមិទាំងអស់ ។

ការរៀបចំនេះ រដ្ឋាភិបាលយួនក្រហមបានកំណត់ពេលឱ្យរួចស្រេចទាំងអស់ក្នុងរយៈពេល ១០ឆ្នាំ ពីឆ្នាំ១៩៧៩ ដល់១៩៨៩ ។

**៥**-រដ្ឋាភិបាលយួនបានអនុញ្ញាតិឱ្យប្រពន្ធកូនជាគ្រួសារកងទ័ពទាំងអស់ ចូលមករស់នៅប្រទេសខ្មែរយ៉ាងសុខសាន្ត ក្រោមការថែរក្សានៃកងទ័ព ព្រមទាំងប្រជាពលរដ្ឋយួនណាដែលចង់មករស់នៅអាចចូលបានដោយសេរី ។

**៦**-មេដឹកនាំខ្មែរអាយ៉ងឱ្យកងទ័ពយួនក្រហមមានអំណាចពេញបរិបូរ ក្នុងការចង់បានរបស់អ្វីដែលខ្លួនចង់បាន ដើម្បីជារង្វាន់តបស្នងក្នុងការប្ដូរជីវិតមកជួយសង្គ្រោះប្រជាពលរដ្ឋខ្មែរ (តែការពិតជាការចូលមករិបអូសយកប្រទេសខ្មែរ ហើយត្រួតត្រាតែម្ដងទៅវិញទេ) ។

នៅពេលដែលកងទ័ពយួនក្រហម បានកាន់កាប់គ្រប់គ្រងប្រទេសខ្មែរសព្វគ្រប់ហើយ រួចហើយបន្តក្រុមអាយ៉ងឱ្យកាន់អំណាចស្រេចបាច់ហើយ ។ ក្រុមនេះបានថ្លែងប្រកាសអះអាងយ៉ាងសប្បាយរីករាយថា ប្រទេសខ្មែរបានរំដោះចេញផុតពីពួកខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត ហើយដើម្បីជួយសង្គ្រោះប្រជាពលរដ្ឋខ្មែរ ឱ្យបានរួចផុតពីការកាប់សម្លាប់របស់ខ្មែរក្រហមប្រល័យពូជសាសន៍ដោយសារតែមានការកាប់សម្លាប់នៃក្រុមខ្មែរ ក្រហមនេះហើយ ទើបបណ្ដាលឱ្យក្រុមខ្មែរក្រហមយួននេះ សុំអំពាវនាវឱ្យកងទ័ពមហាមិត្តយួនក្រហមលើកទ័ពចូលមកដេញកំចាត់ក្រុមប្រល័យពូជសាសន៍ខ្មែរនេះ ។

ដោយសារការជួយសង្គ្រោះរបស់កងទ័ពមហាមិត្តយួននេះ ក្រុមខ្មែរក្រហមយួន សូមសម្ដែងអំណរអរគុណដល់ប្រទេសមហាមិត្តយួនក្រហមដែលបានបញ្ជូនកងទ័ពដ៏មហិមាឱ្យចូលមកដេញកំចាត់ខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត បានសម្រេចជោគជ័យ កាលពីថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ ។ ប្រជាពលរដ្ឋខ្មែរ និងក្រុមខ្មែរក្រហម

( តនៅទំព័រទី ១១ )

# ស្នើដាក់លក្ខខ័ណ្ឌជំនួយអាមេរិក...

ក្រហម ដែលបច្ចុប្បន្នសភាទាំងពីររបស់ប្រទេសនេះ កំពុងតែលើករបៀបវិរៈក្នុងការពិភាក្សាថា តើគួរមានការសម្រេចឬអត់ ។

ញត្តិនោះក៏បានលើកនូវចំណុចនៃភាពលំអៀង និងអយុត្តិធម៌ចំពោះការចាប់ខ្លួនសមមិត្តនារី អៀង ធិរិទ្ធិ ដែលជាភរិយាអតីតឧបនាយករដ្ឋមន្ត្រីនៃរបបខ្មែរក្រហម អៀង សារី ដែលជាសមាជិកមួយនៃគណៈរដ្ឋមន្ត្រីរបស់រដ្ឋាភិបាល ប៉ុល ពត សម័យនោះ ដែលសមាជិកគណៈរដ្ឋមន្ត្រីដទៃទៀត មិនត្រូវបានចាប់ខ្លួន ឬឃុំខ្លួន ដោយអះអាងថា គ្មានហេតុផលណាដែលសាលាក្តីនេះមិនអាចចាប់ខ្លួនមន្ត្រីជាន់ខ្ពស់រដ្ឋាភិបាល ហ៊ុន សែន បច្ចុប្បន្នដែលបានជាប់ពាក់ព័ន្ធក្នុងការសម្លាប់មនុស្សនាសម័យខ្មែរក្រហមកាន់អំណាច មានសមមិត្ត គាត ឈន់ ប្រតិភូរដ្ឋមន្ត្រីសំរាប់ខុទ្ទកាល័យនាយករដ្ឋមន្ត្រីរបស់កម្ពុជាប្រជាធិបតេយ្យ, សមមិត្ត ជូន មុំ រដ្ឋមន្ត្រីក្រសួងវិទ្យាសាស្ត្រ និងសមមិត្ត ឈន ហៃ រដ្ឋមន្ត្រីក្រសួងប្រៃសណីយ៍ និងទូរគមនាគមន៍ ។

ចុងបញ្ចប់ញត្តិក្រុមខ្មែរ-អាមេរិកាំងមួយក្រុមនោះ ហាក់ដាក់ការជឿជាក់ក្នុងន័យជំរុញឱ្យតុលាការខ្មែរក្រហម គួរតែត្រូវចាប់ខ្លួនសមមិត្ត ហោ ណាំហុង បច្ចុប្បន្នឧបនាយករដ្ឋមន្ត្រី និងជារដ្ឋមន្ត្រីការបរទេសនៃរដ្ឋាភិបាល ហ៊ុន សែន ដែលក្នុងញត្តិចោទថា រូបលោកជាមេសម្លាប់មនុស្សនៅក្នុងគុកបឹងត្របែកផងដែរនោះ ។ ដោយគាត់ជាអ្នកទទួលខុសត្រូវការសម្លាប់ជនជាតិខ្មែរ អ្នកចេះដឹងបញ្ញវន្ត ដែលបានទៅសិក្សានៅបរទេស ដែលត្រូវបានគេកុហកឱ្យចូលមកស្រុកខ្មែរ ដោយចៅហ្វាយនាយរបស់គាត់ គឺសមមិត្ត អៀង សារី ។

អ្នកនាំពាក្យរបស់តុលាការខ្មែរក្រហម លោក រាជ សម្បត្តិ បានប្រាប់ខ្មែរប៉ុស្តិ៍តាមទូរស័ព្ទឱ្យដឹងថា មកដល់ពេលនេះ គេមិនគួរជ្រៀតជ្រែកបញ្ហារបស់តុលាការទេ យើងយល់ថា ពួកខ្មែរ-អាមេរិកាំងទាំងនោះ គាត់អត់យល់ច្បាប់ទេ ។ បើគេធ្វើតុលាការតាមសំណូមពររបស់មនុស្សអញ្ចឹង គេមិនបាច់ធ្វើច្បាប់ ឬបង្កើតតុលាការទេ ។

លោក រាជ សម្បត្តិ បន្តថា យើងមិនអាចសំណូមពរអីតាមតែអំពើចិត្តនោះទេ ច្បាប់គឺច្បាប់ ដោយច្បាប់របស់តុលាការនៃអង្គជំនុំជំរះទោសខ្មែរក្រហម គឺធ្វើឡើងសំរាប់មេដឹកនាំជាន់ខ្ពស់ និងអ្នកទទួលខុសត្រូវផ្ទាល់នៃការកាប់សម្លាប់ ។ ដូច្នេះ តុលាការគេមិនអាចធ្វើការអ្វីតាមការនឹកឃើញនោះទេ ។

តុលាការកាត់ទោសពួកមេដឹកនាំខ្មែរក្រហម បានកើតឡើងក្រោមកិច្ចសហការរបស់រាជរដ្ឋាភិបាលលោក ហ៊ុន សែន និងអង្គការសហប្រជាជាតិ កាលពីឆ្នាំ២០០៥ ដែលគ្រោងថវិកាប្រមាណជង ៥៦លានដុល្លារអាមេរិកក្នុងដំណើរការរបស់ខ្លួន ។

ពាក់ព័ន្ធទៅនឹងរដ្ឋាភិបាលអាមេរិកាំង គ្រោងផ្តល់ជំនួយថវិកាសំរាប់អង្គជំនុំជំរះទោសនោះ លោក រាជ សម្បត្តិ អះអាថា សហរដ្ឋអាមេរិកឱ្យលុយ ឬមិនឱ្យវាជារឿងរបស់គេ ព្រោះដំណើរការតុលាការដែលមានប្រទេសចំនួន១០រួមគ្នាធ្វើការកំពុងតែវិវឌ្ឍន៍ និងភាពរលូនទៅមុខហើយ ។ ប៉ុន្តែអ្វីដែលយើងសោកស្តាយថា សហរដ្ឋអាមេរិកនឹងបាត់បង់ឱកាសក្នុងការចូលរួមជួយរកយុត្តិធម៌ជូនជនរងគ្រោះកម្ពុជា ដែលរបបខ្មែរក្រហមបានកាប់សម្លាប់មនុស្សអស់ជិត២លាននាក់ ព្រោះសម័យកាលនោះរដ្ឋាភិបាលអាមេរិកាំង បានជួយគាំទ្រនូវផ្នែកគោលនយោបាយដឹកនាំរបស់សេនាប្រមុខ លន់ នល់ ផ្នែកថវិកា និងសំភារៈយោធា ដែលបានដកទ័ពចេញចោលរបបសាធារណៈរដ្ឋទាំងកណ្តាលទីលានប្រយុទ្ធជាមួយពួកទ័ពខ្មែរក្រហម ដោយបន្សល់ទុកនូវការស្លាប់របស់ទ័ពសាធារណៈរដ្ឋរាប់ម៉ឺននាក់ ពីការសម្លាប់របស់ពួកខ្មែរក្រហម នៅពេលដែលរបប លន់ នល់ បានដួលរលំនាឆ្នាំ ១៩៧៥នោះ ។

គេពុំទាន់ឃើញប្រតិកម្មណាមួយនៅឡើយទេ ពីរាជរដ្ឋាភិបាលកម្ពុជាពីញត្តិចោទប្រកាន់នោះ ។ លោកឧបនាយករដ្ឋមន្ត្រី ហោ ណាំហុង ខ្មែរ ប៉ុស្តិ៍ បានទាក់ទងតាមទូរស័ព្ទ ប៉ុន្តែទូរស័ព្ទរបស់លោកពុំត្រូវបានលើកទទួលភ្ជាប់ ដើម្បីសុំសំដីប្រតិកម្ម បាននៅឡើយទេដែរ ។

អ្នកនាំពាក្យរាជរដ្ឋាភិបាលកម្ពុជា លោក ខៀវ កញ្ញារិទ្ធ ធ្លាប់អះអាងប្រាប់អ្នកកាសែតឱ្យដឹងថា ការស្នើ ឬទាមទារណាមួយចំពោះការនាំខ្លួនអតីតព្រះមហាក្សត្រខ្មែរ សម្តេចព្រះនរោត្តម សីហនុ ទៅតុលាការ គឺជាការខុសទៅនឹងច្បាប់រដ្ឋធម្មនុញ្ញ និងព្រះរាជអភ័យឯកសិទ្ធិ ដែលមិនអាចប៉ះពាល់អតីតព្រះមហាក្សត្រខ្មែរមួយនោះបានទេ ។

ការស្នើសុំចង់ឱ្យសម្តេចនរោត្តម សីហនុ ចូលព្រះកាយទៅបំភ្លឺក្នុងតុលាការខ្មែរក្រហម ដោយបណ្ឌិត ឡៅ ម៉ុងហៃ ដែលជាអ្នកច្បាប់របស់អង្គការសិទ្ធិមនុស្សអាស៊ី មានទីស្នាក់ការនៅក្រុងហុងកុង កាលពីឆ្នាំ២០០៧នោះ ត្រូវបានរងការទទួលប្រតិកម្មភ្លាមៗផងដែរ ពីលោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន ទៅនឹងការគំរាមកំហែងបណ្តេញតុលាការកូនកាត់មួយឱ្យចេញពីប្រទេសកម្ពុជា ប្រសិនបើករណីណាមួយធ្វើឱ្យប៉ះពាល់ដល់អតីតព្រះមហាក្សត្រនរោត្តម សីហនុ ។

ពួកមេដឹកនាំខ្មែរក្រហមឋានៈខ្ពស់បំផុត នៃរបបប្រល័យពូជសាសន៍ ចន្លោះឆ្នាំ១៩៧៥-១៩៧៨ ចំនួន៥នាក់ហើយត្រូវបានចាប់ខ្លួន កាលពីឆ្នាំ ២០០៧ មានអតីតអនុលេខាបក្ស, ជាប្រធានរដ្ឋសភាផង គឺ នួន ជា, អតីតប្រធានក្រុមប្រឹក្សារដ្ឋនៃរបបខ្មែរក្រហម លោក ខៀវ សំផន, ឧបនាយករដ្ឋមន្ត្រី និងជារដ្ឋមន្ត្រីក្រសួងការបរទេស លោក អៀង សារី និងភរិយារបស់គាត់ គឺសមមិត្តនារី អៀង ធិរិទ្ធិ រដ្ឋមន្ត្រីកិច្ចការសង្គមកិច្ច រួមទាំងអតីតមេគុកទួលស្លែងលោក កាំង ហ្គិចអៀង ហៅ "ឌុច" កំពុងឃុំខ្លួន ដើម្បីត្រៀមឡើងតុលាការវិនិច្ឆ័យទោស ។ ចំណែកមេកំពូលរបបកាប់សម្លាប់នេះ គឺ ប៉ុល ពត ដែលជាបងធំទី១ បានស្លាប់កាលពីឆ្នាំ១៩៩៨ និងអតីតមេទ័ពដែលមានឥទ្ធិពលបញ្ជាការកាប់សម្លាប់ដែរនោះ គឺ តាម៉ុក ក៏ត្រូវបានស្លាប់បាត់បង់ជីវិតផងដែរ នាឆ្នាំ ២០០៧កន្លងទៅនេះ ។

ដំណើរការកាត់ក្តីយឺតយ៉ាវរបស់តុលាការខ្មែរក្រហម ធ្វើឱ្យមានការព្រួយបារម្ភពីសាធារណៈជនថា វានឹងអាចបាត់បង់សាក្សីនៃអ្នកទទួលខុសត្រូវផ្ទាល់ជាមេដឹកនាំ ព្រោះតែវ័យជរា និងជម្ងឺពួកគេអាចនឹងស្លាប់មុននឹងការឆ្លើយបំភ្លឺតុលាការនោះ ៕



## នៅលេខ San Diego ...

ដែលយូរៗឃើញមានរៀបចំកម្មវិធីម្តងៗ សំរាប់ការសប្បាយរាំរែក ដែលជួលភ្លេងភ្លាត់ពីតំបន់ Long Beach ឬ Los Angeles ទៅប្រគុំកំសាន្ត ដូចជាបុណ្យចូលឆ្នាំសកល ឬឆ្នាំខ្មែរ ឬកម្មវិធីជួបជាមួយអ្នកចម្រៀង និងតារាភាពយន្តមកពីស្រុកខ្មែរជាដើម។

● **ទីវត្តអារាមសំរាប់ជាទីសក្ការៈរបស់ខ្មែរ :**

-នៅតាមតំបន់ខ្មែរ San Diego គេឃើញមានវត្តខ្មែរចំនួន៣កន្លែង សំរាប់ការគោរពបូជាក្នុងនាមជាអ្នកកាន់ព្រះពុទ្ធសាសនាតរៀងរហូតមក ។ ព្រះសង្ឃដែលកាន់ព្រះវស្សាប្រចាំវត្តទាំង៣នោះ តែងតែទទួលនូវការគោរពប្រតិបត្តិពីបងប្អូនខ្មែរ នាថ្ងៃបុណ្យទាន ឬកម្មវិធីពិសេសៗអ្វីមួយ ។ វត្តអារាមដែលជាស្រែបុណ្យរបស់ពុទ្ធបរិស័ទ ព្រោះតែការជំនឿដាក់ចិត្តថា មានបុណ្យ និងបាបនោះ បើទោះបីរវល់មមាញឹកយ៉ាងណាក៏មិនភ្លេចដែរ នៅថ្ងៃសីលថ្ងៃខែដាច់ ឬពេញបូរមី ដើម្បីយកចង្ហាន់ទៅប្រគេនព្រះសង្ឃ និងស្តាប់ការទេសនា សន្សំបុណ្យកុសល ។ ប៉ុន្តែជាអកុសលវត្តមួយ ក្នុងចំណោមវត្តអារាមទាំង៣នោះ កំពុងតែមានរឿងវិវាទឈ្លោះទាស់ទែងគ្នាប្រកាន់បក្សពួក រហូតដល់មានការប្តឹងផ្តល់ ដែលរហូតមកដល់ឥឡូវមិនទាន់ត្រូវបានបញ្ចប់នៅឡើយទេ។ គណៈកម្មការ និងព្រះសង្ឃឈ្លោះគ្នា ព្រោះតែបញ្ហាការគ្រប់គ្រងទ្រព្យសម្បត្តិវត្ត និងលុយកាក់តែប៉ុណ្ណោះ ចំពោះវត្តខ្មែរ ទោះនៅទីរដ្ឋណាក៏ដោយមានទិដ្ឋភាពប្រហាក់ប្រហែលគ្នា ដែលជាក់ស្តែងដូចជាវត្តអាយរ៉ាប់ក្រុងខ្មែរ Long Beach ក្រុមពុទ្ធបរិស័ទ និងគណៈកម្មការវត្តបច្ចុប្បន្នមិនទាន់ត្រូវបានដោះស្រាយដល់ការស្វែងរកទីបញ្ចប់ណាមួយនៅឡើយទេ ក្នុងភាពសម្រុះសម្រួលគ្នានោះ។

-និយាយរួមខ្មែរនៅទីក្រុង San Diego មិនសូវជួបជុំគ្នាឱ្យបានញឹកញ៉ាប់ក្នុងការសប្បាយដូចអ្នក Long Beach ប៉ុន្មានទេ ដែលការកម្រនោះ គេច្រើនជួបគ្នាម្តងម្កាលក្នុងពិធីចូលឆ្នាំ ភ្ជុំបិណ្ឌ និងពិធីពិសេសម្តងៗ និងក្រៅពីការជួបគ្នាតិចតួចនៅតាមទីផ្សារខ្មែរមួយដែលរៀបរាប់ខាងលើ និងហាងលក់សំបុត្រយន្តហោះ និងហាង Donut ឬវត្តអារាមនោះ ព្រោះតែភារកិច្ចរកស៊ី ដើម្បីក្រពះជាមួយការរស់នៅដាច់ឆ្ងាយពីគ្នាផងនោះ ៕

## ក្រុមពុទ្ធបរិស័ទវត្តអាយរ៉ាប់...

ឈរលើគោលការណ៍មិនឈ្នះមិនចាញ់ ក្នុងនាមខ្មែរស្វែងរកប្រយោជន៍ក្នុងសហគមន៍ខ្មែរយើងទាំងអស់គ្នា ។

គេមិនទាន់ប្រាកដថា តើថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ ខាងមុខនេះ នឹងមានការបោះឆ្នោតឬក៏យ៉ាងណាទេ? ។ ក៏ប៉ុន្តែយើងសង្ឃឹមថា សូមកុំឱ្យមានអំពើហឹង្សាណាមួយកើតមាននាឱកាសថ្ងៃនោះ ប្រសិនបើគូប្រកួតមិនស៊ីចង្វាក់គ្នាដោយប្រការណានោះ ៕

## ពីរដ្ឋបាលកុលសម្ព័ន្ធ...

ថ្ងៃទី៤ ខែមេសា ឆ្នាំ១៩៤៦ បារាំងបានចុះហត្ថលេខាជាមួយប្រទេសកម្ពុជា ដើម្បីបញ្ចប់ការត្រួតត្រាជាអាណាព្យាបាលរបស់បារាំង លើកម្ពុជា ក៏ប៉ុន្តែនៅរក្សា "កុម្មីសែដឹឡារ៉េពុយប្លីក" នៅឡើយ នៅរក្សាទីប្រឹក្សាបារាំងសំរាប់គណៈរដ្ឋមន្ត្រីសំរាប់ខេត្តក្រុង រក្សាក្រសួងការពារជាតិរក្សាក្រសួងការបរទេសនៅឡើយ ។ ក្រៅពីនេះ កម្ពុជាត្រូវស្ថិតនៅជាមួយសមាជិកនៃ "សហភាពបារាំង" ។

ខែមេសា ឆ្នាំ១៩៤៦ កំណើតគណបក្សប្រជាធិបតេយ្យខ្មែរ ។ គឺជាគណបក្សខ្មែរដំបូងបង្អស់ដឹកនាំដោយយុវបញ្ញវន្ត ស៊ីម វ៉ា, ឈាម វ៉ម, អៀវ កើស ។

ខែមិថុនា ទ្រង់ ស៊ីសុវត្ថ យុត្តិវង្ស ដែលកាលពីនៅស្រុកបារាំង ចូលជាសមាជិកគណបក្សសង្គមនិយម បានជាប់ឆ្នោតជាប្រធានគណបក្សប្រជាធិបតេយ្យ ។

ថ្ងៃទី៧ ខែសីហា ក្រុមខ្មែរឥស្សរៈ៣០០នាក់ដឹកនាំដោយ ដាប ឈួន ទ្រង់ ចន្ទ រង្សី និង សឺង ង៉ុកមិញ បានវាយយកសៀមរាប និងអង្គរ ហើយស្លាប់បារាំង៧នាក់ :

ថ្ងៃទី១ ខែកញ្ញា ការបោះឆ្នោតលក្ខណៈប្រជាធិបតេយ្យដំបូងបង្អស់នៅកម្ពុជា ដើម្បីរើសសភាធម្មនុញ្ញ ។ គណបក្សប្រជាធិបតេយ្យបានអាសនៈច្រើនដាច់ខាត ហើយបានក្លាយទៅជាសម្លេងដ៏ខ្លាំងក្លាប្រឆាំងនឹងអាណានិគមបារាំង ហើយនឹងជាសម្លេងនៃការកែទំនើបកម្មសំរាប់កម្ពុជា ។

ថ្ងៃទី១៧ ខែវិច្ឆិកា កែទម្រង់សន្ធិសញ្ញា បារាំង-សៀម ស្របពេលសន្ធិសញ្ញាតូក្យូ ឆ្នាំ ១៩៤១ កម្ពុជាផ្នែកខាងជើងក៏បានត្រឡប់ពីដៃសៀមមកកម្ពុជាវិញ (សៀមកាន់កាប់បាន៥ឆ្នាំ) សន្ធិសញ្ញាបារាំង-សៀម ឆ្នាំ១៩៣៧ ចាប់ផ្តើម មានអនុភាពឡើងវិញ ថ្ងៃ១៥ ខែធ្នូ ឆ្នាំ១៩៤៥ រដ្ឋាភិបាលទ្រង់ ស៊ីសុវត្ថ យុត្តិវង្ស ។

**III-រាជានិយមអាស្រ័យសភា (ពហុបក្ស និយម) ក្នុងក្របខ័ណ្ឌនៃរដ្ឋមួយជាសមាជិកនៃសហភាពបារាំង (១៩៤៦-១៩៥៣) :**

១-រដ្ឋាភិបាលស៊ីសុវត្ថិយុត្តិវង្ស (១៥.១២.១៩៤៦ - ២៤.៧.១៩៤៧) :

-នាយករដ្ឋមន្ត្រី-រដ្ឋមន្ត្រីមហាផ្ទៃ : ស៊ីសុវត្ថិយុត្តិវង្ស

-រដ្ឋមន្ត្រីយុត្តិធម៌ : ស៊ីសុវត្ថិវត្តឆាយាវង្ស

-រដ្ឋមន្ត្រីការពារជាតិ : សុន វ៉ឺនសៃ

-រដ្ឋមន្ត្រីហិរញ្ញវត្ថុ : សឺន សាន

-រដ្ឋមន្ត្រីសេដ្ឋកិច្ចជាតិ : ប៉ែន សំអែល

-រដ្ឋមន្ត្រីអប់រំជាតិ : ឈាន វ៉ម

-រដ្ឋមន្ត្រីសាធារណៈការ-ទូរគមនាគមន៍ និងសុខាភិបាល : ប្រាក់ សារិន

-ទេសរដ្ឋមន្ត្រីទទួលបន្ទុករាជធានីភ្នំពេញ : ប៉ែន នុត

-រដ្ឋលេខាធិការពត៌មាន និងឃោសនា : ហ៊ុយ គន្ធុល

-រដ្ឋលេខាធិការហិរញ្ញវត្ថុ : ហាក់ ម៉ុងសេង

-រដ្ឋលេខាធិការធម្មការ-ពុទ្ធិកៈសិក្សា និងវិចិត្រសិល្បៈ : អូ ឈីន

-រដ្ឋលេខាធិការផ្គត់ផ្គង់ : អ៊ុក ធុច

(តនៅលេខក្រោយ)

## ញត្តិសុំហត្ថលេខាប្រឆាំងរដ្ឋាភិបាល ហ៊ុន សែន...

ដែលដាក់ឈ្មោះខ្លួនថា ជាគណៈកម្មាធិការខ្មែរដែលបង្កើតឡើងក្នុងបំណងប្រឆាំងតវ៉ាទៅនឹងវត្តមានលោកឧបនាយករដ្ឋមន្ត្រី និងគូកនរដ្ឋាភិបាល ហ៊ុន សែន ដ៏ទៃទៀតមកកាន់ក្រុងខ្មែរ ដោយចោទប្រកាន់ថា ពួករដ្ឋាភិបាលកម្ពុជាទាំងនោះ កំពុង

លោក សុខ អាន

លោក ខៀវ កាញារីទ្ធ

តែប្រើអំណាចជះឥទ្ធិពលនយោបាយមកលើសហគមន៍ខ្មែរនៅបរទេស ពិសេសក្រុងខ្មែរ Long Beach ដែលកកកុញទៅដោយបងប្អូនខ្មែរដ៏ធំជាងគេនៃសហគមន៍ខ្មែរ ក្រៅប្រទេស ។ ប៉ុន្តែទោះបីជាគម្រោងញត្តិសុំហត្ថលេខា ដើម្បីសុំច្បាប់សាលាក្រុងធ្វើបាតុកម្មប្រឆាំង ក៏ពួកមន្ត្រីរដ្ឋាភិបាលនឹងមិនរុញរាក្នុងការធ្វើដំណើរមកចូលរួមជាគណៈធិបតីក្នុងពិធីព្យុហយាត្រាអបអរសាទរបុណ្យចូលឆ្នាំខ្មែរ នាខែមេសាឆ្នាំ២០០៨ខាងមុខនេះដែរ ។

-កាលពីដើមខែធ្នូ ឆ្នាំ២០០៧ កន្លងទៅនេះ គណៈប្រតិភូក្រុងខ្មែរ ដែលដឹកនាំដោយអ្នកស្រី សិទ្ធា សាន បានជួបសារ នាការជាមួយប្រមុខរាជរដ្ឋាភិបាល ហ៊ុន សែន ដើម្បីបង្ហាញមោទនភាពខ្មែរនៅក្រៅប្រទេស ពិសេសការបង្កើតក្រុងខ្មែរ ដើម្បីភ្ជាប់ចំណងទាក់ទងការទូតជាមួយគ្នា ខណៈដែលមានការរិះគន់ និងស្តីបន្ទោសពីមតិមហាជនខ្មែរផងដែរនោះ ក្រុមប្រតិភូក្រុងខ្មែរមួយនេះក៏បានស្នើអញ្ជើញរាជរដ្ឋាភិបាល ហ៊ុន សែន មកទស្សនៈកិច្ចក្រុងខ្មែរ និងការចូលរួមពិធីព្យុហយាត្រាក្នុងថ្ងៃបុណ្យចូលឆ្នាំខ្មែរ ។

-លោកឧបនាយករដ្ឋមន្ត្រី សុខ អាន ដែលថាមនុស្សជំនិតបំផុតរបស់លោក ហ៊ុន សែន ក្នុងកិច្ចការដឹកនាំប្រទេសកម្ពុជា ដែលគណបក្សប្រជាជនកម្ពុជាកំពុងកាន់អំណាចបច្ចុប្បន្នយល់ព្រមទទួលក្នុងដំណើរទស្សនៈកិច្ចមកកាន់សហគមន៍ខ្មែរ

( តទៅទំព័រទី១២ )



សមាគមខ្មែរនៅទ្វីបអាមេរិក

CAMBODIAN ASSOCIATION OF AMERICA

2 Hears, 2 Hands, 1 Purpose
Building a Strong, Healthy Marriage

# សមាគមខ្មែរនៅទ្វីបអាមេរិក

# CAMBODIAN ASSOCIATION OF AMERICA

## A Nonprofit Human Services Organization

## លំនាំសុភមង្គលនៃស្វាមីភរិយា និងគ្រួសារ

**តពីលេខមុន**

ទោះជាយ៉ាងណាក៏ដោយវិធីបទដោះស្រាយទំនាស់ និងភាពខុសគ្នារបស់គេ គឺមានសារសំខាន់ណាស់ចំពោះជោគជ័យក្នុងរង្វង់គ្រួសារ ។ ភាពខុសគ្នាជាច្រើនមានការពិបាកដោះស្រាយ ទោះបីគូស្រករមានការប៉ិនប្រសប់ខាងការទាក់ទងគ្នាយ៉ាងណាក៏ដោយ ។ ភាពខុសគ្នាកាន់តែច្រើន ដែលស្ថិតនៅក្នុងទំនាក់ទំនងរបស់គេ ( វប្បធម៌ ជំនឿ មនោគមន៍វិជ្ជា ) ក៏ជាការប្រឈមមុខកាន់តែខ្លាំង ក្នុងការថែរក្សាប្តីប្រពន្ធ និងក្រុមគ្រួសារឱ្យមានភាពហ្នឹងហ្នរមាំមួនមួយដែរ ។

*** <u>ចំពោះកុមារ និងយុវវ័យ</u> :**

-ភាគច្រើនពួកគេអាចបានបន្តការសិក្សានៅវិទ្យាល័យ និងបានទទួលសញ្ញាប័ត្រជាស្ថាពរ

-ពួកគេមានសុខភាពល្អ សប្បាយរីករាយទាំងក្នុងផ្លូវកាយ និងផ្លូវចិត្ត

-ការធ្វើអត្តឃាតមានកំរិតទាប

-មានចរិកចរិយាមាយាទថ្លៃថ្នូរក្នុងសាលា

-ជៀសវាងពីការធ្លាក់ខ្លួនជាអ្នករងគ្រោះងាយៗនៃអំពើហឹង្សា និងដោយផ្លូវភេទ

-ជៀសវាងពីការធ្លាក់ខ្លួនងាយៗជាអ្នកផឹកស្រា ឬប្រើគ្រឿងញៀន

-ជៀសវាងពីការធ្លាក់ខ្លួនងាយៗទៅជាមនុស្សបោះឡែខុសច្បាប់

-មិនអាចក្លាយខ្លួនងាយៗទៅជាអ្នកមានផ្ទៃពោះ ឬធ្វើឱ្យអ្នកដទៃមានផ្ទៃពោះដោយសារ

-មានកំរិតតិចតួចណាស់ដែលអាចឱ្យគេរស់នៅក្នុងភាពក្រីក្រ

●( ប្រសិនបើឪពុក-ម្តាយវាយតប់ ស្រែកជេរគ្នា ដោយប្រើអំពើហឹង្សាទៅវិញទៅមកស្ទើតែរៀងរាល់ថ្ងៃនោះ ពួកគេគួរណាស់រស់នៅជាមួយឪពុកម្តាយដែលលែងលះគ្នាវិញទើបប្រសើរ ។ សេចក្តីសុខសាន្តរបស់កូនមិនមានភាពប្រសើរឡើយ បើទុកឱ្យគេនៅតែឃើញនូវភាពប្រឈមមុខវាយតប់គ្នារបស់ឪពុកម្តាយបែបនេះ ។ ប៉ុន្តែតាមការស្រាវជ្រាវមួយបានអះអាងថា ការលែងលះគ្នានៃគ្រួសារបែបនេះ មានមួយភាគបីនៃការលែងលះទូទៅ) ។ ភាគច្រើននៃការលែងលះគ្នាផ្តើមឡើងដោយសារមានបុគ្គលម្នាក់ក្នុងគ្រួសារមិនសប្បាយចិត្ត ឯកូនចៅគេពុំបានដឹងឮពីរឿងនេះឡើយ ។ ក្នុងពេលជាមួយគ្នានោះ កូនចៅមានសេចក្តីសុខជាធម្មតា បើឪពុកម្តាយនៅតែបន្តរក្សាការស្ងៀមស្ងាត់កុំឱ្យមានការបែកបាក់គ្នា ។ ម្យ៉ាងទៀត ប្រហែលដោយសារគេទាំងពីរនៅខំតស៊ូឆ្លងកាត់ពេលវេលាដ៏លំបាកនេះ ក្រោយមកគេក៏បានរកឃើញនូវសេចក្តីសុខឡើងវិញ ឯកូនចៅក៏បានទទួលនូវគុណប្រយោជន៍ជាច្រើនដែលមិនអាចកាត់ថ្លៃបានពីគ្រួសារដែលមានសុភមង្គលនឹងនរនេះដែរ ។ ទំនាក់ទំនងដែលគ្មានភាពជិតស្និតនឹងគ្នាអាចកើតឡើងនៅពេលណាអ្នកទាំងពីរមានកូនថ្មីថ្មោង ។ ការផ្លាស់ប្តូរតួនាទីពីគូស្វាមីភរិយាត្រូវទទួលភារកិច្ចជាឪពុកម្តាយ ពួកគេត្រូវបានប្រឈមមុខនឹងការមិនពេញចិត្តតាមបំណងជាច្រើន ។ កិច្ចការតំរូវគ្រប់យ៉ាងសំរាប់ទារកបានធ្វើឱ្យមានការពិបាកស្មុគស្មាញខុសពីធម្មតាទាំងពេលវេលា ក៏ដូចជាការយកចិត្តទុកដាក់រក្សាជីវិតស្នេហាដ៏ស្និតស្នាល ដែលធ្លាប់មានពីមុនមកស្រាប់ ។ ភរិយាយកចិត្តទុកដាក់នឹងកិច្ចការថែទាំមើលកូនទារក ឯប្តីក៏ជាប់ដៃនឹងការងារប្រចាំថ្ងៃរបស់ខ្លួន នេះហើយជាដំណាក់កាលមួយដ៏លំបាកបំផុតក្នុងឆាកជីវិតជាមាតាបិតាថ្មី ។ នេះជាហេតុផលដែលបណ្តាលឱ្យទំនាក់ទំនងរបស់ផ្លាស់ប្តូរ ដែលត្រូវឆ្លុះបញ្ចាំងឱ្យឃើញតាមរយៈការប្រែប្រួលផ្លូវចិត្តមនោសញ្ចេតនា ហើយជាពិសេសចំពោះគូស្វាមីភរិយាណាដែលមានបញ្ហាផ្ទៃក្នុងស្រាប់ ។ ទោះជាយ៉ាងនេះក្តីគុណសម្បត្តិដែលមិនអាចកាត់ថ្លៃបាន ក៏អាចកើតមានឡើងបានហើយចំណងស្នេហា និងភាពស្និតស្នាលនឹងឡើងមួយកំរិត បើគូទាំងពីរចេះចាត់ចែងដោះស្រាយបញ្ហាការរស់នៅឱ្យស្របតាមការប្រែប្រួលក្នុងឆាកជីវិតរបស់គេ ។

**តទៅលេខក្រោយ**

Funding for This project is provided by U.S Department of Health and Human Services Administration for Children and Families Grant #90FE0065

# លិខិតឆ្លើយតបកែតម្រូវ...

សង្ឃបញ្ហាលុយកាក់ជាដើម កាលពីព្រឹកថ្ងៃទី២ ខែធ្នូ ឆ្នាំ២០០៧ ដែលអ្នកយកព័ត៌មានយើងស្រង់យកមកចុះផ្សាយ ត្រូវអស់លោកគណៈ-កម្មការវត្តបច្ចុប្បន្នប្រកាន់ថា ជារឿងមួលបង្កាច់ និយាយមិនពិត ចោទទាំងបំពាន និងជួយផ្តល់យុត្តិធម៌ចំពោះកាសែតខ្មែរប៉ុស្តិ៍ ដែលជាកាសែតមួយឈរលើគោលការណ៍ឯករាជ្យមិនប្រកាន់និន្នាការនយោបាយ ឬបក្សពួក ដោយសុំត្រឹមតែម្យ៉ាង គឺបំរើសេចក្តីល្អសំរាប់សហគមន៍ខ្មែរនាំទៅការរីកចំរើន និងភាពសាមគ្គីគ្នា បញ្ចៀសការព្រួញបែកបាក់គ្នា ក្រោមមាគ៌ាព្រះពុទ្ធសាសនា ដើម្បីអភិវឌ្ឍន៍ ។

ខ្មែរប៉ុស្តិ៍ សូមបួងសួងវត្ថុសក្តិសិទ្ធិ ពិសេសដួងព្រលឹងនៃព្រះពុទ្ធបរមគ្រូនៃយើង សូមជួយរកដំណោះស្រាយរួមរវាងគណៈកម្មការចាស់ និងក្រុមពុទ្ធបរិស័ទ ដែលត្រៀមខ្លួនជាបេក្ខជនថ្មីសំរាប់ការបោះឆ្នោតជ្រើសរើសគណៈកម្មការថ្មី សូមឱ្យស្រុះស្រួលគ្នា ធ្វើការជាមួយគ្នា ដើម្បីលើកតម្កើងសាសនាខ្លួនជាតិខ្លួន ដើម្បីសេចក្តីសុខទាំងអស់គ្នា ក្រោមពុទ្ធឱវាទ មេត្តា ករុណា មុទិតា និងឧបេក្ខា ៕

**STROUD & DO**
*A PROFESSIONAL LAW CORPORATION*

*James T. Stroud*
*Van T. Do*
Ref.: 05069GL

December 20, 2007

*Via Mail &*
*Via Email:* Sovannara@TheKhmerPost.com

Mr. Sovannara Meach
Publisher/Editor/Editor Chief/Director
The Khmer Post
1129 Gardenia Ave.
Long Beach, CA 90813

Re: **Demand for Retraction**
**Khmer Buddhist Association**
**And Board Members**
**The Khmer Post, Vol.1, Issue 5 (12/10/2007)**

Dear Mr. Tip:

In an article published on or about December 10, 2007 by The Khmer Post, Volume 01, Issue 05 on pages 07 and 20 and written by Meach, Sovannara, it was stated as follows concerning the Khmer Buddhist Association and its named board members.

1. It accused Board members Pouv, Ven and Savorn (father and son) of not appearing in public to clarify various allegations.
2. It accused Chhem Kep, Ven Pouv and Savorn Pouv of spending Temple funds that do not relate to Temple activities.
3. It accused these three members of the Board of being dictators, without any regard for the By-laws, and being self appointed as presidents for 11 years.
4. It accused the Board and its members of filing false income and expenditures on tax returns that The Khmer Post claimed that it got from Sacramento.

14541 Hamlin Street, Van Nuys, CA 91411-1608 (818) 994-0347 Fax (818) 994-0319 http://www.strouddolaw.com

Letter to The Khmer Post, 050596GL
December 20, 2007 Page 2

5. It accused Chhem Kep, Ven Pouv of pressuring, threatening and violating the rights of the monks.
6. It accused these board members of starving a monk by the name of Venerable Thoeun and evicting him from the Temple.
7. It accused the Board of evicting three monks from the Temple and attempting toe kick another monk out.
8. It stated that "An unofficial report" stated that the Board was trafficking in funds or money laundering same into stock, and losing capital of more than $100,000.
9. It accused the Board members of stealing the Temple's money.

These statements, accusations and allegations are completely untrue and are libelous. Demand is hereby made that you print a retraction in as prominent a manner in your newspaper as these libelous statements were made, and within three weeks of the date hereof, in a regular issue of your newspaper.

Very truly yours,
STROUD & DO
A Professional Law Corporation

JAMES T. STROUD

JTS/cl

# ក្រុមពុទ្ធបរិស័ទៈ វត្តអាយរ៉ាប់ការបោះឆ្នោត...

ឆ្នោតនាថ្ងៃទី២៧ ខែ មករា ឆ្នាំ២០០៨ទេ ព្រោះតែហេតុផលថា មានពេលវេលាមិនគ្រប់គ្រាន់សំរាប់ការរៀបចំ ហើយអ្វីដែលលើសហេតុផលនេះទៅទៀត គឺគណៈកម្មការវត្ត ពៅ សាវ៉ន និង ទិត្យ ស៊ីផាន់ អះអាងថា ត្រូវរកដំណោះស្រាយជាមួយកាសែតខ្មែរប៉ុស្តិ៍ឱ្យរួចរាល់សិនផងដែរ ព្រោះកាសែតមួយនេះបានមូលបង្កាច់និយាយបង្ខូចកេរ្តិ៍ពួកគេ Sic ។


ស ស៊ីថាល់ តំណាងពុទ្ធបរិស័ទ (រូបពាក់អាវខ្មៅ)

តំណាងពុទ្ធបរិស័ទលោក សរ ស៊ីថាល់ បាន ប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា ក្រុមរបស់លោកបានរៀបចំញត្តិ និងលិខិតស្នាម ហើយ ដើម្បីដាក់ជូនតុលាការ (Court Order) ឬក្រុមអាជ្ញាធរ សមត្ថកិច្ច ក្រុង Long Beach និងភ្នាក់ងារអង្គការក្រៅរដ្ឋាភិបាលរដ្ឋ Long Beach ផងដែរ បំណងដើម្បីស្នើសុំការអនុញ្ញាតិ និងបទអន្តរាគមន៍សំរាប់រៀបចំការបោះឆ្នោតជ្រើសរើសគណៈកម្មការវត្តវិបស្សនារាម ទៅតាមគោលការណ៍លក្ខន្តិកៈរបស់សមាគមពុទ្ធិកវត្ត ដែលជាច្បាប់កំពូលរបស់វត្តនោះ ។ ដោយយើងមិនអាចលើកពេលបានទេ ព្រោះលក្ខខ័ណ្ឌ ១៤ខ នៃគណៈកម្មការកណ្តាលបានសម្រេច រួចទៅហើយ ក្នុងការឯកភាពគ្នារវាងក្រុមពុទ្ធបរិស័ទ និងគណៈកម្មការបច្ចុប្បន្នយល់ព្រមឱ្យមានការបោះឆ្នោតនាថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ ខាងមុខនេះ ។ ដូច្នេះយើងមិនត្រូវធ្វើឡប់ឡែរ ដូចក្មេងលេងបាយឡុកបាយឡទេ ។

លោក សរ ស៊ីថាល់ បន្តថា ការស្នើឱ្យមានការរៀបចំបោះឆ្នោត ដើម្បីជ្រើសរើសគណៈកម្មការថ្មី មិនមែនមានន័យថា ស្អប់ ឬស្រឡាញ់ ហើយចង់ ឈ្នះចាញ់ ឈ្មានីសក្តា ក្នុងបំណងដើម្បីលាភសក្ការៈ ឃើញលុយវត្ត ផ្ទះសម្បែង ដីធ្លីវត្តស្អីដូចការចោទប្រកាន់ពីមតិខ្លះនោះទេ ។ ពោលគឺដើម្បីចង់ឃើញសេរីភាពព្រះសង្ឃ ពុទ្ធបរិស័ទ និងគណៈកម្មការវត្តមានការសាមគ្គីភាពគ្នារួមដៃគ្នា ដើម្បីធ្វើការអភិវឌ្ឍន៍កសាងវត្តអារាម និងផ្តល់ជំនឿចិត្តសំរាប់សហគមន៍ខ្មែរតែប៉ុណ្ណោះ ។

លោក សុទ្ធ ប៉ាលីន អះអាងថា ខ្លួនស្វែងរកតម្លាភាពដើម្បីព្រះសង្ឃនិងពុទ្ធបរិស័ទបានប្រាប់ថា សូមកុំឱ្យមានការយល់ច្រលំថា ពួកគាត់ចង់បានអំណាចដើម្បីយកមកគ្រប់គ្រងឱ្យសោះ ដោយរូបលោកចង់ឃើញតែភាពរីកចំរើនក្នុងផ្លូវព្រះពុទ្ធសាសនា ដោយសន្តិវិធីគ្មានបុគ្គលណាមួយប្រើអំណាចផ្តាច់ការយកវត្តអារាម ឬទ្រព្យសម្បត្តិធ្វើជាកម្មសិទ្ធិបានទេ ព្រោះទីវត្តអារាមគឺជារបស់មហាជននៃពុទ្ធបរិស័ទខ្មែរយើងទាំងអស់គ្នា។ ប្រជាជនទៅធ្វើបុណ្យព្រោះតែមានលោកសង្ឃគង់ក្នុងវត្ត ប្រគេនចង្ហាន់ ឬបច្ច័យជូនដល់ព្រះសង្ឃ ព្រោះវត្តគឺជាស្រែបុណ្យរបស់ពុទ្ធបរិស័ទ ។ ពួកគាត់មិនធ្វើបុណ្យសំរាប់គណៈកម្មការប៉ុន្មាននាក់នោះទេ ។ ដូច្នេះ យើងគួរតែមានការរៀបចំឱ្យមានលក្ខណៈត្រឹមត្រូវតាមច្បាប់ ដើម្បីជាជំនឿទុកចិត្តសំរាប់ខ្មែរជាអ្នកកាន់ព្រះពុទ្ធសាសនា ដោយមានព្រះសង្ឃជានិមិត្តរូបជាទីគោរពសក្ការៈ ។

ប្រធានគណៈកម្មការវិបស្សនារាមបច្ចុប្បន្ន ពៅ សាវ៉ន បានប្រាប់ខ្មែរប៉ុស្តិ៍ថា គណៈកម្មការលើកពេលសំរាប់ការបោះឆ្នោតនាថ្ងៃទី២៧ ខែ មករា ឆ្នាំ២០០៨ ទៅពេលក្រោយក្នុងខែមិនា ឆ្នាំ២០០៨ ព្រោះមានពេលវេលាខ្លីពេកក្នុងការរៀបចំសមាសភាពក្រុមរបស់ខ្លួនមិនទាន់ ។ ហើយណាមួយរូបលោកត្រូវដោះស្រាយឱ្យរួចរាល់ជាមួយកាសែតខ្មែរប៉ុស្តិ៍ ដែលមូលបង្កាច់បង្ខូចឈ្មោះលោកថាជាការមិនពិត ។

ការអះអាងរបស់លោក ពៅ សាវ៉ន ត្រូវបានលោក សរ ស៊ីថាន់ ច្រានចោលថា ទទួលយកមិនបានដោយមិនត្រូវលើកហេតុផលថា គ្មានពេលវេលាគ្រប់គ្រាន់នោះទេ ព្រោះគណៈកម្មការធ្វើការបំរើវត្តជាង១១ឆ្នាំមកហើយ គួរមានប្រជាប្រិយភាព និងលទ្ធភាពច្រើន ដើម្បីរកសម្លេងគាំទ្រពីពុទ្ធបរិស័ទក្នុងការប្រកួតប្រជែងការបោះឆ្នោត ដោយមិនត្រូវស្តីបន្ទោសថា គ្មានពេលវេលាគ្រប់គ្រាន់នោះទេ ។

លោក ស៊ីថាល់ បន្តថា ចំពោះសេចក្តីរាយការណ៍របស់កាសែតខ្មែរប៉ុស្តិ៍ វាជាសិទ្ធិសេរីភាពសារព័ត៌មានក្នុងការនិយាយស្តី ដោយនាំពាក្យពីក្រុមពុទ្ធបរិស័ទដែលចោទប្រកាន់សំរាប់សេចក្តីរាយការណ៍របស់លោក ។ ហើយបើលោក ពៅ សាវ៉ន យល់ថា កាសែតខ្មែរប៉ុស្តិ៍មូលបង្កាច់ ឬធ្វើឱ្យរាំងស្ទះដល់ការបោះឆ្នោតនោះ ពុទ្ធបរិស័ទគេមានសុភវិនិច្ឆ័យហើយ ថាតើពិតមកពីកាសែតខ្មែរប៉ុស្តិ៍ ឬក៏មកពីអ្វី? ក្នុងខណៈពេលដែលខាងក្រុមពុទ្ធបរិស័ទមានសម្លេងសមាជិកគាំទ្រ ៥២៥ សម្លេង និងសមាជិកគាំទ្រគណៈកម្មការបច្ចុប្បន្នមានត្រឹមតែ ១៨២សម្លេងប៉ុណ្ណោះ ដែលនេះជាការមើលឃើញច្បាស់ថា ពួកគណៈកម្មការពិតជាចាញ់ឆ្នោតសំរាប់ការបោះឆ្នោតនាថ្ងៃទី២៧ ខែមករា ឆ្នាំនេះ ។ ដូច្នេះហើយបានជាពួកគណៈកម្មការយកហេតុផលទាំងពីរខាងលើ ដើម្បីពន្យាពេលបោះឆ្នោតនោះ ។

នៅក្នុងលិខិតមួយពីពុទ្ធិកសមាគមខ្មែរជាភាសា

( តនៅទំព័រទី១៦ )

# ថ្ងៃ ៧មករា និងការកើតមានជនក្បត់ខ្លួន...

យួន សូមសម្តែងសេចក្តីដឹងគុណដល់មហាមិត្តយួនដ៏មហិមា និងសូមឱ្យរដ្ឋាភិបាលយួនក្រហមបានចំរើនរុងរឿងមុនឆ្នាំតទៅ ។

សេចក្តីប្រកាសរបស់រដ្ឋាភិបាលបន្ទុបដោយយួននេះ ធ្វើឱ្យប្រជាពលរដ្ឋខ្មែរមានសេចក្តីសប្បាយរីករាយ ប៉ុន្តែលាយទៅដោយសេចក្តីភ័យខ្លាច និងព្រួយបារម្ភយ៉ាងខ្លាំង ពីព្រោះអរសប្បាយដោយសារបានរួចរស់ជីវិតផុតពីការកាប់សម្លាប់របស់ក្រុមខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត ប៉ុន្តែ លាយទៅដោយការភ័យខ្លាច ពីព្រោះឃើញកងទ័ពយួនក្រហមចំនួនម្ភៃម៉ឺននាក់ (២០០.០០០នាក់) បានបង្ហាញអាការៈកាចសាហាវឃោឃៅមកលើប្រជាពលរដ្ឋខ្មែរ មានការធ្វើបាប និងកាប់សម្លាប់ រឹបអូសយកទ្រព្យសម្បត្តិគ្រប់បែបយ៉ាង នាំយកទៅប្រទេសយួនយ៉ាងគគ្រឹកគគ្រេងទាំងយប់ទាំងថ្ងៃ ។ ម្យ៉ាងទៀតជនជាតិខ្មែរបានដឹងច្បាស់ណាស់ថា ជនជាតិយួនបានមានគម្រោងផែនការទុករាប់ច្រើនរយឆ្នាំមកហើយ ដើម្បីសម្លាប់ពូជសាសន៍ខ្មែរ ហើយលេបយកទឹកដីខ្មែរ ឱ្យក្លាយទៅជាប្រទេសយួន ដូចមានដែនដីខ្មែរកម្ពុជាក្រោមជាភស្តុតាងរួចមកហើយ។ យួនមិនបានបញ្ឈប់ផែនការនេះម្តងណាទេ លុះត្រាតែទឹកដីខ្មែរទាំងមូលត្រូវបានសម្រេចតាមផែនការ ដូច្នេះជោគជ័យកងទ័ពយួនក្រហមនាថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩នេះ គឺពិតជាជោគជ័យយួនក្រហមលេបទឹកដីខ្មែរយើងពិតប្រាកដណាស់ ។

មានសកម្មភាពកងទ័ពយួនក្រហមច្រើនណាស់ដែលបានធ្វើមកលើប្រទេស និងប្រជាពលរដ្ឋខ្មែរ នៅពេលដែលចូលមកកាន់កាប់ប្រទេសខ្មែរនេះ ។

ចំណែកជនជាតិខ្មែរស្នេហាជាតិដទៃទៀតរាប់សែននាក់ ក៏បានរត់ចេញពីមាតុភូមិទៅជ្រកកោននៅប្រទេសក្រៅដែរ ដោយសារដឹង និងឃើញសកម្មភាពកងទ័ពយួនក្រហមចូលមកប្រទេសខ្មែរនេះ មិនមែនដូចសំដីរបស់ពួកក្រុមអាយ៉ងប្រកាសដឹងគុណកងទ័ពយួនក្រហមនោះទេ ។

លុះមកដល់ពេលសព្វថ្ងៃនេះ ប្រជាពលរដ្ឋខ្មែរមួយចំនួនត្រឡប់ទៅជាបំភ្លេចអស់រលីងនូវមេរៀនប្រវត្តិសាស្ត្រខ្មែរ បានបង្រៀនឱ្យដឹងពីគម្រោងផែនការរបស់យួននេះ ។ ហើយបែរទៅជានាំគ្នាគោរពកោតខ្លាចសរសើរលើកតំកើងលោក ហ៊ុន សែន និងបក្សពួកប្រជាជនថា ជាវីរបុរសស្នេហាជាតិដ៏មហិមា មានប្រាជ្ញា ឆ្លៀវឆ្លាត វាងវៃ ខ្លាំងពូកែណាស់ ពុំដែលមានមេដឹកនាំពីមុនណាបានធ្វើដូចប្រមុខរដ្ឋាភិបាលសព្វថ្ងៃនេះសោះឡើយ រកគ្មានទេ តាំងតែពីសម័យក្រោយអង្គរមក ។ មិនតែប៉ុណ្ណោះ ថែមទាំងបំភ្លេចចោលអស់នូវសេចក្តីប្រកាសរបស់សហគមន៍អន្តរជាតិ និងប្រទេសមហាអំណាចលោកសេរីទាំងអស់សន្យាថា ជួយផ្តល់ជំនួយយ៉ាងច្រើនសន្ធឹកសន្ធាប់ ព្រមទាំងផ្តល់លុយកាក់ជាកំចីពីធនាគារពិភពលោក និងធនាគារអភិវឌ្ឍន៍អាស៊ីរាប់ច្រើនពាន់លានដុល្លារ សំរាប់កសាងប្រទេសខ្មែរឡើងវិញ ក្រោយពីត្រូវពួកក្រុមកុម្មុយនិស្តខ្មែរ យួនធ្វើសង្គ្រាមបំផ្លិចបំផ្លាញជាច្រើនឆ្នាំអោយខ្ទេចខ្ទីអស់គ្រប់ទាំងរចនាសម្ព័ន្ធដែលជាសង្គ្រាមដ៏អយុត្តិធម៌បំផុត ដើម្បីឱ្យបានសម្រេចផែនការលេបទឹកដីខ្មែររបស់យួនក្រហមនោះ។

អាស្រ័យហេតុនេះ យួនក្រហមគេកំពុងអង្គុយសើចសប្បាយរីករាយយ៉ាងខ្លាំងម្តងទៀត ក្រោយពីបានសើចសប្បាយរីករាយចំនួនបី (៣) លើករួចមកហើយគឺ :

**-លើកទី១** : យួនយកទឹកដីខ្មែរកម្ពុជាក្រោមទាំងមូលទៅកាន់កាប់ត្រួតត្រាជាស្ថាពរ កាលពីឆ្នាំ១៨៦៤ ដោយពេញច្បាប់ តាមសេចក្តីសម្រេចរបស់ប្រទេសបារាំង ជាប់រហូតមកដល់សព្វថ្ងៃ ។

**-លើកទី២** : យួនបានសម្លាប់ជនជាតិខ្មែរស្លាប់អស់ជិត២លាននាក់ ដោយប្រើកលល្បិចយកខ្មែរឱ្យសម្លាប់ខ្មែរគ្នាឯង ដែលជាផែនការធ្វើឱ្យខ្មែរខ្សោយ ។

**-លើកទី៣** : យួនបានជោគជ័យដ៏មហិមាកាលពីថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩ រួចហើយកាន់កាប់ និងត្រួតត្រាប្រទេសខ្មែរទាំងមូលរហូតដល់សព្វថ្ងៃនេះតែម្តង ។

ដូច្នេះ ថ្ងៃជោគជ័យទី៧ ខែមករានេះ ជាថ្ងៃពិសេសមួយដែលយួនអង្គុយសើចសប្បាយរីករាយយ៉ាងខ្លាំងណាស់ សំលឹងមើលទៅក្រុមមេដឹកនាំខ្មែរ បន្តុបឡើងដោយយួនក្រហម នាថ្ងៃទី៧មករា ឆ្នាំ១៩៧៩នោះ ប្រារព្ធធ្វើបុណ្យរំលឹកថ្ងៃខួបកំណើតមហាជោគជ័យរបស់ខ្លួននេះជារៀងរាល់ឆ្នាំ ។ ហើយនឹងយួនសប្បាយរីករាយម្យ៉ាងទៀតនោះ ដោយឃើញប្រទេសខ្មែរបានកសាងឡើងវិញ ស្អាតស្អំ ប្រឹមប្រិយ៍ ដោយសារជំនួយអន្តរជាតិ ជាពិសេសប្រទេសលោកសេរីដែលបានផ្តល់ជំនួយសំរាប់កសាងនូវរចនាសម្ព័ន្ធគ្រប់វិស័យទាំងអស់ ធ្វើឱ្យប្រទេសខ្មែរបានដូររូបភាពពីខ្ទេចខ្ទីមកជាថ្មីស្រឡាងឡើងវិញ ហើយនឹងឃើញជនជាតិយួនរាប់លាននាក់ បានចូលមករស់នៅពាសពេញប្រទេសខ្មែរទាំងមូល ទាំងទីក្រុង ទាំងជនបទ ប្រកបដោយសេចក្តីសុខសាន្ត មានមុខរបររកស៊ីយ៉ាងសំខាន់ៗ និងមានជីវភាពរស់នៅយ៉ាងល្អប្រសើរ មានសុខភាពល្អ កម្លាំងខ្លាំងក្លា អាចបង្កើតកូនចៅឱ្យបានយ៉ាងច្រើនសន្ធឹកសន្ធាប់រាប់ច្រើនលាននាក់ទៅថ្ងៃមុខទៀត រួចហើយទៅអនាគតដ៏ខ្លីនឹងបានកាន់តែសប្បាយរីករាយថែមទៀត ព្រមទាំងមានសេចក្តីសង្ឃឹមក្នុងចិត្តជានិច្ចថា កូនចៅជាតិយួនទាំងនោះបានរៀនសូត្រចេះដឹងច្រើន ហើយនឹងបានចូលទៅធ្វើមន្ត្រីធំៗគ្រប់ក្រសួង ធ្វើតំណាងរាស្ត្រក៏ច្រើននៅក្នុងរដ្ឋសភា ធ្វើប្រមុខខេត្តក៏ច្រើន ធ្វើប្រមុខស្រុកក៏ច្រើន ធ្វើប្រមុខឃុំសង្កាត់ ប្រមុខភូមិ ជាពិសេសធ្វើជាប្រជាពលរដ្ឋពាសពេញ គ្រប់ទីកន្លែងពេលនោះប្រទេសខ្មែរក៏ដូចជាប្រទេសយួនទៅហើយដែរ នាំគ្នាបើកទូរទស្សន៍យួនមើលដោយសប្បាយរីករាយ ហើយដោយសេរី យួនចង់ធ្វើអ្វីៗក៏បានតាមចិត្តចង់ធ្វើឥតមានការភ័យព្រួយបារម្ភអ្វីទៀតហើយ ។

នេះជាការសប្បាយរីករាយនៅក្នុងចិត្ត និងកាយនៃជនជាតិយួន ដែលគេកំពុងអង្គុយសើចញញឹម

( តនៅទំព័រទី១៣ )

# ញត្តិសុំហត្ថលេខាប្រឆាំងរដ្ឋាភិបាល ហ៊ុន សែន...


លោក លី ឡេប

រដ្ឋមួយដែលសំបូរទៅដោយអ្នកនយោបាយចម្រុះគណបក្ស និងពួកឈ្មួញពាណិជ្ជករខ្មែរ ។

-ញត្តិនោះបានចោទប្រកាន់ថា លោក សុខ អាន ជាជនពុករលួយនៅក្នុងរបប ហ៊ុន សែន ដែលអ្នករស់នៅក្រុង Long Beach ប្រឆាំងនឹងវត្តមានគាត់ ពីព្រោះរដ្ឋាភិបាល ហ៊ុន សែន មានប្រវត្តិជូរចត់យូរអង្វែងក្នុងការរំលោភសិទ្ធិមនុស្សប្រព្រឹត្តិអំពើពុករលួយ និងជាប្រទេសមួយជាសំបុកលាងលុយកង្វក់ រដ្ឋាភិបាលដែលប្រមូលផ្តុំអំណាចទៅលើតែបុគ្គលម្នាក់ ។

-ញត្តិនោះក៏បានឱ្យដឹងទៀតថា ក្នុងនាមជាសង្គមប្រជាធិបតេយ្យ គេចង់ឱ្យអ្នកដឹកនាំក្រុងខ្មែរធ្វើអ្វីឱ្យសហគមន៍ខ្មែរដឹងឮជាសាធារណៈ និងការមិនចង់ឱ្យពួកផ្តាច់ការទាំងនោះ មកបង្ហាញមុខ ឬពាក់ព័ន្ធក្នុងសហគន៍ខ្មែរ Long Beach ដែលជាការអាម៉ាស់ដល់បងប្អូនខ្មែរ រួមនឹងការត្រូវបញ្ឈប់ជាបន្ទាន់ពីសកម្មភាពរបស់ប្រតិភូក្រុងខ្មែរ ដែលលួចលាក់យកឈ្មោះក្រុងខ្មែរទៅចរចាជាមួយរបប ហ៊ុន សែន ដើម្បីចង់បានបុណ្យសក្តិអំណាច ឬក្នុងរបររកស៊ីណាមួយសំរាប់បក្ខពួកក្រុមគេថា ជាការប្រមាថមើលងាយដល់ខ្មែរ Long Beach ។ នេះបើតាមការបកស្រាយរបស់លោក លី ឡេប នៅក្នុងចំណុចទាំងបីជាភាសាអង់គ្លេស ដែលបានដាក់នៅលើកាសែតរបស់លោក ស្នើសុំហត្ថលេខា ដើម្បីធ្វើបាតុកម្មនោះ ។

-លោក សុទ្ធ ប៉ាលីន និយាយថា ខ្មែរជាច្រើនបានចាត់ទុកលោក សុខ អាន ជាតំណាងនៃរបបជិះជាន់សង្កត់សង្កិន ហើយវត្តមានរបស់គាត់ គឺជាការពង្រីកឥទ្ធិពលនយោបាយ ព្រោះគេជឿថា គេទាំងអស់គ្នារត់គេចចេញពីប្រទេស ដើម្បីឱ្យផុតពីរដ្ឋាភិបាលផ្តាច់ការបំណាំងរស់ក្នុងភាពឯករាជ្យ នៃប្រទេសដែលមានលទ្ធិប្រជាធិបតេយ្យការគោរពសិទ្ធិមនុស្ស ។

-Brayen Ben អះអាងថា រូបលោកមិនប្រឆាំងនឹងការជំទាស់នៃដំណើរមកកាន់ក្រុង Long Beach របស់លោក សុខ អាន ឬរដ្ឋាភិបាល ហ៊ុន សែន ទេ ។ ប៉ុន្តែអ្វីដែលលោកស្តីបន្ទោស គឺពួកក្រុងខ្មែរគួរឱ្យតំណែប្រជាជនខ្មែរនៅ Long Beach ព្រោះគេជាតំណាងក្រុងខ្មែរ ដែលមិនត្រូវធ្វើអ្វីតែគ្នាឯង ៤ ឬ១០នាក់ មិនឱ្យរាស្ត្រដឹងឮនោះទេ ។ ក្រុងខ្មែរកើតបានដោយសារបងប្អូនខ្មែរ ការសួរយោបល់ ឬស្នើអ្វីគួរត្រូវយកពិភាក្សាគ្នាជាសាធារណៈ ។

-លោក លី ឡេប ថ្លែងថា ញត្តិសុំហត្ថហេខា ដើម្បីធ្វើបាតុកម្មស្នើសុំទៅសាលាក្រុង Long Beach ឃើញថា មានចំនួនច្រើនដែលគាំទ្រ ដោយយើងរងចាំបានចំនួនជាង៥០០នាក់ ដើម្បីទៅជួបអភិបាលក្រុង Bob Foster ។

-Richer San ប្រធានសម្ព័ន្ធក្រុងខ្មែរ Long Beach-Phnom Penh និយាយថា រាល់ការជំទាស់ខាងលើវាជាសិទ្ធិសេរីភាពរបស់បុគ្គល ប៉ុន្តែអ្វីដែលយើងធ្វើ គឺដើម្បីប្រយោជន៍សហគមន៍ខ្មែរយើងទាំងអស់គ្នារដ្ឋាភិបាលកម្ពុជាក៏ជាខ្មែរ បងប្អូនអ្នក Long Beach ក៏ជាខ្មែរដូចគ្នា គឺចង់ធ្វើ និងឱ្យកិត្តិយសខ្មែរសំរាប់សហគមន៍អន្តរជាតិដូចជាការអញ្ជើញប្រមុខរដ្ឋាភិបាលកម្ពុជាមកចូលរួមក្នុងពិធីព្យុហយាត្រា នាពេលថ្ងៃបុណ្យចូលឆ្នាំ គឺជាការចង់បង្ហាញភាពសាមគ្គីគ្នា ។

-Richer បន្តថា គម្រោងធ្វើបាតុកម្មរបស់អ្នកប្រឆាំងនាពេលនោះ គេមិនអាចធ្វើអ្វីដែលផ្តេសផ្តាសបានទេ ព្រោះរដ្ឋាភិបាលកម្ពុជាគេមកជាផ្លូវការរដ្ឋ រវាងប្រទេស និងប្រទេស ។ ហើយយើងសង្ឃឹមថា សាលាក្រុង Long Beach នឹងមិនបណ្តែតបណ្តោយឱ្យពួកគេធ្វើតាមតែអំពើចិត្តបែបអនាធិបតេយ្យនោះទេ ។ ពួកគេមិនអាចចូលមកជិតក្បួនដង្ហែ ឬក្បែរគណៈប្រតិភូរាជរដ្ឋាភិបាលបានទេ ក្នុងឱកាសនាថ្ងៃនោះ ។

-អ្នកនាំពាក្យរាជរដ្ឋាភិបាលកម្ពុជា លោក ខៀវ កញ្ញារិទ្ធិ បានថ្លែងប្រាប់កាសែតខ្មែរប៉ុស្តិ៍ តាមទូរស័ព្ទក្នុងបទសម្ភាសន៍កាលពីចុងសប្តាហ៍នេះ ឱ្យដឹងថា រាជរដ្ឋាភិបាលកម្ពុជា ដែលមានឧបនាយក រដ្ឋមន្ត្រី សុខ អាន គ្រោងមកកាន់សហរដ្ឋអាមេរិក គឺក្នុងដំណើរកិច្ចការផ្លូវរដ្ឋនៃប្រទេសទាំងពី ។ ហើយលោក សុខ អាន ក៏បានយកឱកាសការទូតនោះទៅសួរសុខទុក្ខបងប្អូនខ្មែរ Long Beach តាមការអញ្ជើញរបស់ក្រុមប្រឹក្សាភិបាលក្រុងខ្មែរ Long Beach ។

-លោក ខៀវ កញ្ញារិទ្ធិ ដែលជារដ្ឋមន្ត្រីក្រសួងព័ត៌មានផងនោះបានបន្តថា វាជាសិទ្ធិរបស់អ្នកប្រឆាំង ប៉ុន្តែអ្នកប្រឆាំង មិនដែលស្គាល់មុខ សុខ អាន ថា ជានរណាផង ។ ពួកគេតែងតែប្រឆាំងអ្នកនេះ ដោយអះអាងថា ស្នេហាជាតិ

( តទៅទំព័រទី១៤ )

# ថ្ងៃ ៧មករា និងការកើតមានជនភៀសខ្លួន...

ក្នុងចិត្តក្នុងក្តីសង្ឃឹមយ៉ាងមាំរបស់គេទៅអនាគត ។

***បន្ទាប់ទៅនេះ សូមបន្តចម្លើយតាមសំនួរថា :***

-តើនៅពេលកងទ័ពយួនចូលមករំដោះប្រជាពលរដ្ឋខ្មែរ ពីក្រុម ខៀវ សំផន, ប៉ុល ពត បានជោគជ័យហើយ កងទ័ពយួនមានប្រកាសថា ដកកងទ័ពចេញពេលណាពីប្រទេសខ្មែរឬទេ ?

ប្រជាពលរដ្ឋខ្មែរទាំងអស់ពុំដែលបានឮថា កងទ័ពយួនមានគម្រោងផែនការដកទ័ពចេញពីប្រទេសខ្មែរទេ គឺមានតែឃើញមេទ័ពយួនធំៗទាំងអស់នាំគ្នារៀនភាសាខ្មែរពេញៗសាលារៀន លុះរៀនបានមួយឆ្នាំ យួនទាំងអស់ចេះនិយាយ និងសរសេរភាសាខ្មែរយ៉ាងច្បាស់លាស់ជាងជាជាតិខ្មែរ ទៅទៀត រួចហើយក៏បានក្លាយទៅជាជាតិខ្មែរពិតប្រាកដតែម្តង ហើយមានអត្តសញ្ញាណជាតិខ្មែរត្រឹមត្រូវតាមច្បាប់ទៀតផង ។

រឿងសំខាន់មួយទៀត ដែលជាភស្តុតាងបញ្ជាក់ឱ្យឃើញច្បាស់ហួសពីច្បាស់ទៅទៀតនោះ ពីរឿងលោក ប៉ែន សុវណ្ណ ។ នៅពេលកងទ័ពយួនក្រហមបានចូលមកដល់ប្រទេសខ្មែរ មុនដំបូងឆ្នាំ ១៩៧៩ យួនបានលើកលោក ប៉ែន សុវណ្ណ ឱ្យធ្វើជាប្រធានបក្ស ហើយនឹងកាន់កងទ័ពខ្មែរ ដោយ យួន គិតថា ប៉ែន សុវណ្ណ ជាមនុស្សខ្មែរម្នាក់បានអប់រំបញ្ចូលទ្រឹស្តីកុម្មុយនិស្ត តាមរយៈក្រុមខ្មែរ យៀក មិញ តាំងតែពីលោក ប៉ែន សុវណ្ណ មាន អាយុ ១០ឆ្នាំមកម្លេះ ។ ប៉ុន្តែដោយ ប៉ែន សុវណ្ណ មើលឃើញ និងដឹងពីកលល្បិច និងសកម្មភាពយួន ធ្វើដើម្បីចង់សម្លាប់ជាតិសាសន៍ខ្មែរ ទើប ប៉ែន សុវណ្ណ ភ្ញាក់រលឹក រួចហើយមិនព្រមស្តាប់បង្គាប់បញ្ជាយួន ធ្វើឱ្យយួនសម្រេចកំចាត់ ប៉ែន សុវណ្ណ ជាដាច់ខាត ។

កងទ័ពយួនក្រហមបានបញ្ជា កាលពីថ្ងៃទី៣ ខែធ្នូ ឆ្នាំ ១៩៨១ ឱ្យ ហ៊ុន សែន និង សាយ ប៊ុនថង និងកងទ័ពរថក្រោះទៅព័ទ្ធចាប់ ប៉ែន សុវណ្ណ ពីផ្ទះ ហើយបញ្ជូនយកទៅដាក់គុកងងឹតនៅហាណូយប្រទេសយួន ។ ដោយចោទថា ប៉ែន សុវណ្ណ ជាជនក្បត់បក្សត្រូវតែដកហូតចេញពីដំណែង ហើយយកទៅដាក់គុកនៅហាណូយ ។

គួរឱ្យងឿងឆ្ងល់ណាស់ បើសិនជា ប៉ែន សុវណ្ណ ក្បត់បក្ស តើក្បត់បក្សណា ? បក្សខ្មែរ ឬបក្សយួន? បើ ប៉ែន សុវណ្ណ ក្បត់បក្សខ្មែរ ហើយ ហ៊ុន សែន ជាជាតិខ្មែរ ចុះហេតុអ្វីបាន ហ៊ុន សែន ចាប់ ប៉ែន សុវណ្ណ យកទៅដាក់គុកនៅហាណូយប្រទេសយួនទៅវិញ ?

បើតាមដំណើររឿង ប៉ែន សុវណ្ណ នេះឱ្យដឹងថា ហ៊ុន សែន នេះជាជាតិយួនពិតប្រាកដណាស់ បានជាបញ្ជាឱ្យចាប់បញ្ជូន ប៉ែន សុវណ្ណ យកទៅដាក់គុកនៅហាណូយស្រុកយួនដូច្នេះ ។

ម្យ៉ាងទៀតការចោទ ប៉ែន សុវណ្ណ ថាក្បត់បក្សនេះ គឺតាមការពិតមកពី ប៉ែន សុវណ្ណ មិនព្រមស្តាប់ធ្វើតាមបញ្ជារបស់កងទ័ពយួន ដោយ ប៉ែន សុវណ្ណ ចង់ការពារដល់ប្រជាពលរដ្ឋខ្មែរ ប្រឆាំងនឹងយួន ប្រើកលល្បិចសម្លាប់ជនជាតិខ្មែរ ។ ដូច្នេះ យួនមិនអាចទុក ប៉ែន សុវណ្ណ ឱ្យទៅកាន់អំណាចតទៅទៀតបានទេ ត្រូវតែកំចាត់ចេញ ។

នេះហើយជាភស្តុតាងបញ្ជាក់ឱ្យឃើញច្បាស់ អំពីករណី ប៉ែន សុវណ្ណ បានកាន់អំណាចរហូតមកដល់សព្វថ្ងៃនេះ ពីព្រោះ ហ៊ុន សែន ជាជាតិយួន បានជាកងទ័ពយួនមិនត្រូវកំចាត់ចោលឱ្យចេញពីអំណាចដូច ប៉ែន សុវណ្ណ ទេ ។ បើសិនណាជា ហ៊ុន សែន ហ៊ានការពារផលប្រយោជន៍ និងជីវិតប្រជាពលរដ្ឋខ្មែរ ហ៊ុន សែន ប្រាកដជាត្រូវកងទ័ពយួនចាត់ការដូច ប៉ែន សុវណ្ណ ដែរ មិនខុសគ្នាពីជនជាតិខ្មែរស្នេហាជាតិជាច្រើនត្រូវ ហ៊ុន សែន ចាប់ដាក់គុក និងសម្លាប់ដោយចំហរក៏មាន ដោយសម្ងាត់ក៏មាន និងប្រើវិធីកលល្បិចបំបាក់បំបែកសាមគ្គីអ្នកស្នេហាជាតិខ្មែរគ្រប់ជាន់ថ្នាក់ឱ្យច្រូចម្រូង នរោត្តមរណឫទ្ធិ បណ្តេញលោក សម រង្ស៊ី ចេញពីបក្សហ៊្វុនស៊ិនប៉ិច ឱ្យធ្វើឱ្យ អៀង មូលី ក្បត់លោកតា សឺន សាន ធ្វើឱ្យ ញឹក ប៊ុនឆៃ ក្បត់ទ្រង់រណឫទ្ធិ ធ្វើឱ្យស្តេច វង្ស ស៊ីសុវត្ថិ ចង់ដណ្តើមរាជសម្បត្តិពីវង្ស នរោត្តម ជាដើម ។ល។ ទាំងអស់នេះហើយ ជាសញ្ញានៃការលំលាយនៃជនជាតិខ្មែរ ដោយសារចាញ់កលល្បិចជនជាតិយួន ។ ហើយហេតុការណ៍ទាំងអស់នេះ កំពុងតែកើតមានជារៀងរាល់ថ្ងៃ ឥតមានពេលណាស្រាកស្រាន្តសោះ ដរាបណាក្រុមក្បាលយួនខ្លួនខ្មែរ នៅតែបន្តកាន់អំណាចលើប្រទេសខ្មែរតទៅទៀតនោះ ។

ការចូលមកកាន់កាប់ប្រទេសខ្មែរនៃកងទ័ពយួនក្រហមនេះ ធ្វើឱ្យគិតសកម្មជនស្នេហាជាតិខ្មែរ ត្រូវតែស្វែងរកវិធីប្រឆាំងនឹងការចូលកាន់កាប់របស់កងទ័ពយួនក្រហមនេះ ទោះបី ហ៊ុន សែន និងក្រុមអាយ៉ងប្រកាសថា កងទ័ពយួនមកជួយរំដោះជនជាតិខ្មែរពីកណ្តាប់ដៃខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត ហើយដឹងគុណយួនយ៉ាងណាក៏ដោយ ក៏ចលនាតស៊ូសកម្មជនស្នេហាជាតិខ្មែរពិតប្រាកដ នៅតែប្តេជ្ញាតាំងចិត្តថា ត្រូវតែរួមសាមគ្គីគ្នាប្តូរផ្តាច់ហ៊ានលះបង់អ្វីៗទាំងអស់ សូម្បីជីវិតក៏មិនស្តាយដែរ ដើម្បីបណ្តេញកងទ័ពយួន ទីប្រឹក្សា និងជនចំណាកការយួនឱ្យចេញពីប្រទេសខ្មែរទៅវិញ ។ ដូចមានប្រវត្តិសាស្ត្រ និងឯកសារជាច្រើនស្តីពីចលនាតស៊ូរំដោះប្រទេសជាតិពីកងទ័ពយួន ក្នុងអំឡុងឆ្នាំ ១៩៧៩នេះស្រាប់ ។

ចំណែក ហ៊ុន សែន និងក្រុមអាយ៉ងយួន ក្រោយពីបានចាប់ ប៉ែន សុវណ្ណ យកទៅដាក់គុកនៅហាណូយហើយ បាននៅតែប្រកាសយ៉ាងក្អេងក្អាងថា កងទ័ពយួនមិនដកចេញពីប្រទេសខ្មែរទេ ដរាបណាពួកក្រុមខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត មិនទាន់បានកំទេចអស់រលីងពីប្រទេសខ្មែរទេនោះ ។ ប៉ុន្តែផ្ទុយទៅវិញ គេសង្កេតឃើញថា កងទ័ពយួនគ្រាន់តែប្តូរខោអាវ ឯកសណ្ឋានពីយួនមកទាហានខ្មែរប៉ុណ្ណោះ និងម្យ៉ាងទៀតឃើញតែមេដឹកនាំ និងក្រុមខ្មែរក្រហមយួនចាប់ដាក់គុក




ក្រុមអតីតថ្នាក់ដឹកនាំបក្សក្រុម្មុយនិស្តកម្ពុជា ហេង សំរិន ,ជា ស៊ីម , ហ៊ុន សែន

និងសម្លាប់បំបាក់បំបែកសាមគ្គីសកម្មជនស្នេហាជាតិខ្មែរយ៉ាង ដូច្នេះហើយ ទើបបណ្តាលឱ្យរណសិរ្សអ្នកតស៊ូរំដោះប្រទេស និងប្រជាជាតិត្រូវតែបង្កបង្កើតឡើងជាដាច់ខាត ។

ទោះបីនៅពេលដើមឆ្នាំ ១៩៧៩ នោះអ្នកតស៊ូមានការលំបាកលំបិនយ៉ាងណាក៏ដោយ ក៏ជាវាសនាល្អសំរាប់អ្នកតស៊ូ និងជនភៀសខ្លួនខ្មែររត់ចេញពីការគ្រប់គ្រងរបស់ពួកអាយ៉ងរាប់សែននាក់ទៅកាន់ព្រំប្រទល់ដែនខ្មែរ-ថៃ ។

បន្ទាប់មកអង្គការសហប្រជាជាតិ និងអង្គការជំនួយក្រៅរដ្ឋាភិបាលបានដឹកជញ្ជូនស្បៀងអាហារ ថ្នាំពេទ្យ និងសម្ភារៈគ្រប់បែបយ៉ាងយកមកជួយ និងចិញ្ចឹមជនជាតិខ្មែរ និងអ្នកតស៊ូ ។

សកម្មភាពអ្នកតស៊ូបានពង្រឹង និងពង្រីកធំឡើងបន្តិចម្តងៗ រហូតធ្វើឱ្យប្រទេសមហាអំណាចលោកសេរីទាំងអស់ បានប្រកាសជួយគាំទ្រយ៉ាងពេញទំហឹងនូវគ្រប់មធ្យោបាយទាំងអស់ សំរាប់កងទ័ពប្រឆាំងរបស់អ្នកតស៊ូមិនមែនកុម្មុយនិស្ត ។

ទោះបីកងទ័ពយួនក្រហម និងក្រុម ហ៊ុន សែន អាយ៉ងយួន បើកការវាយប្រហារមានទ្រង់ទ្រាយធំយ៉ាងណាក៏ដោយ មកលើកងទ័ពរណសិរ្សតស៊ូរំដោះជាតិខ្មែរ ក៏ពុំអាចកំទេចបានដែរ ។ ផ្ទុយទៅវិញ កម្លាំងកងទ័ពរណសិរ្សស៊ិតតែមានមធ្យោបាយ និងទឹកចិត្តប្រយុទ្ធតស៊ូកាន់តែខ្លាំង ឡើងជាលំដាប់ ដោយប្រកាន់សាហាវឃោឃៅបំផុត ហើយពួកខ្មែរក្រហមខ្លះត្រូវបានលោក ហ៊ុន សែន យកមកឱ្យកាន់អំណាចយ៉ាងក្រហើញៗមុខពេញមាត់ទៅវិញ ។

ការនិយាយក្លេងក្លាយរបស់ក្រុមខ្មែរក្រហមយួននេះ គឺកាន់តែជាលេសមួយដែលយួនបញ្ឆោតស្រែកប្រាប់សកលលោក កុំឱ្យគិតពីរឿងកងទ័ពយួនកាន់កាប់ត្រួតត្រាប្រទេសខ្មែរអីរឿងសំខាន់ គឺពួកក្រុមខ្មែរក្រហម ខៀវ សំផន, ប៉ុល ពត ទេ ដែលសកលលោកទទួលស្គាល់ថា ជាក្រុមឃាតករប្រល័យពូជសាសន៍ យួនជាអ្នកជួយសង្គ្រោះជាតិខ្មែរទេ ។

ប៉ុន្តែមានជាតិខ្មែរជាច្រើន បាននិយាយបញ្ជាក់យ៉ាងច្បាស់ដូចជា សម្តេច សីហនុ, ប៉ុល ពត, ខៀវ សំផន, ប៉ែន សុវណ្ណ, ចក្រពង្ស, សឺន សាន, សក់ ស៊ុតសាខន, សម រង្ស៊ី, នរិន្ទពង្ស និងសកម្មជនស្នេហាជាតិខ្មែរដទៃទៀតជាច្រើន ទាំងនៅក្នុងស្រុក និងក្រៅប្រទេសថា យួនវាយ លុកលុយចូលប្រទេសខ្មែរនេះ គឺជាគម្រោងផែនការដើម្បីពង្រីកទឹកដីរបស់ជាតិយួនទេ ។ រីឯការកាប់សម្លាប់ជនជាតិខ្មែរអស់ជិតពីរ (២) លាននាក់នោះ គឺជាកលល្បិចយួនធ្វើឱ្យជាតិខ្មែរសម្លាប់ជាតិខ្មែរគ្នាឯងដែរ ដើម្បីឱ្យបានសម្រេចផែនការរបស់យួនភ្ជាប់នូវបាវចនាថា សង្គ្រោះ បំរើការពារប្រជាពលរដ្ឋខ្មែរឱ្យបានចេញផុតពីការត្រួតត្រារបស់កងទ័ពយួន និងក្រុមអាយ៉ងយួន ។ ដូច្នេះហើយពីមួយថ្ងៃទៅមួយថ្ងៃរណសិរ្សកងទ័ពអ្នកតស៊ូបានជ្រៀតចូលទៅក្នុងភូមិស្រុកក្រុងនៃប្រទេសខ្មែរទាំងមូល ដើម្បីធ្វើសកម្មភាពចិត្តសាស្ត្រ និងបង្ហាញប្រាប់ប្រជាពលរដ្ឋខ្មែរទាំងប្រទេសឱ្យត្រៀមខ្លួនក្នុងការរំដោះប្រជាពលរដ្ឋខ្មែរនេះ ។

ដោយសារកម្លាំងគាបសង្កត់នៃកម្លាំងកងទ័ពរណសិរ្សស្នេហាជាតិនេះ ហើយដែលបណ្តាលឱ្យក្រុមអាយ៉ងនេះ ព្រមចរចារបញ្ចប់សង្គ្រាម ។

បន្ទាប់មកនៅឆ្នាំ១៩៩១ អង្គការសហប្រជាជាតិបានចំណាយថវិកាជាទឹកប្រាក់ចំនួនពីរពាន់លានដុល្លារ យកទៅរៀបចំការបោះឆ្នោតសកលជ្រើសរើសមេដឹកនាំថ្មី ។ នៅក្នុងឆ្នាំ១៩៩៣ ការបោះឆ្នោតបានចប់ទៅក្រោមការរៀបចំ និងត្រួតពិនិត្យរបស់អង្គការសហប្រជាជាតិ ហើយមានការប្រកាសលទ្ធផលឱ្យបានដឹងថា គណបក្សហ៊្វុនស៊ិនប៉ិច ជាគណបក្សតស៊ូមិនមែនកុម្មុយនិស្តបានឈ្នះឆ្នោត ។ សូមបញ្ជាក់ថា ការបោះឆ្នោតសកលនេះ បានធ្វើឡើងតាមគោលការណ៍លទ្ធិប្រជាធិបតេយ្យមួយយ៉ាងត្រឹមត្រូវ ក្រោមការត្រួតពិនិត្យរបស់អង្គការសហប្រជាជាតិ ។

នៅពេលប្រកាសលទ្ធផលថា គណបក្សហ៊្វុនស៊ិនប៉ិចបានទទួលជ័យជំនះភ្លាម ប្រតិកម្មយ៉ាងខ្លាំងក៏បានចេញមកពីគណបក្សប្រជាជន លោក ហ៊ុន សែន អាយ៉ងយួនមកភ្លាមដែរថា គណបក្សប្រជាជនមិនព្រមទទួលស្គាល់លទ្ធផលបោះឆ្នោតសកលនេះទេ ពីព្រោះធ្វើដោយអយុត្តិធម៌នៅក្នុងការរាប់សន្លឹកឆ្នោត ត្រូវតែរាប់សារជាថ្មីម្តងទៀត បើមិនធ្វើដូច្នេះទេ គណបក្សប្រជាជននឹងធ្វើការតស៊ូតទៅទៀតរហូតបានជ័យជំនះ ។

តើលោក ហ៊ុន សែន ប្រកាសរបៀបនេះ ដោយសារអាងអ្នកណានៅពីក្រោយ ?

គួរឱ្យកត់សំគាល់ដែរ ពីរឿងលោក ហ៊ុន សែន នេះ កាលពីសម័យប្រជុំសន្និសិទនៅក្រុងប៉ារីស លោក ហ៊ុន សែន បាននិយាយថា រឿងរំលាយរដ្ឋាភិបាលលោកមិនជំទាស់ទេ ប៉ុន្តែត្រូវសុំសេចក្តី

( តនៅទំព័រទី២៣ )

# ផ្តល់សំណាងឱ្យកុមាររើសសម្រាមខ្មែរ

●●●ពីស្ថានសួគ៌នៃសំណល់មានចាស់មានថ្មីនៃសហរដ្ឋអាមេរិក មនុស្សម្នាប្រមាណ៥០០នាក់នៅហ្វីឡាដែលហ្វីយ៉ានាំគ្នាទស្សនាខ្សែភាពយន្តឯកសារមួយ ដែលនិយាយអំពីកុមាររើសសំណល់តិចតួចនៃសំរាមភ្នំពេញដើម្បីចិញ្ចឹមជីវិត ។

ខ្សែភាពយន្តនោះបានត្រូវបញ្ចាំងនារាត្រីថ្ងៃសៅរ៍ ទី៨ ខែធ្នូកន្លងទៅនេះ ដើម្បីទាក់ទាញសប្បុរសជនទាំងខ្មែរ និងបរទេសឱ្យបោះដៃទៅជួយស្រោចស្រង់ជីវិតកុមារខ្មែរ ដែលមិនទាន់ស្លាប់ដោយសារជម្ងឺ តែកំពុងស្លាប់ដោយសារអត់អាហារបរិភោគរាល់ថ្ងៃ ។ សំរាមដែលទស្សនិកជនបានឃើញ ហើយមានជំនឿថា ក្លិនស្អុយអាចជះច្រាស់ខ្យល់បាន បានក្លាយជាប្រភពនៃម្ហូបអាហារសំរាប់រស់ ម្យ៉ាងស្មើរតែមិនគួរជឿ ប្រសិនជាគេគ្មានភស្តុតាងមកបង្ហាញទេនោះ។ លោក ជន វេលី ជាប្រធានមូលនិធិកុមារខ្មែរមានអាស័យដ្ឋាននៅ **Los-Angeles** រួមគ្នានឹង គណកម្មាធិការខ្មែរក្រុងហ្វីឡាដែលហ្វីយ៉ាមានគ្រួសារ សេរីម៉ៅ គ្រួសារបូណា-វ៉ាន់ស្តាញ និងមិត្តភក្តិជាច្រើនទៀត បាននាំគ្នាលើកបញ្ហា នៃភាពអាសន្ននេះមកឱ្យសហគមន៍ដែលមានកំណើតជាខ្មែរឱ្យជួយគាំទ្រដល់ជីវភាពគ្រួសារខ្មែរទាំងនោះ។

ហ្វីឡាដែលហ្វីយ៉ាជាថ្មីម្តងទៀត បានសំដែងការអាណិតអាសូរដល់ប្រជាពលរដ្ឋដែលមានកំណើតដូចខ្លួនតែវាសនាតូចទាប ដោយបរិចាកថវិកាបានចំនួន បីម៉ឺនដុល្លា នារាត្រីថ្ងៃសៅរ៍ ទី៨នោះ ផ្ញើទៅជួយអ្នកទាំងនោះ។ ស្នាដៃនេះបានធ្វើឱ្យអ្នកនៅហ្វីឡាដែលហ្វីយ៉ា ក្លាយជាសហគមន៍ដ៏មានចិត្តសប្បុរសជាងគេ បើទោះណាជាខ្លួនជាសគមន៍ក្រីក្រជាងគេក៏ដោយ ។/

"If you can't feed a hundred people, then feed just one."
—Mother Teresa

## RELIVសុខភាពល្អ

NEWS reliv UPDATE

ផលិតផលសុខភាពធ្វើពីធម្មជាតិសុទ្ធសាធ នៅសហរដ្ឋអាមេរិកឈ្មោះ RELIV នេះអាចជួយដល់ភាពជរាទ្រុឌទ្រោមរបស់មនុស្សចាស់ យើងបានជាពិសេសជួយដល់មនុស្សធ្វើការច្រើននាំឱ្យចាស់មុនអាយុ ជួយបន្ថយការឈឺចុកចាប់នៅសន្លាក់ ដៃជើង ឬរោគស្ត្រី និង បុរសមួយចំនួន គេហៅថា RELIV នេះថាជា "អាហារសុខភាពល្អ" ស្រួលពិសារ ដែលលោកអ្នកគួរប្រើដូចគ្នានឹងពិសារទឹកក្រូច នារាល់ព្រឹកមុននឹងចេញទៅក្រៅធ្វើការម្តងៗ ដើម្បីលើកកម្លាំងបំពេញការងារដោយងាយស្រួលអ្នកប្រើប្រាស់ RELIV នៅជុំវិញ ស.រ.អា នេះ គ្រប់សាសន៍ សញ្ជាតិបានថ្លែងអំណរគុណដល់ RELIV អាហារ VITAMIN ដែលបានជួយសំរាលការឈឺចុកចាប់ ជួយបន្ថយការប្រើថ្នាំនានាច្រើនមុខដោយសារតែការផ្សំផលិតផលនេះដើម្បីទៅបំពេញដល់ការខ្វះខាតជីវជាតិក្នុងចំណីអាហារដែលលោកអ្នកពិសាររាល់ថ្ងៃ ។ មានជីវជាតិចិញ្ចឹមសរីរាង្គឡើងវិញ ។ សរីរាង្គយើងក៏ដើរពេញកម្លាំងឡើងវិញ ។ ការឈឺថ្កាត់ក៏ចុះថយទៅបាត់ស្មារតីនឹងកម្លាំងអន់ថយ ក៏កើនឡើងយ៉ាងឆាប់រហ័ស ។ RELIV ជាផលិតផលរបស់អាមេរិក តម្លៃថោកមានប្រសិទ្ធិភាពដែលលោកអ្នករកជាវនៅទូរស័ព្ទលេខ..... ហើយ ប្រាប់លេខ Sponsor ។

**ហើយបើលោកអ្នកចង់លក់ RELIV នេះ**
**សូមទូរស័ព្ទសួររកឃឹម (ខី) លេខ (២១៥) ៧៧៦ ៤១៧៤**



## ញត្តិសុំហត្ថលេខាប្រឆាំងរដ្ឋាភិបាល ហ៊ុន សែន...

គាំទ្រដល់អ្នកដ៏ទៃផ្សេងទៀត ដោយពួកគេភ្លេចគិតពីការរួបរួមគ្នា ដើម្បីកសាងជាតិ ដោយលោកខៀវ កញ្ញារិទ្ធ លើកឡើងថា ស្អប់យួនស្អប់ថៃរហូតដល់ដៀលថ្នាក់ដឹកនាំថា "ក្បាលយួនខ្លួនខ្មែរ"។ យើងគួរតែបង្វែរការរិះគន់ ឬប្រឆាំងណាមួយទៅជាការនាំគ្នាអប់រំកូនចៅឱ្យខំប្រឹងប្រែងរៀនសូត្រយកចំណេះដឹងតាមបែបសម័យយុគ-បច្ចេកវិជ្ជាទំនើបបែបសកលភាវូបនីយកម្មកសាងសេដ្ឋកិច្ចនយោបាយ ដើម្បីប្រណាំងប្រជែង និងទប់ស្កាត់ប្រទេសជិតខាងវាជាការប្រសើរទៅវិញ ។

-អ្នកនាំពាក្យរាជរដ្ឋាភិបាលកម្ពុជា ដែលជាឥស្សរជនរបស់គណបក្សប្រជាជនកម្ពុជាកំពុងកាន់អំណាចបច្ចុប្បន្ន បានបញ្ចប់សំដីថា រាជរដ្ឋាភិបាលកម្ពុជាមិនរុញរា ឬដកថយក្នុងដំណើរទស្សនកិច្ចព្រោះតែឮដំណឹងថា គម្រោងធ្វើបាតុកម្មអ្វីនោះទេ ។

-ពួកអ្នកសង្កេតការនយោបាយខ្មែរនាំគ្នាអះអាងថា បងប្អូនខ្មែរគួតែរពិចារណានូវអ្វីដែលយើងប្រឆាំង ឬជំទាស់រិះគន់ថា តើវាមានការរីកចំរើនឬក៏ខាតបង់សំរាប់សហគមន៍យើង និងអ្វីដែលយើងត្រូវធ្វើ ឬមិនធ្វើ ។

-អតីតកាលប្រវត្តិសាស្ត្រគណបក្សប្រជាជនកម្ពុជាត្រូវបានមជ្ឈដ្ឋានជាតិ និងអន្តរជាតិចោទប្រ-កាន់ថា ជាគណបក្សអតីតពួកខ្មែរក្រហម ឬជា

( តទៅទំព័រទី៣០ )

# ទៅលេង San Diego សហគមន៍ខ្មែរ នាឆ្នាំថ្មីសកល

● **ទិញផ្សារអកស៊ី ព្រោះស្រឡាញ់ខ្មែរ :**

*Long Beacch, មាជ សុវណ្ណារ៉ា*

-កាលពីបុណ្យចូលឆ្នាំសកលកន្លងទៅថ្មីៗ នេះយើងបានធ្វើដំណើរទៅកាន់តំបន់មួយដែលមានបងប្អូនខ្មែររស់នៅ នៃក្រុង San Diego ដែលជាប់នឹងព្រំប្រទល់នឹងប្រទេស Mixico ។ នៅទីនោះ បើតាមការ អះអាងរបស់បងប្អូនខ្មែរថា មានខ្មែររស់នៅជិតពីរម៉ឺននាក់ ប៉ុន្តែ ការរស់នៅវាមិនសូវមូលផ្តុំដូចខ្មែរនៅ Long Bech ឬ Stockton នោះទេ ។

-ជីវភាពរស់នៅប្រចាំថ្ងៃរបស់បងប្អូនខ្មែរ គឺពឹងពាក់អាស្រ័យទៅនឹងការរកស៊ីជំនួញ និងធ្វើការឱ្យក្រុមហ៊ុនឯកជន ឬរដ្ឋ និងខ្មែរខ្លះទៀតរស់ដោយជំនួយឧបត្ថម្ភពីរដ្ឋផងដែរ ។

-នៅក្នុងទិដ្ឋភាពមួយ ដែលអ្នកយកព័ត៌មានយើងបានជួបក្នុងបរិវេណផ្សារខ្មែរ ដែលមានតែមួយគត់សំរាប់សហគមន៍ខ្មែរនៅទីនោះ គឺផ្សារ 97 Super Market បងប្អូនខ្មែរទាំងចាស់ទាំងក្មេងជាច្រើនបានបង្ហាញទឹកមុខក្នុងភាពស្រស់ញញឹមបន្ទរសម្លេងឡើងជាសំដីអ្នកស្រុក ខេត្តខាងលិច នៃប្រទេសកម្ពុជា គឺខេត្តបាត់ដំបង និងសៀមរាប ក្នុងសំដីរដឺន១ បានសន្ទានគ្នារំលឹកពីស្រុកកំណើតសួរគ្នាទៅវិញទៅមក "ពីការទៅលេងស្រុកទេស" និងការឱ្យពរគ្នាសំរាប់សិរីសួស្តីក្នុងឆ្នាំថ្មីជាភាសាអង់គ្លេស "Happy New Year" ។


ម្ចាស់ហាងលក់សំបុត្រយន្តហោះ


ថៅកែផ្សារខ្មែរ



ទិដ្ឋភាពក្នុងផ្សារ

-មីង មុំ អាយុជាង៥០ឆ្នាំ បាននិយាយប្រាប់ខ្មែរប៉ុស្តិ៍ថា គាត់តែងតែមកផ្សារខ្មែរមួយនេះជាប្រចាំទៅហើយ ដើម្បីទិញម្ហូបអាហារសំរាប់ការហូបចុក និងផ្ញើលុយទៅកាន់ប្រទេសកម្ពុជារៀងរាល់ខែផងដែរ ក្នុងការជួយចិញ្ចឹមជីវិតញាតិសណ្តានពួកគាត់នៅឯខេត្តបាត់ដំបង ។

( តនៅទំព័រទី២១ )

# ខៀវ សំភេត : នយោបាយ និងសិល្បៈមិនមានការប៉ះពាល់នឹងគ្នាទេ

***ដោយ : រ៉ាឆាថ***

តារាចម្រៀង ដែលជាពិធីកររបស់ផលិតកម្មមាតុភូមិ ខៀវ សំភេត បាននិយាយប្រាប់ខ្មែរប៉ុស្តិ៍ក្នុងបទសំភាសន៍ កាលពីបុណ្យចូលឆ្នាំថ្មីសកលនៅក្នុង San Diego ឱ្យដឹងថា បញ្ហានយោបាយដឹកនាំរបស់អ្នកនយោបាយ និងអ្នកសិល្បៈមិនមានការប៉ះពាល់នឹងគ្នាទេ ។ ដូច្នេះ សេចក្តីបញ្ជាក់នូវរបកគំហើញ (ការមើលឃើញ) ដែលយើងអាចសន្និដ្ឋានបានថា សិល្បៈរបស់យើងនៅពេលបច្ចុប្បន្នមានការរីកចំរើនជាងពេលមុនៗ ។ ស្របពេលនឹងសង្គមជាតិយើងដែលកំពុងទទួលនូវវប្បធម៌ជឿនលឿននៃផ្នែកបរទេសផងដែរនោះ ធ្វើឱ្យសង្គមខ្មែររបស់យើង គឺថា មានការបោះជំហ៊ានទៅមុខបន្តិចៗហើយដែរ ។


ខៀវ សំភេត និង ទូច ស្រីល័ក្ខ

សំភេត បន្តថា ប៉ុន្តែទោះបីជាយ៉ាងណានោះ វាមិនបានប្រាសចាកទៅនឹងទំនៀមទំលាប់ប្រពៃណីវប្បធម៌ជាតិដែរទេ ។ ទោះបីមានវប្បធម៌បែបនិយមជ្រុលមួយចំនួន ដែលធ្វើឱ្យយើងមានការប៉ះទង្គិចខ្លាំងអំពីចរិយាមាយាទដ៏ល្អថ្លៃថ្នូររបស់កូនខ្មែរ ហើយយ៉ាងណា បើសិនជាយើងប្រៀបប្រដូចខ្លួន យើងទៅនឹងការជឿនលឿនជ្រុលនៃបរទេសនោះ ប្រាកដថា យើងមានការឃ្លេងឃ្លាត ដែលពិបាកនឹងទទួលយកដែរ ។

សំនួរដែលសួរថា តើស្ថេរភាពនយោបាយនៃសុខសន្តិភាព និងសុវត្ថិភាពមានការប្រសើរហើយឬនៅ សំរាប់ប្រទេសកម្ពុជា ដើម្បីដំណើរកំសាន្តបងប្អូនខ្មែរនៅក្រៅប្រទេស ទៅកាន់ស្រុកកំណើត ព្រោះចំណាកស្រុកមកជាច្រើនឆ្នាំហើយនោះ ? ។




រង្គសាលតាគ៌ុង និងភោជនីយដ្ឋានមានសួស្តីឆ្នាំសកល

ខៀវ សំភេត និយាថា សំនួរនេះបងប្អូនខ្មែរ នៅសហរដ្ឋអាមេរិកបានសួរគាត់ច្រើននាក់ណាស់ តាមរយៈការទស្សនា ការផ្សព្វផ្សាយ DVD ដែលគាត់បានដើរ

( តនៅទំព័រទី៣២ )

# ឆ្នាំថ្មីមានអ្នកសើចសប្បាយ និងយំស្រក់ទឹកភ្នែកនៅ Long Beach និង San Diego

*Long Beacch, មាជ សុវណ្ណារ៉ា*

មួយឆ្នាំមានតែម្តង គឺឆ្នាំថ្មីឆ្នាំសកលមនុស្សម្នាគ្រប់រូបត្រូវការសប្បាយ ដើម្បីអបអរសាទរនូវអ្វីៗដែលថ្មីទាំងអស់សំរាប់ដំណើរជីវិតឱ្យជោគជ័យទៅថ្ងៃអនាគតរបស់ពួកគេ គឺសុខភាពល្អមាំមួន បញ្ញាវាងវៃ ប្រកបការងារបានចំរើន និងឧបត្ថម្ភបចង្រៃជាមួយភាពមួរហ្មង ឬឧបសគ្គវិបត្តិបញ្ហាត្រូវរំដោះចេញឱ្យផុត ដែលជាក់ស្តែងបងប្អូនខ្មែរគ្រប់ស្រទាប់ ក្មេង-ចាស់ ប្រុស-ស្រី បាននាំគ្នាក្នុងលក្ខណៈគ្រួសារ បងប្អូន ឪពុកម្តាយ មីងមា យាយតា គូស្វាមី ប្តីប្រពន្ធ គូស្នេហ៍ សង្សារ ចាប់យកវេលាត្រីមួយ នាថ្ងៃទី៣១ ខែធ្នូ ឆ្នាំ២០០៧ ឆ្លងចូលថ្ងៃទី១ ខែមករា ឆ្នាំ២០០៨ ក្នុងការសប្បាយ ស្នាក់ជុំគ្នាចូលភោជនីយដ្ឋាន ឬរង្គសាល ដើម្បីញ៉ាំ ឬផឹកស្រា និងរាំលេងកំសាន្តកំដរជីវិតបំបាត់ភាពនឿយហត់ បើទោះបីគ្រប់ៗគ្នាដឹងថា វ័យពីមួយឆ្នាំទៅមួយឆ្នាំកាន់តែឆ្ពោះទៅរកភាពមជ្ឈិមវ័យ ឬជរាវ័យក្នុងន័យ (កើត ចាស់ ឈឺ ស្លាប់ជារឿងអនិចា) ក៏ដោយ ។ ការចេះ ច្នៃជីវិតឱ្យសប្បាយក្នុងភាពស្រស់បំព្រង គឺជាងឱកាសល្អ ដែលយើងរាល់គ្នា កំពុងតែនៅមានជីវិតដែលជាពេលវេលាមិនមែនពីរជាតិមនុស្សរបស់យើង ។

-បងប្រុស កៅ ប៊ុនហ៊ាង ពី San Diego និយាយថា សូមឱ្យឆ្នាំថ្មី ២០០៨ នាំវាសនាប្តីប្រពន្ធគាត់ទាំងពីរនាក់ ឱ្យជួបតែភាពរកស៊ីមានបាន ដើម្បីមានលុយកាក់ទៅលេងស្រុកកំណើតជួយជីកអណ្តូងទឹក និងចែកអំណោយអ្នកក្រីក្រ ។

-រីឯកញ្ញា Jennifer ពីក្រុង Long Beach និយាយថា ឆ្នាំថ្មី ចិត្តថ្មី អ្វីក៏ថ្មីផ្លាស់ប្តូរទាំងអស់ ប៉ុន្តែចិត្តនាងមិនផ្លាស់ប្តូរសង្សារថ្មីទេ បើផ្លាស់ប្តូរ គឺផ្លាស់ពីសង្សារទៅអាពាហ៍ពិពាហ៍ជាប្តីប្រពន្ធតែប៉ុណ្ណោះ ក្នុងឆ្នាំ ២០០៨នេះ ។

-យុវជន Sam អាយុ១៩ឆ្នាំ និស្សិតម្នាក់នៃមហាវិទ្យាល័យ Long Beach ថ្លែងថា ឆ្នាំថ្មីសូមឱ្យខ្លួនគេរៀនបានពូកែ ដើម្បីបញ្ចប់ការសិក្សា ព្រោះស្រឡាញ់ស្រីក្នុងវ័យសិក្សាភាគតិចណាស់ដែលទទួលជោគជ័យក្នុងការរៀនសូត្រ ។ ដោយភាគច្រើនតែងតែបរាជ័យរៀនមិនចប់ចុងចប់ដើម ។

-ចំណែកមីង ម៉ៅ ដែលប្តីគាត់បានទៅលេងស្រុកខ្មែរ ជាងមួយខែហើយ បានស្នើសុំទេវតាឆ្នាំថ្មីជួយធ្វើយ៉ាងណាកុំឱ្យប្តីគាត់ជាប់មានស្រីនៅស្រុកខ្មែរ ។ ដោយមីង ម៉ៅ ពោលថា សូមឱ្យប្តីគាត់នឹកឃើញមេចាស់កូនមួយកន្ទេលនៅឯអាមេរិកនេះផង ។

-រីឯបុរសវ័យសែសិបផ្លាយសុំមិនបញ្ចេញឈ្មោះ ប្រាប់ដោយអស់សង្ឃឹមថា ឆ្នាំថ្មីមកដល់មួយថ្ងៃរាសីគាត់ស្រុតចុះយ៉ាងខ្លាំង ដោយទទួលនូវវិប្បដិសារីដ៏ជូរចត់ត្រូវប្រពន្ធរត់ចោលតាមប្រុសថ្មីបាត់ ។

-ចំណែកអ្នកស្រី ថាវី និយាយថា ក្នុងរាត្រីកំពុងតែសប្បាយរាំរែកជាមួយពួកម៉ាកនៅរង្គសាល Dragen House (ឯកព័ន្ធ) ស្រាប់តែមានទូរស័ព្ទពីបងប្អូនមកពីស្រុកខ្មែរថា ប្តីគាត់កំពុងផ្អឹមរៀបការគូថ្មីជាមួយស្រីក្មេងស្រស់ខ្ចីនៅ ឯខេត្តបាត់ដំបង ក្រោមបទសំពោងផ្កាចារនៃដំណក់ទឹកភ្នែករបស់គាត់នៅ ឯនាយសមុទ្រនាទីក្រុង Long Beach ។

-ឆ្នាំថ្មីមកដល់ការជួបសំណាងល្អ ឬអាក្រក់វាពឹងពាក់ទៅលើព្រេងវាសនា និងព្រហ្មលិខិតរបស់មនុស្សជាមួយការចេះតាក់តែងជីវិតក្នុងដំណើរទៅរកអនាគតកាល ។

-ពាក្យចាស់លោកពោលថា "ទីណាមានការសប្បាយ ទីនោះនឹងមានការទុក្ខសំរាប់បុគ្គលម្នាក់ៗ" ប៉ុន្តែអ្វីដែលល្អប្រសើរសំរាប់សង្គមខ្មែរនាឆ្នាំថ្មី ឆ្នាំសកលកន្លងទៅនេះ គេពុំឃើញមានអំពើហឹង្សាជាក់គ្នាបង្កជម្លោះវាយតប ឬសម្លាប់គ្នាទេ នៅតាមភោជនីយដ្ឋាន និងរង្គសាលនោះ ។ ដែលនេះ សបញ្ជាក់ឱ្យឃើញថា បងប្អូនខ្មែរយើងកាន់តែយល់ច្បាស់ពីការរាប់អានយោគយល់ចិត្តថ្លើមគ្នា ក្នុងសភាពមេត្តាធម៌ចំពោះគ្នាជាបណ្តើរៗហើយ ។

# សហព័ន្ធខ្មែរក្រោមក្នុងដំណើរទៅកាន់មាតុភូមិ

***Long Beach* មាជ សុវណ្ណារ៉ា**

នាយកប្រតិបត្តិខ្មែរក្រោមពិភពលោកបានថ្លែងថា សហព័ន្ធនឹងបន្តធ្វើកិច្ចការងាររបស់ខ្លួនឱ្យរឹតតែជាក់ស្តែងឡើងថែមទៀតនូវទិសដៅទាំងបីក្នុងដំណើរទៅកាន់មាតុភូមិ ។ ការថ្លែងនេះបានធ្វើក្នុងសន្និបាតប្រចាំឆ្នាំ២០០៧ រយៈពេលពីរថ្ងៃ ចំពោះមនុស្សចូលរួមជាង៣០០នាក់នៅទីក្រុងខ្មែរ Long Beach កាលពីចុងខែធ្នូកន្លងទៅនេះ ។

លោក ថាច់ ង៉ុកថាច់ មានប្រសាសន៍ថា មុខព្រួយបីដែលជាទិសដៅ : ទីមួយ គឺកិច្ចការអន្តរជាតិ ទីពីរ កិច្ចការនៅព្រះរាជាណាចក្រកម្ពុជា ហើយទីបី ជាមួយបងប្អូនខ្មែរយើងទូទៅ ។

លោក ថាច់ ង៉ុកថាច់ បានបន្តថា ក្នុងនាមសហព័ន្ធខ្មែរក្រោមដែលជាសមាជិកគណៈកម្មការប្រធាននៃអង្គការ UNPO និងបន្តកិច្ចប្រឹងប្រែងជាអន្តរជាតិខ្លាំងក្លាថែមទៀត ជាពិសេសនៅក្នុងក្រុមប្រឹក្សាទទួលបន្ទុកសិទ្ធិមនុស្សនៃអង្គការសហប្រជាជាតិ ។ ដោយលោកបានអំពាវនាវឱ្យអ្នកមានកំណើតខ្មែរក្រោមទាំងអស់រក្សានូវអត្តសញ្ញាណដើមរបស់ខ្លួន ដោយរួមទាំងសំឡេងនិយាយឈ្មោះដូចជាត្រកូលថាច់ ឬត្រកូលសឺងជាដើមផងដែរ ។ និងសូមឱ្យពលរដ្ឋខ្មែរក្រោមទាំងអស់រក្សាទុកនូវឈ្មោះដើមនៃភូមិ ឃុំ ស្រុក ខេត្តដែលមានឈ្មោះជាខ្មែរនោះឱ្យនៅដដែល ដោយពុំព្រមឱ្យហៅឈ្មោះទៅតាមការហៅរបស់វៀតណាមឡើយ ។


ប្រធានសហព័ន្ធខ្មែរក្រោម ថាច់ ង៉ុកថាច់ (រូបខាងឆ្វេង)

សហព័ន្ធខ្មែរក្រោមក៏បានអំពាវនាវចំពោះតំណាងអង្គការក្រៅរដ្ឋាភិបាលនានា តំណាងក្រុមអ្នកសារព័ត៌មានគណបក្សនយោបាយ ដែលមានវត្តមានក្នុងពិធីនោះ សូមឱ្យជួយសំរួលដល់ការលំបាកផ្នែកច្បាប់នានា ដល់ពលរដ្ឋជនរួមជាតិខ្មែរក្រោមតាមភាពចាំបាច់ក្នុងឋានៈជាជាតិខ្មែរដូចគ្នា ។

សហព័ន្ធខ្មែរក្រោមមានការទទួលស្គាល់ជាអន្តរជាតិនូវសេចក្តីប្រកាសទទួលសិទ្ធិជនជាតិដើម ដែលបានអនុម័តកាលពីខែកញ្ញា ឆ្នាំ២០០៧ និងកិច្ចសហប្រតិបត្តិការផ្នែកសិទ្ធិមនុស្សរបស់ខ្មែរក្រោមជាមួយសកម្មជនសិទ្ធិមនុស្សដទៃទៀត ក្នុងភូមិភាគអាស៊ីកាលពីខែកុម្ភៈឆ្នាំមុន ដែលភស្តុតាងជាក់ស្តែងមួយទៀត ពីបេសកជនពិសេសអង្គការសហប្រជាជាតិផ្នែកសិទ្ធិនៃជនជាតិដើម គឺលោក ស្ទេហ្វិនហាហ្គិន និងលោកស្រី វិចថូរ៉ាហាលី ឧបភស្សដែលបានឃើញទិដ្ឋភាពផ្ទាល់ពីភាពជាក់ស្តែងនៃការរំលោភសិទ្ធិមនុស្សនៃជនជាតិដើមទាំងនេះលើទឹកដីខ្មែរក្រោម និងទាំងនៅលើទឹកកម្ពុជា ។

សហព័ន្ធខ្មែរក្រោម គឺជាសមាជិកនៃប្រជាជាតិដែលគ្មានអាសនៈនៅអង្គការសហប្រជាជាតិ ហៅកាត់ថា UNPO មានសមាជិកចំនួន ៦៤ ដែលមានពលរដ្ឋប្រមាណជាង ៣០០លាននាក់កំពុងតែធ្វើការតវ៉ាសិទ្ធិទាមទារសេរីភាពក្នុងការរស់នៅ ដើម្បីដណ្តើមនូវរដ្ឋឯករាជ្យទៅតាមផ្លូវច្បាប់អន្តរជាតិដោយសន្តិវិធី ។

បញ្ហាខ្មែរកម្ពុជាក្រោមបច្ចុប្បន្នកំពុងស្ថិតនៅក្នុងស្ថានការណ៍តឹងតែង និងអាប់អួរ ព្រោះតែការជិះជាន់ពីពួករដ្ឋអំណាចយួនពីការរំលោភបំពានដីធ្លី សិទ្ធិសេរីភាពរស់នៅចាប់មនុស្ស ឬព្រះសង្ឃធ្វើបាបមនុស្ស ។ មិនតែប៉ុណ្ណោះ នៅក្នុងប្រទេសកម្ពុជាក៏មានស្ថានភាពមិនជាស្រួលផងដែរ ពីការរើសអើងពីសំណាក់អាជ្ញាធរខ្មែររបស់លោក ហ៊ុន សែន ៕

# អតីតប្រធានគណបក្សប្រជាជាតិខ្មែរទទួលមរណៈភាព

**ដោយៈ មាជ សុវណ្ណារ៉ា**

អតីតជាប្រធានគណបក្សប្រជាជាតិខ្មែរ លោក ស៊ុំ ស៊ីថា បានទទួលមរណកាលហើយ ដោយជំងឺរលាកកន្សោមខួរក្បាលនៅទីក្រុងភ្នំពេញ កាលពីថ្ងៃទី ០៩ ខែមករា ឆ្នាំ២០០៨ កន្លងទៅនេះខណៈដែលការបោះឆ្នោតសកលជិតឈានចូលមកដល់នាខែកក្កដា ឆ្នាំ ២០០៨ ។

លោក ស៊ុំ ស៊ីថា ជាជនជាតិខ្មែរ សញ្ជាតិ អាមេរិកាំងម្នាក់ រស់នៅទីក្រុង Long Beach រដ្ឋ California ដែលជាស្ថាបនិកគណបក្សប្រជាជាតិខ្មែរ បានចូលរួមជាមួយគណបក្សសិទ្ធិមនុស្សកាលពីថ្ងៃទី ២៨ ខែវិច្ឆិកា ២០០៧ ។ លោក ស៊ុំ ស៊ីថា បានបើកគណបក្សរបស់ខ្លួន នៅឆ្នាំ ២០០៤ ដែលគណបក្សប្រជាជាតិខ្មែររបស់លោកបានចូលរួមប្រកួតប្រជែងការបោះឆ្នោតក្រុមប្រឹក្សា ឃុំ សង្កាត់ កាលពីឆ្នាំ ២០០៧ ។ ប៉ុន្តែលទ្ធផលគណបក្សរបស់លោកពុំបានទទួលជោគជ័យ ដោយមិនមានអាសនៈក្នុងក្រុមប្រឹក្សាឃុំសង្កាត់នោះទេ ។


អតីតឧត្តមសេនីយត្រី ស៊ុំ ស៊ីថា

ទោះបីការប្រឹងប្រែងក្នុងឆាកជីវិតនយោបាយរបស់លោកមិនបានសម្រេចក្នុងការប្រកួតប្រជែងជាមួយគណបក្សលោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន ដែលកំពុងក្តោបអំណាចបច្ចុប្បន្នក៏ដោយ ក៏រូបលោកធ្លាប់បានអះអាងថា វីរៈភាពរបស់លោកមានគោលដៅច្បាស់លាស់ គឺដើម្បីដឹកនាំប្រទេសជាតិ និងប្រជាពលរដ្ឋខ្មែរទៅកាន់លទ្ធិប្រជាធិប-តេយ្យ និងការស្ថាបនាប្រទេសជាតិឱ្យមានការរីកចំរើនដោយពុំអាចមានបុគ្គលណា ឬពួកក្រុមណាមកអូសទាញទឹកចិត្តរបស់លោកដោយសម្ភារៈ ឬវោហាស័ព្ទបានឡើយ ។

ពួកមន្ត្រីគណបក្សសិទ្ធិមនុស្ស លោក បាន សារិទ្ធិ អគ្គលេខាធិការគណបក្សសិទ្ធិមនុស្សប្រចាំក្រុង Long Beach និយាយថា ក្នុងនាមគណបក្សសូមចូលរួមសំដែងមរណទុក្ខចំពោះលោក ស៊ុំ ស៊ីថា ដែលបានលះបង់យ៉ាងអស់ពីសមត្ថភាពចំណាយពេលវេលាបំរើសង្គមជាតិក្នុងរយៈពេលកន្លងមក និងជាគំរូយ៉ាងជាក់ស្តែងសំរាប់ប្រជាពលរដ្ឋខ្មែរទូទាំងប្រទេសដែលកំពុងស្រេកឃ្លានលទ្ធិប្រជាធិបតេយ្យពិតប្រាកដ ស្របតាមគោលនយោបាយគណបក្សសិទ្ធិមនុស្ស ។

ជាភរិយាអ្នកស្រី ម៉ៅ ផល្លី បានប្រាប់ថា ពីអតីតកាលមុនការលាចាកលោកយើងនេះទៅ លោក ស៊ុំ ស៊ីថា បានប្រឹងប្រែងទាំងកម្លាំងកាយ និងចិត្តជាមួយចំណេះដឹងក្នុងការលះបង់ជីវិត ដើម្បីបុព្វហេតុជាតិជួយកសាងសង្គមខ្មែរ និងផ្នែកកិច្ចការនយោបាយក៏ដូចសង្គមមនុស្សធម៌នៅក្នុងសហគមន៍ខ្មែរ Long Beach ដែលរូបលោកធ្លាប់ធ្វើកិច្ចការរដ្ឋការជាមន្ត្រីកិច្ចការសង្គមកិច្ច និងជួយការកសាងសង្គមនៅឯប្រទេសកម្ពុជាផងដែរ ។

លោក ស៊ុំ ស៊ីថា មុនបើកគណបក្សផ្ទាល់របស់ខ្លួនរូបលោក ក៏ធ្លាប់គេហៅថា អ្នកនយោបាយគោចរ ឬត្រាចរជាមួយគណបក្ស ហ៊្វុនស៊ិនប៉ិចមានឋានៈជាយោធាពាក់ផ្កាយ១ ហើយបន្ទាប់មកបានចូលទៅ គណបក្សសម រង្ស៊ី , គណបក្សពលរដ្ឋខ្មែររបស់ ងួន សឿ និងរហូតដល់ទីបញ្ចប់នៃជីវិតមរណកាលចុងក្រោយរបស់លោក គឺគណបក្សសិទ្ធិមនុស្ស ៕

# ក្រុមពុទ្ធបរិស័ទវត្តអាយយ៉ារប់...

អង់គ្លេសរបស់លោក ពៅ សារិន ចុះថ្ងៃទី២៣ ខែធ្នូ ឆ្នាំ២០០៧ បានអះអាងថា សុំពន្យាពេលចុះ ឈ្មោះធ្វើជាសមាជិកពុទ្ធិកសមាគមខ្មែរ រហូតដល់ថ្ងៃទី២៤ ខែកុម្ភៈ ឆ្នាំ២០០៨ និងការសុំពន្យាពេលការបោះឆ្នោត លើកទៅថ្ងៃទី២៣ ខែមិនា ឆ្នាំ២០០៨ វិញ ។

គណៈកម្មាធិការរៀបចំការបោះឆ្នោត លោក តាំ ស័ក្តិផាន ដែលជាប្រធានបានយល់ថា ត្រូវតែអនុវត្តទៅតាមលក្ខន្តិកៈដែលបានធ្វើរួចមកហើយ ដោយលោកដាក់ការព្រមានថា បើគ្មានការបោះឆ្នោតតាមការកំណត់នោះទេ លោកនិងលាលែងឈប់ពីតំណែងប្រធានគណៈកម្មាធិការរៀបចំការបោះឆ្នោត ។ ចំណែកលោក លី ឡេប ជាសមាជិកគណៈកម្មាធិការបោះឆ្នោតនិយាយថា ពុំអាចពន្យាពេលបានទេ ពីព្រោះមកពីមានការចុះសម្រុងគ្នារួចហើយកាលពីថ្ងៃទី០៩ ខែធ្នូ ឆ្នាំ២០០៧ ថា គណៈកម្មការពុទ្ធិកសមាគមខ្មែរបានប្រព្រឹត្តខុស ដោយពុំបានអនុវត្តតាមគោលការណ៍ច្បាប់របស់ពុទ្ធិសមាគមខ្មែរអស់ ចំនួន១៤ឆ្នាំមកហើយ គឺពុំបានធ្វើការបោះឆ្នោតជ្រើសរើសគណៈកម្មការពុទ្ធសមាគមខ្មែរជារៀងរាល់ឆ្នាំ ដូចបានកំណត់ទុក ។ ការសុំពន្យាពេល គឺជាការប្រព្រឹត្តកំហុសថ្មីថែមទៀតលើកំហុសចាស់របស់ខ្លួន ។ នេះមូលហេតុមួយ មូលហេតុមួយទៀត គឺពាក្យបណ្តឹងសុំឱ្យកាសែតខ្មែរប៉ុស្តិ៍ធ្វើការកែតម្រូវគ្មានការទាក់ទងអ្វីនឹងការបោះឆ្នោតទេ ដែលវាជារឿងក្តីក្តាំរវាងគណៈកម្មការនៃពុទ្ធិកសមាគមខ្មែរជាមួយនឹងកាសែតប៉ុណ្ណោះ ។

លោក លី ឡេប បានហៅទង្វើ និងអាកប្បកិរិយារបស់គណៈកម្មការពុទ្ធិកសមាគមខ្មែរមួយនេះ គឺជាការប្រព្រឹត្តខុសនឹងប្រការទី១, ទី៣, ទី៤ នៃ លក្ខន្តិកៈការបោះឆ្នោតចុះថ្ងៃទី១២ ខែធ្នូឆ្នាំ២០០៧ ហើយនឹងប្រព្រឹត្តខុសមាត្រាទី៤នៃលក្ខន្តិកៈសមាគមខ្មែរ ។ ដូច្នេះគណៈកម្មាធិការរៀបចំការបោះឆ្នោតសំរេចថា នឹងបន្តអនុវត្តតាមលក្ខន្តិកៈដូចបានកំណត់រួចមកហើយ គឺនឹងធ្វើការបោះឆ្នោតនៅថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ ដោយគ្មានការកែប្រែអ្វីឡើយ ។

ក្រុមអ្នកនិយមកណ្តាលនិយាយថា ពួកគេចង់ឃើញការរៀបចំវត្តឱ្យបានត្រឹមត្រូវ ដើម្បីធ្វើការអភិវឌ្ឍន៍កសាងវត្តឱ្យមានភាពរីកចំរើនផ្នែកផ្លូវ ពុទ្ធចក្រ ក្នុងការបង្រួបបង្រួមគ្នា ដោយ

(តនៅទំព័រទី០៨)



# ASIAN PACIFIC INTL TRAVEL

## ក្រុមហ៊ុនលក់សំបុត្រយន្តហោះ

**មានលក់សំបុត្រគ្រប់ក្រុមហ៊ុននៅ កម្ពុជាដូចជា:**

- -Eva Airways
- -China Airlines
- -Singapore Airlines
- -Thai Airways
- -Malaysia Airlines
- -Cathay Pacific
- -Korea Airlines
- -Asiana Airlines

*មានលក់សំបុត្រទៅប្រទេសផ្សេងៗទៀត ដូចជា: អឺរ៉ុប
*មានលក់សំបុត្រក្នុងប្រទេស **USA**
*មានលក់សំបុត្រយន្តហោះពីភ្នំពេញមក **USA**

កន្លែងនាងខ្ញុំមានប្រថាប់ត្រា
Notary Public Phone Card
Buy 4 get 1 free

**$ 890** Tax included

តម្លៃពិសេស,អ្នកទិញ
សំបុត្រឥឡូវរក្សាទុក
រហូតដល់ខែ ឧសភា,
( May ) 08

**ទទួលរៀបចំធ្វើ**

Reentry , Permit , Urgent ,
ធានាប្តីប្រពន្ធ,គូដណ្តឹង,ក្រុមគ្រួសារ
សូមលោកអ្នកអញ្ជើញមកដោយមេត្រី

Prepaid - Phone Cards
Toll Free 1-800- 359 -6698

**CAL -STATE**
**Realty & Leading**

Real Estate *Home Loans
*Residential * Commercial
You will get the best deal
Magaret (LiLy) Chung
Realtor
Sell your home at 3,5%
Buy your home at 1 % Rebate
ធ្វើការដោយស្មោះត្រង់និងយកចិត្តទុកដាក់ជានិច្ច



1065 E. Anaheim Street.
Long Beach CA 90813
**Tel: (562) 599 - 5464**
**Fax : (562) 599-5604**
Tony´s Cell : (562) 537-3546
LiLy´s Cell : (562) 682-6588

4510 E. Pacific Coast Hwy,.
Ste.540 Long Beach, CA 90804
Tel: (562) 599-5464
Cell: (562) 682-6588
Fax: (562) 599-5604
Email : margaretchung@charter.net

សៀមរាប
ភ្នំពេញ
បាត់ដំបង
កំពង់ចាម
ក្រុងព្រះសីហនុ
កំពត
កំពង់ធំ




## ជាមួយថ្លៃ* សេវាកម្មផ្ញើប្រាក់ទាប $11.99 ដុល្លារ

សម្រាប់ការផ្ញើប្រាក់ទៅកាន់ខេត្តក្រុង** ដែលបានជ្រើសរើសក្នុងចំនួនតិចជាង 500 ដុល្លារ

## ជាទូទៅប្រាក់អាចទទួលបានតែប៉ុន្មាននាទី*** ប៉ុណ្ណោះ

- ✓ ថ្លៃ*សេវាកម្មផ្ញើប្រាក់មិនមានការប្រែប្រួលទៅតាមទីកន្លែងរបស់ភ្នាក់ងារទទួលប្រាក់ឡើយ
- ✓ មានភ្នាក់ងារផ្ទេរប្រាក់ជាង 100 កន្លែងនៅ 24 ខេត្តក្រុងទូទាំងប្រទេសកម្ពុជា
- ✓ មិនចាំបាច់មានគណនីនៅធនាគារទាំងអ្នកផ្ញើ និងអ្នកទទួល
- ✓ មិនមានការគិតថ្លៃសេវាកម្មផ្ទេរប្រាក់ពីអ្នកទទួលឡើយ




សេវាកម្មផ្ទេរប្រាក់ទូទាំងពិភពលោក រហ័សទាន់ចិត្ត និងគួរឲ្យទុកចិត្ត

**សូមទាក់ទងទូរស័ព្ទ**
**1-800-325-6000**

ភ្នាក់ងារផ្ទេរប្រាក់នៅកម្ពុជាដែលទទួលបានការអនុញ្ញាតពី Western Union:










| | | | | |
|---|---|---|---|---|
| **NHA THUOC THIEN NHIEN**<br>1299 E. ANAHEIM ST<br>LONG BEACH, CA 90813<br>TEL: 562-218-2328 | **MONEY MART #0772**<br>1001 E. PACIFIC COAST HWY<br>LONG BEACH, CA 90806<br>TEL: 562-599-0991 | **MONEY MART #0767**<br>2375 LONG BEACH BLVD<br>LONG BEACH, CA 90806<br>TEL: 562-427-0253 | **CONTINENTAL CURRENCY #704**<br>3106 SAN GABRIEL BLVD<br>ROSEMEAD, CA 91770<br>TEL: 626-280-0380 | **TOPANGA CHECK CASHING**<br>7239 TOPANGA CANYON BLVD<br>CANOGA PARK, CA 91303<br>TEL: 818-594-0057 |
| **CONTINENTAL CURRENCY #408**<br>1301 LONG BEACH BLVD<br>LONG BEACH, CA 90813<br>TEL: 562-599-1550 | **ANTOJITOS LATINOS LIQUOR**<br>25381 ALICIA PKWY STE N<br>LAGUNA HILLS, CA 92653<br>TEL: 949-215-9708 | **NADERS MARKET**<br>25227 REDLANDS BLVD # I<br>LOMA LINDA, CA 92354<br>TEL: 909-796-1660 | **CONTINENTAL CURRENCY #413**<br>237 LONG BEACH BLVD<br>LONG BEACH, CA 90802<br>TEL: 562-432-5883 | **SIAM MARKET**<br>2505 E. ANAHEIM ST<br>LONG BEACH, CA 90802<br>TEL: 562-607-8970 |

*សម្រាប់ការផ្ទេរប្រាក់ដុល្លារអាមេរិកប៉ុណ្ណោះ។

**ថ្លៃសេវាកម្មផ្ញើប្រាក់នេះមានសុពលភាពចាប់ពីថ្ងៃទី 22 ខែ តុលា ឆ្នាំ 2007 នេះនៅតាមបណ្ដាភ្នាក់ងារនានាដែលបានចូលរួមក្នុងកម្មវិធីរបស់ខ្លួននៅតំបន់ប្រជុំជន Los Angeles និង Philadelphia ។ Western Union សូមរក្សាសិទ្ធិក្នុងការកែប្រែដោយមិនចាំបាច់ជូនដំណឹងជាមុន។ ថ្លៃសេវាកម្មផ្ញើប្រាក់អាចត្រូវបានគិតច្រើនជាងនេះសម្រាប់ការផ្ញើប្រាក់តាមរយៈទូរស័ព្ទ និង តាមរយៈគេហទំព័រ www.westernunion.com ។

***រយៈពេលនៃការទទួលប្រាក់អាស្រ័យទៅលើកត្តាមួយចំនួននៃសេវាកម្មរួមទាំងម៉ោងធ្វើការ និងទីតាំងរបស់ទីភ្នាក់ងារផ្ទេរប្រាក់ព្រមទាំងភាពខុសគ្នារវាងម៉ោងនៅក្នុងតំបន់នីមួយៗផងដែរ។ ពិនិត្យមើលកត្តាកំណត់ និងល័ក្ខខ័ណ្ឌនានានៅក្នុងបែបបទ "ផ្ញើប្រាក់"។

# ទៅលេង San Diego សហគមន៍...

-មីង មុំ បន្តលំដាប់ប្រាប់ថា ផ្សារខ្មែរមានតែមួយ នៅ San Diego នេះ កាលពីម្ចាស់មុនបានដួលរលំ ព្រោះតែរកស៊ីលក់ដូរមានតំលៃថ្លៃ ទំនិញហួសគុណភាពបន្លែបង្កា ឬគ្រឿងកំប៉ុងស្អុយស្អួយ ដោយគាត់អះអាងថា ម្ចាស់ផ្សារជាជនជាតិខ្មែរមុនមិនបានគ្រប់គ្រងមើលឱ្យដិតដល់ ដែលធ្វើឱ្យបងប្អូនខ្មែររត់ទៅផ្សារយួនជួយទិញទំនិញជាតិសាសន៍ដទៃទៅវិញ ។ ប៉ុន្តែឡូវម្ចាស់ថ្មីបានកាន់កាប់ជាងពីរខែកន្លងទៅនេះ បងប្អូនខ្មែរឃើញថា មានការរៀបចំបានល្អ មានអនាម័យទំនិញថ្មីៗមិនខូចគុណភាពបន្លែបង្កាស្រស់ៗ មិនល្អួយស្អុយ និងតំលៃលក់ដូរអាចទទួលយកបាន ដែលធ្វើឱ្យបងប្អូនខ្មែរយើងបែរត្រឡប់ជាបណ្តើរៗ មកជួយទិញខ្មែរគ្នាឯងវិញហើយដែរ វាប្រសើរជាងជួយជាតិសាសន៍ដទៃជាងជាតិខ្មែរដូចគ្នា ។

-ពូ វិន និយាយថា គាត់មិនចង់ឃើញផ្សារខ្មែរដ៏ធំមានតែមួយនេះ ដួលរលំបាត់ឈ្មោះនោះទេ នៅខណៈដែលសហគមន៍ខ្មែរមួយ ដែលមានប្រជាជនជាងពីរម៉ឺននាក់ រកតែផ្សារដើម្បីទិញម្ហូបមិនបាននោះ ហើយយើងត្រូវក្រឡេកដោយប្រៀបធៀបថា តើមានយួនប៉ុន្មាននាក់ដែលមកទិញម្ហូបអាហារនៅផ្សារយើង គឺជាកម្របំផុត ។ ប៉ុន្តែសំរាប់ខ្មែរយើងឃើញមានច្រើននាក់ជាវៀងរាល់ថ្ងៃទៅកាន់ទីផ្សារយួន ដើម្បីទិញទំនិញ ។

-ពូ វិន បន្តថា នេះវាជាសិទ្ធិសេរីភាពរបស់បងប្អូនខ្មែរយើង ដែលទីណាថោក ពួកគេតែងតែទៅកាន់ទីនោះហើយ។ ប៉ុន្តែបើយើងចង់និយាយ ទៅរកការជួយលើកស្ទួយសហគមន៍ខ្មែរយើង ដើម្បីបង្កើនសេដ្ឋកិច្ចតំបន់ឱ្យខ្មែរគ្នាឯងយើងគិតថា តំម្លៃលក់ដូរ វាដូចជាមិនខុសគ្នា ច្រើនណាស់ណាទេ ។

- ថៅកែផ្សារខ្មែរមួយនេះដែលជាជនជាតិអាមេរិកាំង-ស្បែកសឈ្មោះ Joe និយាយថា ម្ចាស់ផ្សារមុន៣ ឬ៤ម្ចាស់ទៅហើយបានបញ្ឈប់ការរកស៊ីរបស់ខ្លួន ព្រោះតែមិនកាក់កប ។ ចំណែករូបគាត់សំរេចចិត្តទិញផ្សារនេះឡើង ព្រោះទី១ប្រពន្ធខ្មែរ ហើយគាត់ស្រលាញ់ជាតិខ្មែរនៃភាគអាស៊ីមួយនេះផងដែរ និងទី២ គឺគាត់ទិញផ្សារ ដើម្បីរកស៊ីជាមួយខ្មែរ និងសន្សំប្រាក់ពីការចំណេញបន្តិចបន្តួចសំរាប់យកទៅជួយកសាងសាលា និងមន្ទីរពេទ្យ ដើម្បីជួយសង្គ្រោះកុមារក្រីក្រនៅប្រទេសកម្ពុជា ។

-Joe និយាយថា គាត់ និងប្រពន្ធគាត់បានសម្រេចទិញផ្សារនេះមកជិត៣ខែហើយ ព្រោះមិនចង់ឱ្យបាត់ឈ្មោះថា ផ្សារខ្មែរ ។ ប៉ុន្តែគាត់រកស៊ីកាក់កប ឬយ៉ាងណានោះ វាអាស្រ័យលើការគាំទ្រ ឬជួយលើកស្ទួយខ្មែរដូចគ្នាពីបងប្អូនអតិថិជន ។

-ថៅកែស្រីឈ្មោះ វី និយាយថា ពួកគាត់បានរៀបចំ អ្វីៗសារជាថ្មី និងស្តាប់ការរិះគន់នឹងឱ្យយោបល់ពីបងប្អូន ដើម្បីឱ្យការរកស៊ីមានភាពជិតស្និតជាមួយគ្នា ព្រោះការរកស៊ីរស់រានទៅបាន វាពឹងទៅលើបងប្អូនខ្មែរនោះឯង ជាដំបូងគ្មានជាតិសាសន៍ណាគេមកជួយគាំទ្រយើងជាងខ្មែរគ្នាឯងជួយខ្មែរគ្នាឯងនោះទេ ។

-ថៅកែស្រីរូបនោះនិយាយថា គាត់មិនយល់ពីបំណងប្តីរបស់គាត់ទេ ដែលបានឈប់ធ្វើការពីការ-ងារដ៏ល្អប្រាក់ខែខ្ពស់អាចរស់នៅស្រួលជាមួយប្រពន្ធ និងកូនស្រីមួយដោយមិនខ្វល់ខ្វាយ និងគិតច្រើនពីបញ្ហា ។ ប៉ុន្តែប្តីគាត់និយាយប្រាប់គាត់ថា គាត់ស្រលាញ់ខ្មែរ ចង់ជួបមុខខ្មែរ និយាយជាមួយខ្មែរ រកស៊ីជាមួយខ្មែរ បង្ហាញទឹកចិត្តពីជាតិសាសន៍ដ៏ទៃមួយ ចំពោះការស្រលាញ់វប្បធម៌ខ្មែរអង្គរវត្តខ្មែរ ក្មេងៗខ្មែរដែលគ្មានសាលារៀន គ្មានមន្ទីរពេទ្យ និងថ្នាំសង្កូវព្យាបាលឱ្យបានគ្រប់គ្រាន់ គឺជាការប្តេជ្ញារបស់ប្តីគាត់ទៅថ្ងៃខាងមុខ ដើម្បីជួយអភិវឌ្ឍន៍ស្រុកខ្មែរ ព្រោះកន្លងមក Joe ដែលជាប្តីបានចំណាយពេលវេលាច្រើនណាស់ ជាមួយទឹកប្រាក់ពីកំលាំងញើសឈាមរបស់គាត់យកទៅជួយស្រុកខ្មែរក្នុង ពេលកន្លងមកជាមួយគម្រោងបន្តទៅថ្ងៃមុខទៀត នូវអ្វីដែលអាចធ្វើទៅបាន ដើម្បីរួមចំណែកកសាងស្រុកខ្មែរ ។



Joe ថៅកែផ្សារខ្មែរ



ផ្សារខ្មែរ SanDiego



ការិយាល័យច្បាប់ និងកន្លែងលក់សំបុត្រយន្តហោះ

● **<u>ការិយាល័យច្បាប់ និងភ្នាក់ងារលក់សំបុត្រយន្តហោះ, ទូរស័ព្ទតាមផ្លូវ University Street :</u>**

-នៅក្បែរផ្សារខ្មែរ 97 Super Market គេឃើញមានអគារមួយសំរាប់បំរើសេវាកម្មផ្នែកច្បាប់ និងលក់សំបុត្រយន្តហោះជាមួយការលក់ទូរស័ព្ទដៃជាដើមផងនោះ ។ ម្ចាស់ការិយាល័យឈ្មោះ កៅ ប៊ុនហាង បាននិយាយថា ការិយាល័យច្បាប់ និងលក់សំបុត្រយន្តហោះបានរកស៊ីជាមួយសហគមន៍ខ្មែរ និងជាតិសាសន៍ដ៏ទៃទៀត ប្រមាណ២០ឆ្នាំមកហើយ ។

-បងប្រុស ប៊ុន ហ៊ាង បន្តថា ការរកស៊ីវាសមប្រកប ក៏ព្រោះតែមានការគាំទ្រពីអតិថិជន ដែលក្នុងនោះមានបងប្អូនខ្មែរបានជួយគាំទ្រជាម៉ូយរៀងរហូតមកហើយដែរ ដោយយើងមានការទំនាក់ទំនងបានល្អជាមួយបងប្អូនខ្មែរ ក្នុងជំនួញជួញដូរ ឬទំនាក់ទំនងស្វែងរកការសប្បាយក្នុងនាមខ្មែរដូចគ្នាក្នុងបុណ្យទាន ឬដើរលេងសប្បាយតាមរង្គសាលក្តី។ បងប្អូនខ្មែរបានទិញសំបុត្រយន្តហោះទៅលេងស្រុកកំណើតច្រើនគ្នាក្នុងមួយឆ្នាំៗ ប៉ុន្មានឆ្នាំចុងក្រោយនេះ ពួកគេនឹករលឹកស្រុកទេសណាស់ ។

-យើងសង្កេតឃើញនៅទីនោះមិនមានរង្គសាលខ្មែរ សំរាប់បំរើការសប្បាយរាំរែកពេលរាត្រីចុងសប្តាហ៍នោះទេ ក្រៅតែពីភោជនីដ្ឋានខ្មែរកាត់លាវមួយ គ្រាន់តែបំរើការរកស៊ីជាធម្មតាតែប៉ុណ្ណោះ

( តទៅទំព័រទី០៨ )

# ក្រុងខ្មែរ Long Beach នឹងអាច...

Los Angeles កាលពីរាជរដ្ឋាភិបាលអាណត្តិទី១ ដែលមានសហនាយករដ្ឋមន្ត្រីបានបិទទ្វារម្តងរួចទៅហើយ ពីព្រោះតែបញ្ហាថវិកា និងបុគ្គលដឹកនាំជាអគ្គកុងស៊ុលមានបញ្ហាខ្លះៗនោះ ។

Richer San ដែលអះអាងថា ជាស្ថាបនិកក្រុងខ្មែរបានប្រាប់កាសែតខ្មែរប៉ុស្តិ៍ឱ្យដឹងថា ក្រុមប្រឹក្សាក្រុងខ្មែរ ក៏ដូចសភាពាណិជ្ជកម្មខ្មែរ-អាមេរិក បានដាក់បេក្ខភាពបីនាក់ដែល ពួកគេត្រូវមានបុគ្គលិកលក្ខណៈសម្បត្តិល្អទាំងចំណេះដឹងសេដ្ឋកិច្ចនយោបាយទ្រព្យសម្បត្តិ ដោយមិនមានរឿងអាស្រូវ ឬជាអ្នកនយោបាយនៅក្នុងទិន្នាការគណបក្សនយោបាយណាមួយឡើយ ។

Richer San បានបន្តថា បេក្ខភាពនឹងត្រូវបញ្ជូនទៅកាន់ក្រសួងការបរទេសកម្ពុជាក្នុងខែមករានេះ ដើម្បីដាក់ជូនរាជរដ្ឋាភិបាលកម្ពុជាធ្វើការពិចារណា និងការសំរេចតែងតាំងជាអគ្គកុងស៊ុល ។

គំនិតបង្កើតចង់ឱ្យមានអគ្គកុងស៊ុលនេះ គឺកើតបន្ទាប់ពីក្រុមប្រតិភូក្រុងខ្មែរ បានទៅជួបជាមួយលោករដ្ឋលេខាធិការក្រសួងការបរទេសកម្ពុជា អ៊ួច បូរិទ្ធ កាលពីដើមខែធ្នូ ឆ្នាំ២០០៧ ដែលបានឯកភាពគ្នាជំរុញឱ្យមានអគ្គកុងស៊ុលនៅក្នុងក្រុងខ្មែរ ដើម្បីផ្សារភ្ជាប់ទំនាក់ទំនងសេដ្ឋកិច្ច-វប្បធម៌ និងសំរួលដល់កិច្ចការអន្តោប្រវេសន៍ ឬទិដ្ឋាការចេញចូលនៃប្រទេសទាំងពីរអោយងាយស្រួលជាងការទាក់ទងត្រង់ទៅកាន់ស្ថានទូតកម្ពុជានៅឯរដ្ឋធានី វ៉ាស៊ីងតុនឌីស៊ី ឯភាគខាងកើតទន្លេប្រទេសអាមេរិក ។

លោករដ្ឋលេខាធិការក្រសួងការបរទេស និងកិច្ចការអន្តរជាតិ អ៊ួច បូរិទ្ធ បានប្រាប់ខ្មែរប៉ុស្តិ៍តាមទូរស័ព្ទឱ្យដឹងថា ក្នុងនាមរដ្ឋាភិបាលកម្ពុជា យើងរងចាំខាងភាគីខាងក្រុងខ្មែរផ្ញើរមកនូវបេក្ខភាពអគ្គកុងស៊ុលកិត្តិយសពីប្រវត្តិរូប និងឈ្មោះមានប៉ុន្មាននាក់ ដើម្បីពិចារណា និងស្រាវជ្រាវថា មានលក្ខណៈសមស្រប ដែលអាចមានលទ្ធភាពទទួលតំណាងជាអគ្គកុងស៊ុលកិត្តិយសយើងនឹងធ្វើការឆ្លើយតប ។



ប្រតិភូក្រុងខ្មែរជួបមន្ត្រីក្រសួងការបរទេសកម្ពុជា

លោក អ៊ួច បូរិទ្ធ បានបន្តថា រាជរដ្ឋាភិបាលកម្ពុជាចង់ណាស់ក្នុងការបង្កើតឱ្យមានក្របខ័ណ្ឌអគ្គកុងស៊ុលមានលក្ខណៈពីរយ៉ាងមួយ គឺអគ្គកុង-ស៊ុលកិត្តិយស និងពីរ គឺអគ្គកុងស៊ុលជាផ្លូវច្បាប់របស់រាជរដ្ឋាភិបាល ដែលត្រូវពិចារណាចំពោះការចំណាយថវិកា,ការស្នាក់នៅរបស់បុគ្គលិក, ការជួលអគារ ធ្វើជាអគ្គកុងស៊ុលដែរនោះ ជាបញ្ហាដែលត្រូវគិតគូរ សំរាប់ការតាំងឱ្យមានតំណាងនៅក្នុងក្រុង Long Beach ឬរដ្ឋ California ដើម្បីសំរួលការងារបងប្អូនខ្មែរនៅទីនោះ ក្នុងការធ្វើពាណិជ្ជកម្មរកស៊ីក្នុងជីវភាពរស់នៅដោយផ្សារភ្ជាប់ជាមួយព័ត៌មានផ្សេងៗនៃការអភិវឌ្ឍន៍ប្រទេសឱ្យរីកចំរើនយ៉ាងដូចម្តេចឱ្យបងប្អូនបានដឹង និងជ្រាបជាព័ត៌មាន ដែលជាសារៈសំខាន់ដែលយើងគួរតែមាន ក៏ប៉ុន្តែបញ្ហានេះ វាពាក់ព័ន្ធថវិកាដែលរាជរដ្ឋាភិបាលកម្ពុជាកំពុងពិចារណា ។

បើតាមការអះអាងរបស់ពួកអ្នកដឹកនាំក្រុងខ្មែរបានឱ្យដឹងថា អគ្គកុងស៊ុលកិត្តិយសនេះ គឺត្រូវទទួលខុសត្រូវដោយអ្នកតំណាងកិច្ចការទូតនោះនូវការចំណាយថវិកាផ្ទាល់ខ្លួន ក្នុងការជួលអគារធ្វើការិយាល័យរដ្ឋបាល និងការចំណាយផ្សេងៗ ។ ហើយអ្វីដែលអគ្គកុងស៊ុលរូបនោះមានសិទ្ធសំរេចជំនួសរាជរដ្ឋាភិបាលកម្ពុជា គឺកិច្ចការទិដ្ឋាការ (Visa) និងលិខិតស្នាមកិច្ចការអន្តោប្រវេសន៍ក្នុងការរកចំណូលថវិកាចូល ។

គេពុំទាន់ឃើញមានប្រតិកម្មណាមួយនៅឡើយទេ ពីបញ្ហាគ្រោងបើកឱ្យមានអគ្គកុងស៊ុលនៅក្នុងក្រុងខ្មែរ Long Beach ពីស្រទាប់មហាជនខ្មែរនោះ ។ អគ្គកុងស៊ុលកិត្តិយសនេះ គ្រោងបើកឱ្យមានមុនថ្ងៃមកដល់របស់ប្រមុខរាជរដ្ឋាភិបាលកម្ពុជា លោក សុខ អាន ក្នុងការចូលរួមបុណ្យព្យុហយាត្រា នាខែមេសាឆ្នាំនេះ ដែលទីតាំងអគ្គ-កុងស៊ុលស្ថិតនៅកាច់ជ្រុងផ្លូវ Anaheim និង M.L.K Street ។ ប៉ុន្តែ បេក្ខជនមួយណានោះ ពួកគេពុំទាន់ត្រូវបានឱ្យដឹងថា ជាជនណាមួយនៅឡើយទេដែរ ៕



# LAW OFFICES OF BOROTH CHAY



# ការិយាល័យមេធាវី





▸មេធាវីខ្មែរពូកែក្ដីក្ដាំនូវករណីគ្រោះថ្នាក់ចរាចររថយន្ត
◆អន្តោប្រវេសន៍ ( ធានាប្ដីប្រពន្ធ, គូដណ្ដឹង, បងប្អូន) ◆ច្បាប់គ្រួសារ
◆បណ្ដឹងលែងលះ ◆ប្រាក់ចិញ្ចឹមកូន ◆ឧក្រិដ្ឋកម្ម ◆រដ្ឋប្បវេណី ◆ច្បាប់ក្ស័យធន
▸បើមិនឈ្នះក្ដី គឺមិនគិតកម្រៃ .ពិគ្រោះយោបល់ ឬពិភាក្សាមិនគិតថ្លៃ
▸ករណីប្ដឹងផ្ដល់នឹងផ្ដល់ចម្លើយជូនលោកអ្នក ថាតើបណ្ដឹងរបស់លោកអ្នក
មានសង្ឃឹមឈ្នះឬយ៉ាងណា? តើគួរធ្វើការប្ដឹងផ្ដល់ដែរឬទេ? ។

## Up to 50% of Settlement to Clients

▸Bankruptcy ▸Family Law ▸Dissolution of Marriage
▸Child and Spousal Support ▸Immigration
▸Family Sponsor Petition ▸Auto Accident
▸Low Contingency ▸No Recovery ▸No Fee.

**Personal Injury:**

Auto Accident Free Consultation
How strong is your case?
Should you file a claim?

We'll answer your questions!

**Other Legal Representations:**

Family Law: Dissolution of Marriage, Spousal and Child Support Bankruptcy
Immigration Law: Family sponsored petition

**5199E. Pacific Coast HWY, Ste. 206, Long Beach, CA 90 804**
**Tel: (562) 961-0142 .(562) 453-5898**

# M.L.K MARKET





▸ ហាងខ្មែរលក់ទំនិញមានសំលៀកបំពាក់ជាឯកសណ្ឋានសិស្ស (Uniform), រឿងកុនថៃ, ចិន, កូរ៉េ ផ្នែកមនោសញ្ចេតនា បាញ់ប្រហារ កាប់ចាក់ និងក្បាច់គុណបុរាណ កំពុងចេញលក់ថ្មីៗមានបកប្រែជាភាសាខ្មែរ ។
▸ ហាងខ្មែរ M.L.K ក៏មានកន្លែងលក់ទឹកផងដែរ ។
▸ ហាងយើងខ្ញុំក៏មានលក់ដូរនូវសំលៀកបំពាក់ជាច្រើនផ្នែកទៀត ទាំងសំភារៈផ្ទះបាយ, សំភារៈដំណេក, សំភារៈបន្ទប់ទឹក និងឧបភោគគ្រឿងទេស, ភេសជ្ជៈជាដើម ។









**សូមអញ្ជើញជាមួយហាងថ្មីយើងខ្ញុំដោយរីករាយ**

សូមអញ្ជើញជា
មួយហាងថ្មីយើងខ្ញុំ
ដោយភក្ដីភាព

1821 M.L.K.JR Ave, Long Beach, CA 90806
Tel: (562) 591-4295

# ថ្ងៃ ៧មករា និងការកើតមានជនក្បត់ខ្លួន...

សម្រេចពីប្រជាពលរដ្ឋខ្មែរ បើប្រជាពលរដ្ឋខ្មែរយល់ព្រមឱ្យរំលាយ ក៏រំលាយទៅចុះ ។ លុះមកដល់ពេលបោះឆ្នោតសកលប្រជាពលរដ្ឋបានបោះឆ្នោតឱ្យគណបក្សហ៊្វុនស៊ិនប៉ិចឈ្នះ ម្ដេចលោក ហ៊ុន សែន បែរទៅជាមិនព្រមចាញ់ ហើយប្រកាសធ្វើការតស៊ូប្រឆាំងដណ្ដើមយកជ័យជំនះទៅវិញ ?

តើលោក ហ៊ុន សែន និយាយរបៀបនេះ មានន័យថា ជាមនុស្សប្រភេទណា ? មិនមានឈ្មោះថា ជាមនុស្សក្រឡេចក្រឡុចដូចយួនទេឬអី ?

ដោយសារមិនចង់ឱ្យមានការឈ្លោះទាស់ទែងបែកបាក់គ្នា ទើបបណ្ដាឱ្យសម្ដេច សីហនុ សម្រេចដោយអត្តនោម័តគ្មានសួរយោបល់អង្គការសហប្រជាជាតិ ឬពិនិត្យមើលសន្និសញ្ញាដែលមានចែងពីរឿងបោះឆ្នោតនេះឱ្យបានដឹង ហើយគោរពតាមទេ ត្រឡប់ទៅជាចេញបញ្ជាឱ្យគណបក្សប្រឆាំងគ្នាទាំងពីរមួយសេរីមួយកុម្មុយនិស្តត្រូវតែធ្វើសហការចាប់ដៃគ្នាបង្កើតរដ្ឋាភិបាលចំរុះបង្រួបបង្រួមជាតិទៅវិញ ដើម្បីជៀសវាងការច្បាំងគ្នាតទៅទៀត ។ ដូច្នេះគណបក្សទាំងពីរ ព្រមទទួលបញ្ជាស្ដេច សីហនុ ដោយរីករាយ រួចហើយប្រធានគណបក្សហ៊្វុនស៊ិនប៉ិចបានធ្វើនាយករដ្ឋមន្ត្រីទី១ គណបក្សប្រជាជន ហ៊ុន សែន ធ្វើជានាយករដ្ឋមន្ត្រីទី២ គួរចំឡែកណាស់ដែរ ពុំដែលមានសោះនៅក្នុងលោក បើរាជរដ្ឋាភិបាលមួយមាននាយករដ្ឋមន្ត្រីពីរ ហើយជាគណបក្សមាននិន្នាការនយោបាយខុសគ្នាទៀតផង ។

សេចក្ដីបញ្ជាស្ដេច សីហនុ នេះ បានបណ្ដាលឱ្យទៅជាយ៉ាងណានៅឆ្នាំ១៩៩៧ ?

ច្បាស់ណាស់ៗ ដូចជាចោរចេញប្លន់គេកណ្ដាលថ្ងៃត្រង់អញ្ចឹង ស្ដេចនាយករដ្ឋមន្ត្រីទី១ ដែលជាមេគណបក្សមាននិន្នាការលោកសេរី បានត្រូវស្ដេចនាយករដ្ឋមន្ត្រីទី២មាននិន្នាការកុម្មុយនិស្តយួនក្រហម បានធ្វើរដ្ឋប្រហារទំលាក់ចេញពីអំណាចដោយចោទថា មានគំរោងផែនការរៀបចំកងទ័ពជាតិខ្មែរសុទ្ធសាត សំរាប់ការពារបូរណភាពទឹកដីនិងអាយុជីវិតរបស់ជាតិខ្មែរឱ្យបានគង់វង្ស និងឯករាជ្យ ។ ប៉ុន្តែត្រូវបានយួនក្រហមបញ្ជាឱ្យអាយ៉ងធ្វើ រដ្ឋប្រហារយ៉ាងអយុត្តិធម៌បំផុត រួចហើយឡើងកាន់អំណាចតែម្នាក់ឯង រហូតមកយ៉ាងក្រអឺតក្រទមទៀតផង ។

ទង្វើរដ៏ជាក់ស្ដែងនេះ បញ្ជាក់បង្ហាញឱ្យឃើញច្បាស់ អំពីឥទ្ធិពលយួនក្រហមមកត្រួតត្រាលើប្រទេសជនជាតិខ្មែរពិតប្រាកដណាស់ ។

ចំណែកលោក ហ៊ុន សែន ទៀតសោត ជាមេដឹកនាំអាយ៉ងយួនក្រហម ឬជាជាតិមានក្បាលជាយួនខ្លួនជាខ្មែរពិតប្រាកដដែរ ។

ចំណុចសំខាន់ៗជាច្រើន ដែលបញ្ជាក់បង្ហាញថាលោក ហ៊ុន សែន ជាអាយ៉ងយួនក្រហមមានដូចតទៅ :

**១**-នៅពេលប្រជុំសន្និសិទក្រុងប៉ារីស លោក ហ៊ុន សែន និយាយប្រឆាំងជំទាស់នឹងការបញ្ជូនកងទ័ពរក្សាសន្តិភាពអង្គការសហប្រជាជាតិ ដើម្បីចូលមកការពារអាយុជីវិតនៃក្រុមការងាររបស់អង្គការសហប្រជាជាតិ ដែលត្រូវចូលមករៀបចំការបោះឆ្នោតសកលឱ្យប្រទេស និងជនជាតិខ្មែរបានសន្តិភាពឡើងវិញ ។

ចុះហេតុអ្វីបានលោក ហ៊ុន សែន និយាយថាមិនត្រូវឱ្យមានកងទ័ពរក្សាសន្តិភាពអង្គការសហប្រជាជាតិចូលមកប្រទេសខ្មែរទេ គ្មានបានប្រយោជន៍អ្វីទេ ពីព្រោះប្រទេសខ្មែរគ្មានសង្គ្រាមតទៅទៀតទេ ។

តើនេះមិនមែនដោយសារលោក ហ៊ុន សែន និយាយជំនួសយួនទេឬអី ? មានន័យថា ប្រទេសខ្មែរកងទ័ពយួនក្រហមឈប់វាយប្រហារសម្លាប់ជាតិខ្មែរទៀតហើយ ខ្មែរបានសុខសន្តិភាពហើយដូច្នេះអង្គការសហប្រជាជាតិមិនត្រូវនាំទ័ពចូលមកប្រទេសខ្មែរទេ ។

**២**-ពេលអង្គការសហប្រជាជាតិបានប្រកាសលទ្ធផលចុងក្រោយថា ការបោះឆ្នោតសកលតាមរបៀបលទ្ធិប្រជាធិបតេយ្យដ៏ត្រឹមត្រូវនេះ ត្រូវគណបក្សហ៊្វុនស៊ិនប៉ិចទទួលបានជ័យជំនះ ។ ពេលនោះលោក ហ៊ុន សែន មានកំហឹងយ៉ាងខ្លាំង ហើយប្រកាសប្រឆាំងដោយដាច់អហង្ការនឹងការប្រកាសលទ្ធផលនេះ ដោយនិយាយថា គណបក្សប្រជាជនមិនព្រមទទួលស្គាល់លទ្ធផលដ៏អយុត្តិធម៌នេះទេ ត្រូវតែរាប់សន្លឹកឆ្នោតជាថ្មីម្ដងទៀត បើពុំធ្វើដូច្នេះទេ គណបក្សប្រជាជនត្រូវតែធ្វើការតស៊ូដរាបបានទទួលជ័យជំនះ ។

តើសំដីនិយាយរបស់លោក ហ៊ុន សែន នេះ មិនមែនជាសំដីនិយាយជំនួសយួនទេឬអី ? ឬជាសំដីយួនតែម្ដងទេឬអី ?

៣-ក្រោយពេលដែល ហ៊ុន សែន បានកាន់អំណាចតែម្នាក់ឯងមក លោក ហ៊ុន សែន បានប្រើអំណាចយ៉ាងឃោឃៅ និងព្រៃផ្សៃទៅលើសកម្មជនស្នេហាជាតិពិតប្រាកដទាំងអស់ទាំងនៅក្នុង និងនៅក្រៅប្រទេសមានភស្តុតាងជាច្រើន ដែលមតិជាតិ និងអន្តរជាតិបានដឹង និងកត់ត្រាទុកជាឯកសារ ប្រវត្តិសាស្ត្រខ្មែរ ។ ប៉ុន្តែ លោក ហ៊ុន សែន បានធ្វើនយោបាយប្រជាប្រិយនិយមទៅលើប្រជាពលរដ្ឋខ្មែរធម្មតា និងប្រជាពលរដ្ឋខ្មែរដើមកំណើតយួន ដោយយកលុយមួយចំនួនបានមកពីយួន និងបក្សពួកកុម្មុយនិស្តដទៃទៀត បូកជាមួយលុយកេងប្រវ័ញ្ច និងប្រព្រឹត្តអំពើទុច្ចរិតពុករលួយនៅលើលុយ ដែលជាជំនួយពីប្រទេសលោកសេរី និងលុយខ្ចីធនាគារពិភពលោក និងធនធានអភិវឌ្ឍន៍អាស៊ីរាប់ច្រើនពាន់ដុល្លារ ដើម្បីជួយកសាងប្រទេសខ្មែរឡើងវិញ ។ លោក ហ៊ុន សែន បានយកលុយទាំងនោះទៅប្រើជាមធ្យោបាយស្វែងរកប្រជាប្រិយភាពពីជនជាតិខ្មែរ ដោយនិយាយថាជាអំណោយដ៏ថ្លៃថ្លា របស់លោក ហ៊ុន សែន និងជំទាវ ហ៊ុន សែន ទៅវិញ ។ ព្រមទាំងសមិទ្ធិដែលបានកសាងឡើង ក៏បានដាក់ឈ្មោះថា ជាអំណោយ

( តនៅទំព័រទី២៤ )

# ថ្ងៃ ៧ មករា និងការកើតមានជនក្បត់ខ្លួន...

លោក ហ៊ុន សែន ជំទាវ ហ៊ុន សែន ឬឪពុកលោក ហ៊ុន សែន ស្ទើតែទាំងអស់ដែរ ដូចជាផ្លូវថ្នល់តូចធំ ស្ពានតូចធំ សាលារៀន វិទ្យាល័យ មន្ទីរពេទ្យ សួនច្បារ បង្គន់សាធារណៈ និងមានសមិទ្ធិជាច្រើនទៀត ពាសពេញប្រទេសខ្មែរសុទ្ធសឹងចេញមកពីអំណោយ លោក ហ៊ុន សែន ឪពុក ហ៊ុន សែន ជំទាវ ហ៊ុន សែន ។

មិនតែប៉ុណ្ណោះ មន្ត្រីជំនិតលោក ហ៊ុន សែន បានលើកលោក ហ៊ុន សែន ថា ជាមហាវិរបុរសខ្មែរតែម្នាក់គត់ មានប្រាជ្ញាឆ្លៀវឆ្លាត វាងវៃខ្លាំងពូកែណាស់ ជាប្រមុខរាជរដ្ឋាភិបាលខ្មែររបស់គណបក្សប្រជាជនដ៏មហិមា ហើយត្រូវតែបានកាន់អំណាចជារៀងរហូតតទៅ ។

៤-ចំណែកសេដ្ឋកិច្ចខ្មែរ ដែលជាស្ថាប័នមួយយ៉ាងសំខាន់បំផុត ក្នុងការទ្រទ្រង់ និងការពារឯករាជ្យភាព និងផលប្រយោជន៍ប្រទេស និងជនជាតិខ្មែរ ត្រូវបានលោក ហ៊ុន សែន ប្រគល់ទៅឱ្យយួនអស់រលីង លោក ហ៊ុន សែន អង្គុយចាំតែយកលុយដាក់ហោប៉ៅផ្ទាល់ខ្លួន គ្រួសារខ្លួន បក្ខពួកខ្លួនតែប៉ុណ្ណោះ ។ បញ្ហាធំៗចោទឡើងទៅលើជីវភាពជនជាតិខ្មែរគ្រប់ជាន់ថ្នាក់ មានពាសពេញប្រទេសដែលជាបញ្ហាឈានទៅដល់បទនយោបាយយ៉ាងធ្ងន់ធ្ងរទៅអនាគតយ៉ាងខ្លីខាងមុខ ដែលពុំអាចមានអ្នកស្នេហាជាតិពិតប្រាកដណាអាចជួយដោះស្រាយបានឡើយ ហើយនឹងទៅដល់ទីបញ្ចប់បានទទួលលទ្ធផលដូចគ្នា នាសម័យសង្គមរាស្ត្រនិយមរបស់ប្រមុខរដ្ឋ សីហនុ ដែលចេញមកពីគំរោងផែនការរបស់ជនជាតិយួនទាំងអស់ដូចគ្នា ហើយវាបណ្តាលឱ្យធ្ងន់ធ្ងរជាង សម័យប្រមុខរដ្ឋ សីហនុ នោះទៅទៀត ពីព្រោះជាដំណាក់កាលចុងក្រោយដែលយួនត្រូវក្តោបក្តាប់អំណាចត្រួតត្រាប្រទេសខ្មែរ ឱ្យបានជាប់មាំនៅក្នុងកណ្តាប់ដៃរបស់ខ្លួនដោយប្រើនយោបាយសង្គ្រាមត្រជាក់ តែស៊ីជ្រៅសូម្បីតែមតិជាតិ និងអន្តរជាតិក៏ពុំអាចចាប់អារម្មណ៍បន្តិចបន្តួចឡើយ ដូចពាក្យខ្មែរតែងនិយាយថា "អូសទូកកុំឱ្យឃើញដានចាប់ត្រីបានកុំឱ្យល្អក់ទឹក" ពិតជាត្រូវណាស់ ។ ពេលនោះយួនក្រហមបានបន្ទុំអាយ៉ងឱ្យធ្វើមេដឹកនាំប្រទេសខ្មែរប៉ុន្តែ :

-ឈ្មោះប្រទេសខ្មែរទុកនៅដដែល

-ទំនៀមទំលាប់ខ្មែរទុកនៅដដែល

-ឈ្មោះក្រុងខ្មែរ ខេត្ត ស្រុក ឃុំ ភូមិ ទុកនៅដដែល

-រីឯសមិទ្ធិផលធំៗនៃរចនាសម្ព័ន្ធគ្រប់សម័យត្រូវឱ្យមេដឹកនាំអាយ៉ងខិតខំកសាងឱ្យបានលូតលាស់ដុះច្រួងច្រាងពាស់ពេញប្រទេសខ្មែរ ជាការជួយបំរើសេចក្តីសុខសាន្តសប្បាយរីករាយរបស់ជនជាតិយួន ដែលបានចូលមករស់នៅពាសពេញប្រទេសខ្មែរ ហើយនិងមានមកជាបន្តៗទៅទៀតនោះដែរ ។

-ការគ្រប់គ្រងដឹកនាំត្រូវតែកែប្រែបន្តិចបន្តួចមិនឱ្យដឹងខ្លួន ដោយបញ្ចូលមន្ត្រីគ្រប់ស្ថាប័ន គឺក្នុងស្ថាប័នអំណាចនីតិបញ្ញត្តិសភាមានតំណាងរាស្ត្រជាជាតិខ្មែរដើមកំណើតយួន ឬជាតិយួនតែម្តង ។

-ក្នុងស្ថាប័ននីតិប្រតិបត្តិរដ្ឋាភិបាលនាយកនិងនាយករដ្ឋមន្ត្រីគ្រប់ក្រសួងជាជាតិខ្មែរដើមកំណើតយួន ឬជាតិយួនតែម្តង ។

-ក្នុងស្ថាប័នអំណាចតុលាការចៅក្រមកាត់សេចក្តីគ្រប់ជាន់ថ្នាក់ជាជាតិខ្មែរដើមកំណើត យួន ឬជាតិយួនតែម្តង ។

-ស្ថាប័នកងទ័ពជាតិ និងនគរបាលជាតិ មេដឹកនាំធំៗ តាំងពីលំដាប់ថ្នាក់កំពូល រហូតដល់ថ្នាក់បន្ទាប់ៗជាមេដឹកនាំខ្មែរដើមកំណើតយួន ឬជាតិយួនតែម្តង ។

-មេនគរបាលជាតិ (ប៉ូលីស) ធំៗ ពីថ្នាក់កំពូលនិងថ្នាក់បន្ទាប់ជាជាតិខ្មែរដើមកំណើតយួន ឬជាតិយួនតែម្តង ។

-ប្រជាពលរដ្ឋខ្មែរធម្មតាមានភាគច្រើនជាជាតិខ្មែរដើមកំណើតយួន ឬជាតិយួនតែម្តង ។

ការប្រើមធ្យោបាយ និងវិធីកលល្បិចទាំងអស់ដែលមានឈ្មោះថា សង្គ្រាមត្រជាក់នេះហើយ ដែលពួកប្រទេសលោកសេរីបានធ្វើការពីចុងសតវត្សរ៍ទី៣០ បណ្តាលឱ្យរលំរលាយរបបគ្រប់គ្រងកុម្មុយនិស្ត នៅក្នុងពិភពលោកត្រូវបានបាក់បែកខ្ទេចខ្ទីសឹងតែទាំងអស់ ។ រីឯប្រទេសកុម្មុយនិស្តខ្លះក៏ត្រូវ បានកែប្រែសម្រួលទៅតាមលោកសេរីដែរ មកដល់សព្វថ្ងៃនេះ ។

ដូច្នេះប្រទេសយួនជាប្រទេសកុម្មុយនិស្តមួយដែរ ដែលមានគំរោងត្រួតត្រាប្រទេសខ្មែរ ក៏បានកែប្រែប្រទេសខ្លួនឯង ប៉ុន្តែពុំបានកែប្រែនៅលើប្រទេសខ្មែរទេ ត្រឡប់ទៅជាយួនយកមេរៀនដ៏ល្អវិសេសរបស់លោកសេរីមកអនុវត្តនៅក្នុងប្រទេសខ្មែរវិញ ដើម្បីឱ្យបានទទួលជ័យជំនះដូចសង្គ្រាមត្រជាក់របស់លោកសេរីដែរ ។ បើអស់លោកអ្នកចង់ជ្រាបឱ្យកាន់តែច្បាស់នៅក្នុងរឿងសង្គ្រាមនេះ សូមអញ្ជើញអាន ឬស្តាប់កំណាព្យ

( តនៅទំព័រទី៣១ )

## ទំព័រហ្វីឡាដែលហ្វីយ៉ា




# ពីរដ្ឋបាលកុលសម្ព័ន្ធ ដល់រដ្ឋាភិបាលសម័យ

**ដោយ : ពិន សំខុន**

**ដោយ :**

កាលពីលេខមុន យើងបានផ្តល់បញ្ជីរាយនាមនៃគណរដ្ឋមន្ត្រី ក្នុងរូបមន្តសម័យទំនើបដំបូងបង្អស់របស់ខ្មែរ ក៏ប៉ុន្តែរូបភាពនោះ នៅតែជាលក្ខណៈ ផ្តាច់ការនិយមនៅឡើយ ។ ពេលនោះស្ថានភាពនយោបាយខ្មែរនៅក្រោមអាណានិគមបារាំង "របបយោធាវីស៊ី" ។

ចុងឆ្នាំ១៩៤៥ ពេលបារាំង "វីស៊ី" ចាញ់សង្គ្រាម ហើយរដ្ឋាភិបាលរំដោះបារាំង គឺលោកឧត្តមសេនីយ៍ "ដឺហ្គោល" បានឈ្នះសង្គ្រាមជាមួយសម្ព័ន្ធមិត្ត ។ ស្ថានភាពខ្មែរបានផ្លាស់ប្តូរយ៉ាងខ្លាំង ។

លោកឧត្តមសេនីយ៍ ឡឺក្លែ មេបញ្ជាការថ្មីនៅកម្ពុជា បានចាប់នាយករដ្ឋមន្ត្រី សឺង ង៉ុកថាញ់ យកទៅដាក់ពន្ធនាគារនៅស្រុកបារាំង ហើយតែងតាំង រដ្ឋាភិបាលថ្មីមួយទៀត ដឹកនាំដោយ ស៊ីសុវត្ថមុនីរ៉េត នៅថ្ងៃទី១ ខែតុលា ឆ្នាំ១៩៤៥នោះ ។

II- **រាជានិយមផ្តាច់ការក្នុងក្របខ័ណ្ឌនៃអាណាព្យាបាលបារាំង :**

***រដ្ឋាភិបាលស៊ីសុវត្ថមុនីរ៉េត (១៧.១០.១៩៤៥ - ១៤.១២.១៩៤៦):**

| | |
|---|---|
| -នាយករដ្ឋមន្ត្រី-រដ្ឋមន្ត្រីមហាផ្ទៃ-រដ្ឋមហាផ្ទៃការពារជាតិ | : ស៊ីសុវត្ថិមុនីរ៉េត |
| -រដ្ឋមន្ត្រីកិច្ចការបរទេស និងអប់រំជាតិ | : ស៊ីសុវត្ថិមុនីពង្ស |
| -រដ្ឋមន្ត្រីយុត្តិធម៌ | : ច័ន្ទ ណាក |
| -រដ្ឋមន្ត្រីសុខាភិបាល-សាធារណៈការ និងទូរគមនាគមន៍ | : ឃីម ទិត |
| -រដ្ឋមន្ត្រីធម្មការ-ពុទ្ធិកៈសិក្សា និងវិចិត្រសិល្បៈ | : ស៊ុម ហេង |
| -រដ្ឋមន្ត្រីសេដ្ឋកិច្ចជាតិ | : វ៉ា កាមែល |
| -រដ្ឋមន្ត្រីហិរញ្ញវត្ថុ | : ញឹក ជូឡុង |

ព្រះអម្ចាស់ ស៊ីសុវត្ថមុនីរ៉េត និង ស៊ីសុវត្ថមុនីពង្ស ត្រូវជាបងប្អូនបង្កើតនឹងគ្នាដឹកនាំរដ្ឋាភិបាលមួយដែលនៅមានរូបភាពជារដ្ឋាភិបាលផ្តាច់ការ និយមនៅឡើយ ដោយសារតែការតែងតាំង ក្រោមបញ្ជាការរបស់បារាំងរបបថ្មី ។ ( **តទៅទំព័រទី០៨** )




# អត្ថបទស្តីអំពីខន្ធ៥ និងសមាធិវិប្បស្សនា

**តពីលេខមុន**

**ដោយ: ម៉ៅ ច័ន្ទសំណុំ**

នាំឱ្យមនុស្សសោយអារម្មណ៍បីយ៉ាង : វេទនាជាទុក្ខ វេទនាជាសុខ និងវេទនាពុំមែនជាសុខ ឬទុក្ខ (អព្យាក្រិត្យ) ។

ក្នុងមួយថ្ងៃៗ តាំងពីភ្ញាក់ពីដេក រហូតដល់ពេលចូលដេកវិញ យើងម្នាក់ៗឆ្លងពិសោធន៍វេទនាច្រើនប្រភេទផ្លាស់ប្តូរពីមួយទៅមួយ ដូចជាចរន្តទឹក ហូរ ល្អ សប្បាយ ព្រួយ ក្រៀមក្រំ ទុក្ខ ស្រេះ ខឹង ភ័យ អរ អផ្សុក...។ រឿងខ្មែរបានឆ្លុះបញ្ចាំងការប្រែប្រួលវេទនារម្មណ៍នេះ ដោយលើកនិយាយថា ក្នុងខ្លួនយើងម្នាក់ៗ ម្តងទេវតាល្អចូលមកសន្ថិតម្តងទៀតទេវតាអាក្រក់ចូលមកសន្ថិត ។ យើងអាចនិយាយថា វេទនា ជារូបភាព ឬពណ៌សម្បុររបស់ចិត្តមនុស្សវេទនាឋិតនៅក្នុងក្របខ័ណ្ឌផ្លូវចិត្ត (Mental) ។

អស់លោកអ្នកដែលដឹងទេថា ការឈឺចាប់របស់មនុស្សយើងមានពីរកំរិត : កំរិតផ្លូវកាយ និងកំរិតផ្លូវចិត្ត ។ ឧទាហរណ៍មនុស្សម្នាក់ឈឺជើងក្នុងកំរិតផ្លូវកាយ មនុស្សឈឺជើងក្នុងកំរិតផ្លូវចិត្តមនុស្សភ័យព្រួយ ខ្លាចដូចជា នឹកថា ជម្ងឺជើងនេះ អាចក្លាយទៅជាជម្ងឺមហារីក ។ ម្លោះហើយ មនុស្សនេះឈឺពីរជាន់ ឈឺជើងផង និងទម្ងន់ផ្លូវចិត្តទៀត ។ ប៉ុន្តែក៏មានមនុស្សខ្លះ គេឈឺតែផ្លូវកាយទេ ផ្លូវចិត្តរបស់គេគ្មានទម្ងន់មានន័យថា គេមិនខ្វល់ ដូចឧទាហរណ៍ខាងលើ គេគិតថា ការឈឺជើងនេះជាលក្ខណៈធម្មតាបន្តិចទៀតជើងនឹងជា ។

ខ្ញុំលើកឧទាហរណ៍មនុស្សពីរប្រភេទ ដែលកើតជម្ងឺមហារីកដូចគ្នាប្រភេទទី១ ជននេះ ឈឺមហារីកខាងផ្លូវកាយ ហើយផ្លូវចិត្ត (វេទនា) ភ័យព្រួយ ខ្លាចរអា... មនុស្សបែបនេះ ឆាប់ស្លាប់ណាស់ ព្រោះគេទទួលទម្ងន់ពីរជាន់ ។ មនុស្សប្រភេទទី២ កើតមហារីកដែរ ប៉ុន្តែជននេះ ឈឺផ្លូវកាយ ចំណែក ផ្លូវចិត្តគេ គេគិតថា ជម្ងឺមហារីកនេះ ជាផ្នែកមួយនៃរូបកាយវានៅជាមួយរូបគេតាំងពីក្មេង វាជាមិត្តភក្តិគេ គេពុំប្រឆាំង ឬប្រកែកតវ៉ានឹងជម្ងឺមហារីកនេះសោះ គេលែងគិតគូរអំពីជម្ងឺនេះទៀត ។ ជននេះនឹងអាចរស់នៅបានអាយុយឺនយូរ ។ លោកប្រធានាធិបតីសហរដ្ឋអមេរិក Roosvelt បាននិយាយថា មនុស្សជាច្រើនបានស្លាប់ដោយសារការភ័យខ្លាចនឹងសង្គ្រាមជាងចំនួនមនុស្សស្លាប់ដោយអាវុធក្នុងសមរភូមិទៅទៀត ។

តើធ្វើយ៉ាងឱ្យមនុស្សទទួលការឈឺចាប់តែរូបកាយ ហើយរួចរំដោះវេទនាខាងផ្លូវចិត្ត ?

ការប្រតិបត្តិសមាធិអាចអនុញ្ញាតិឱ្យមនុស្សចេញផុតពីវេទនាផ្លូវចិត្តនេះ ។ កាលណាជនណាម្នាក់បានទទួលការបង្ហាត់វិធីសមាធិរឹងប៉ឹងហើយជន នោះអាចប្រើវិធីសមាធិពិនិត្យរវាំងមើលចលនាចេញចូលរបស់វេទនាក្នុងផ្លូវចិត្តនេះរាល់ម៉ោងរាល់នាទី រាល់វិនាទី ជននេះពិតជារួចរំដោះផុតពីទម្ងន់ផ្លូវចិត្តមែនក្នុងជីវិតជាមនុស្ស ។ សមាធិបង្ហាញមនុស្សឱ្យគ្រាន់តែពិនិត្យគ្រាន់តែមើលវេទនា ពុំពិចារណា ពុំសួររកហេតុផល (វិធី

( **តទៅទំព័រទី២៨** )

## លិខិតជូនពរឆ្នាំថ្មីសកល២០០៨

*ខ្ញុំ គ្រិត នីហ៊ាន និងភរិយា ព្រមទាំងកូន សូមជូនពរជ័យបវរដល់បងប្អូនខ្មែររួមជាតិ គ្រប់ច្រកល្ហកក្នុងពិភពលោក ។ ពិសេសសហគមន៍ខ្មែរ Long Beach និងបងប្អូនខ្មែរនៅប្រទេសកម្ពុជា ដោយក្នុងឱកាសចូលឆ្នាំថ្មី ឆ្នាំសកល២០០៨ យើងខ្ញុំសូមបួងសួងដល់វត្ថុសក្តិសិទ្ធិ ដែលថែរក្សាក្នុងចក្រវាឡ មេត្តាជួយផ្តល់សេចក្តីសុខទាំងផ្លូវកាយ និងផ្លូវចិត្ត សុខភាពមាំមួនស្មារតីភ្លឺស្វាង និងជោគជ័យក្នុងភារកិច្ចការងារ ឬជំនួញជួញដូរកើតមានចំពោះបងប្អូន នាឆ្នាំថ្មីចូលមកដល់នេះ ។*

*សូមឲ្យទុក្ខសោក និងឧបទ្រុឧចង្រៃរៀរចាកឆ្ងាយពីបងប្អូនក្នុងឆ្នាំចាស់ ដែលបានកើតមាន ។*

*បញ្ចប់នូវវាចារជូនពរនេះ យើងសូមឲ្យបងប្អូនខ្មែរគ្រប់រូប មានចិត្តមេត្តា និងរស់នៅប្រកបដោយការអធ្យាស្រ័យគ្នាទៅវិញទៅមក ដើម្បីកសាងសង្គមខ្មែរឲ្យរុងរឿង ដូចអរិយប្រទេសនានា នៅលើពិភពលោក ក្នុងន័យសាមគ្គីជាកម្លាំងនៃខ្មែរតែមួយ ។*

*សូមជូនពរឲ្យបងប្អូនជួបតែពុទ្ធពរទាំងប្រាំប្រការ គឺ អាយុ វណ្ណៈ សុខៈ ពលៈ និង បដិភាណៈ កុំបីឃ្លៀងឃ្លាតឡើយ ៕*

*សូមអរគុណ !*




# វិធីថែដើមទ្រូងឱ្យស្អាត

**ស្ត្រីភាគច្រើនតែងតែមើលរំលងភាពស្រស់ស្អាតរបស់ក និងដើមទ្រូង ដែលអាចមានភាពស្រគាំក្រោះក្រិនជ្រីវជ្រួញដូចផ្ទៃមុខដែរ ។ ពេលនេះអ្នកគួរងាកមកយកចិត្តទុកដាក់លើការថែទាំស្បែកម្ដុំទ្រូងវិញម្ដង ។**

**●ចង្អូរដើមទ្រូងទាក់ទាញភ្នែក**

ថ្វីបើអ្នកពុំមានសុដន់មួយគូមូលក្លំទ្រលុកទ្រលន់ស្អាតដូចអ្នកដទៃក៏ដោយ ក៏អ្នកអាចធ្វើឱ្យចង្អូរដើមទ្រូង (ជ្រលងសុដន់) របស់អ្នកមើលទៅសិចស៊ីទាក់ទាញភ្នែកបានដោយគ្រាន់តែជ្រើសរើសប្រើ Bronzer ឬម្សៅផាត់លាបបិទបាំងភាពស្រគាំខ្មៅនៅដើមទ្រូងដែលមានពណ៌មាសស្រគាំបន្តិចក្បៀរសាច់ម្សៅឱ្យស្មើលើបរិវេណខាងលើរបស់ដើមទ្រូង ធ្វើឱ្យចង្អូរដើមទ្រូងមើលទៅស្អាតទ្រលុកទ្រលន់ដូចធម្មជាតិ ។

**●ខាត់ស្បែកដើមទ្រូង**

ឧស្សាហ៍ខាត់ស្បែកស្រាល១ថ្នម១នៅត្រង់ក និងទូលសុដន់ ដោយក្រែមខាត់ស្បែកមួយសប្ដាហ៍ម្ដង ។ ប៉ុន្តែអ្នកមិនត្រូវខាត់ធ្ងន់ដៃពេកទេ ដោយទុកឱ្យក្រែមខាត់ស្បែកបំពេញមុខនាទីខាត់របស់វា ។ វិធីនេះអាចជួយឱ្យស្បែកមើលទៅទន់ស្អាតឡើង ។ ក្រោយពីខាត់ស្បែកហើយ កុំភ្លេចលាបក្រែមផ្ដល់សំណើមដល់ (Moisturizer) ដើម្បីឱ្យស្បែកមានសំណើមឡើងវិញ ។ អ្នកអាចប្រើវិធីថែរក្សាស្បែកមុខមកថែរក្សាស្បែកដើមទ្រូងរបស់អ្នកបានដូចគ្នាដែរ ។



**●ដើមទ្រូងស្អាតផូរផង់**

បើស្បែកម្ដុំដើមទ្រូងមានជាំដោយសារត្រូវកម្ដៅថ្ងៃ ឬមើលទៅស្រអាប់ស្រគាំ ចូរបង្កើនភាពស្រស់ស្អាតភ្លឺថ្លាដោយការប្រើក្រែមធ្វើឱ្យស្បែកសដែលផ្សំពីសារធាតុ AHA ឬ BHA ដែលអាចជួយកម្ចាត់កោសិការចាស់១ ធ្វើឱ្យស្បែកថ្មីមានសុខភាពដោយប្រើក្នុង១សប្ដាហ៍២ដង ប៉ុន្តែ ប្រសិនបើស្បែករមាស់សូមប្ដូរមកប្រើក្នុងមួយសប្ដាហ៍ម្ដងវិញ ។ ពិសេសត្រូវពិនិត្យមើលថា ក្រែមដែលលាបនោះត្រូវមានកំរិត SPF15 ឡើងទៅ ទើបអាចការពារកម្ដៅថ្ងៃបាន ៕

# ផ្ទៃមុខស្អាតដោយល្ហុងទុំ



>>ល្ហុងទុំក្រៅពីមានគុណប្រយោជន៍ក្នុងការជួយឱ្យបន្ទោរបង់បានស្រួលហើយ សារធាតុអង់ហ្ស៊ីមនៅក្នុងសាច់ល្ហុងទុំក៏អាចជួយកាត់បន្ថយស្នាមអុជខ្មៅ និងស្នាមដែលកើតពីរោគមុនបានផងដែរ ។ ដូច្នេះដើម្បីផ្ទៃមុខស្រស់ស្អាតផូរផង់ សូមយកល្ហុងទុំមកកិន ឬច្របាច់ឱ្យម៉ដ្ឋ ហើយលាបបំពោកលើផ្ទៃមុខទុកចោលប្រហែល១៥-៣០នាទី បន្ទាប់មកសីមលុបលាងមុខចេញវិញឱ្យស្អាត ។ ធ្វើដូច្នេះដើម្បីឱ្យអង់ហ្ស៊ីមនៅក្នុងសាច់ល្ហុងទុំនោះជួយការពារហើមរលាកបណ្ដាលមកពីរោគមុនជួយលាងជម្រះភាពកខ្វក់លើផ្ទៃមុខ និងជួយផ្លាស់ប្ដូរកោសិកាស្បែកដែលស្លាប់នោះឱ្យជ្រុះចេញពីស្បែកមុខធ្វើឱ្យផ្ទៃមុខស្រស់ស្អាតជាងមុន ៕




# អាហារដែលជួយថែរក្សាសុខភាព



**អាហារមានប្រយោជន៍ណាស់សម្រាប់មនុស្សគ្រប់រូប ដែលយើងត្រូវដឹងថា តើអាហារដែលយើងញ៉ាំចូលទៅក្នុងពោះនោះ តើមានអត្ថប្រយោជន៍អ្វីខ្លះដល់សុខភាពរបស់យើង ?**

**១_ទឹកប៉េងប៉ោះ :** ទឹកប៉េងប៉ោះអាចជួយការពារមហារីកពោះវៀនធំ មហារីកបំពង់អាហារ និងមហារីកក្រពះអាហារ ។ ជាតិ Lycopene ដែលមាននៅក្នុងប៉េងប៉ោះ គឺជាសារធាតុប្រឆាំងអុកស៊ីដកម្មដែលជួយការពារមហារីកសុដន់បានយ៉ាងប្រសើរ ។

**ខ្នាតទទួលទាន** : ទទួលទានបានតាមការចូលចិត្តជាប្រចាំរាល់ថ្ងៃ ។

**២_ផ្លែក្រូច** : ក្រូចជាកំពូលផ្លែឈើមួយដែលមានបរិមាណវីតាមីន C ខ្ពស់ កាកសរសៃខ្ពស់ រួមទាំងសារជាតិអាហារពីប្រភេទផ្សេងៗទៀតដែលអាចជួយការពារផ្កាសាយកាត់បន្ថយកម្រិតកូឡេស្តេរ៉ូល ជួយឆ្អឹងជួយការពារកុំឱ្យកើតក្រួសក្នុងតម្រងនោមជួយការពារមហារីកពោះវៀនធំ ។ម្យ៉ាងទៀតវាអាចជួយសម្រាលអាការឈឺដើមទ្រូងដែលបណ្តាលមកពីរោគបេះដូង ។ក្រៅពីនេះសារជាតិ Phytochemicals ដែលមាននៅក្នុងក្រូចវាជួយទប់ស្កាត់មហារីកសុដន់ផងដែរ ។

**ខ្នាតទទួលទាន** : គួរទទួលទានក្រូចមួយថ្ងៃ១-២ផ្លែឱ្យបានជាប្រចាំ ។

**៣_សណ្តែកក្រហម** : សណ្តែកក្រហម គឺជាអាហារមួយបែបដែលមានសមាសធាតុរួមផ្សំនៃជាតិសរសៃខ្ពស់ ដូច្នេះវាអាចជួយកាត់បន្ថយកម្រិតកូឡេស្តេរ៉ូល ជួយការពារកុំឱ្យដាច់សរសៃឈាមក្នុងខួរក្បាល និងមហារីកពោះវៀនធំ ។ សណ្តែកក្រហមសម្បូរទៅដោយអាស៊ីដហ្វូលិក ដែលជួយទ្រទ្រង់ឈាម ជួយការពារដំណើរខុសប្រក្រតីរបស់ទារកក្នុងផ្ទៃ ជួយការពារការកើតជម្ងឺបេះដូងបានយ៉ាងប្រសើរទៀតផង ។

**ខ្នាតទទួលទាន :** គួរតែទទួលទានមួយចានចង្កឹះក្នុងមួយថ្ងៃ ។

**៤_តៅហ៊ូ :** តៅហ៊ូអាចជួយកាត់បន្ថយកម្រិតជាតិខ្លាញ់កូឡេស្តេរ៉ូល ។ វាសម្បូរទៅដោយសារជាតិអេស្ត្រូចេនធម្មជាតិពីរុក្ខជាតិជួយការពារឆ្អឹងពុកមហារីកសុដន់ និងជួយឱ្យតម្រងនោមធ្វើការបានល្អ ។

**ខ្នាតទទួលទាន:** ៣០-៥០មីល្លីក្រាមនៃ Isoflavone ក្នុងមួយថ្ងៃ ឬស្មើនឹងបរិមាណតៅហ៊ូកន្លះចានចង្កឹះ ។

**៥_ខ្ទឹម.ស :** ខ្ទឹម.សជួយកាត់បន្ថយកូឡេស្តេរ៉ូលមានឥទ្ធិពលស្រដៀងនឹងថ្នាំអាស្ពីរីន ក្នុងការជួយការពារការកក និងការស្ទះសរសៃឈាម ។ ខ្ទឹម.សមានឥទ្ធិពលសម្លាប់មេរោគបានដូចថ្នាំប៉េនីស៊ីលីន ។ ម្យ៉ាងវិញទៀត វាក៏មានឥទ្ធិពលទប់ស្កាត់រ៉ាឌីកាល់សេរីជួយការពារមហារីកពោះវៀនធំ និងមហារីកសុដន់ផងដែរ ។

**ខ្នាតទទួលទាន** : ដើម្បីការពារជម្ងឺបេះដូង ត្រូវទទួលទានមួយថ្ងៃមួយកំពឹស ។

**៦_ទឹកដោះគោគ្មានជាតិខ្លាញ់ ប័រ :** ទឹកដោះគោគ្មានជាតិខ្លាញ់ ប័រ គឺជាប្រភពនៃកាល់ស្យូមខ្ពស់ ដែលគ្មានជាតិខ្លាញ់ ដែលអាចជួយការពារភាពរៈឆ្អឹងពុក ។ ម្យ៉ាងទៀតវាថែមទាំងរួមផ្សំទៅដោយសារធាតុប៉ូតាស្យូម និងម៉ាញ៉េស្យូមដែលមានប្រសិទ្ធភាពជួយកាត់បន្ថយជម្ងឺលើសឈាម ។

**ខ្នាតទទួលទាន** : មនុស្សពេញវ័យត្រូវការកាល់ស្យូមមួយថ្ងៃ១.០០០មីល្លីក្រាម ។ ចំណែកចាស់ជរាវ័យចំណាស់ត្រូវការបន្ថែមឡើង១.៥០០មីល្លីក្រាម ៕



# អត្ថបទស្ដីអំពីខន្ធ ៥ និងសមាធិ...

នេះយើងពុំអាចកាត់យល់បានតាមគំនិតទេ ប៉ុន្តែយល់
ដឹងតាមការពិសោធន៍ផ្ទាល់ដោយខ្លួនឯង) ។

អ្នកប្រាជ្ញទំនើបបានណែនាំថា ចូរអ្នកតាំងសំនួរសួរខ្លួនឯងថា "តើមានហេតុការណ៍អ្វីកើតមានក្នុងរូបកាយអាត្មាអញ ?"

សំនួរនេះ សួរឡើងគ្រាន់តែជាការក្រើនរំលឹកឱ្យយើងម្នាក់ៗបង្វែរសតិអារម្មណ៍ឱ្យមើលពិនិត្យរវាំងទៅក្នុងខ្លួន ថាតើពិសោធន៍វេទនាអ្វីខ្លះ ? ដូចជា អាត្មាអញ ព្រួយ ភ័យ អរ ស្រេះ ក្រៀមក្រំ... ។ ប៉ុន្តែលោកពុំឱ្យយើងពិចារណាទាល់តែសោះគ្រាន់តែមើល និងដឹងបានហើយ ។

វិធីដូចគ្នានេះ អ្នកប្រាជ្ញខ្លះបានណែនាំឱ្យយើងម្នាក់ៗតាំងខ្លួនក្នុង "ពេលបច្ចុប្បន្ន" មានន័យថា យើងម្នាក់ៗត្រូវដឹងថា តើក្នុងពេលនេះមានវេទនាណាខ្លះកើតមានក្នុងរូបកាយយើង ? នៅថ្នាក់រូបកាយបេះដូងដើរញាប់ជាងធម្មតា បែកញើស ញ័រសាច់... ។ នៅលើថ្នាក់ចិត្តមានកំហឹង, ភ័យ, ព្រួយ... បើមនុស្សគ្រាន់តែមើលវេទនាទាំងនោះ ដោយពុំបញ្ចូលនូវការត្រិះរិះពិចារណាជាមួយផងទេ មនុស្សនឹងឈប់ប្រតិកម្មទៅរកវេទនាទាំងនោះ 'មនុស្សគ្រាន់តែមើលភ្នែក (ខាងក្នុងខ្លួន) ពិនិត្យ និងដឹងពេលនោះ មនុស្សឈានដល់ពិសោធន៍មួយ គឺមើលឃើញច្បាស់នូវការកើតឡើងនៃវេទនានិមួយៗ និងការរលត់របស់វេទនាទាំងនោះ យូរៗទៅមនុស្សឈានដល់មើលឃើញថា វេទនាទាំងនោះកើតនឹងរលាយបាត់ទៅកើតរលាយបាត់ទៅ ដូចពពុះទឹក វេទនាទាំងនោះ ហាក់គ្រាន់តែជាស្រមោលកើតរលត់កើតរលត់ក្នុងក្រិត្យក្រមអនត្តា ។ មនុស្សយើងកើតទុក្ខ ព្រោះយកអារម្មណ៍ទៅភ្ជាប់នឹងវេទនាទាំងនោះ ។ វិជ្ជាសមាធិបានបង្ហាត់មនុស្សឱ្យផ្ដាច់ខ្លួន ផ្ដាច់អារម្មណ៍ខ្លួនចេញពីវេទនា ដូច្នេះ មនុស្សពុំស្ថិតនៅក្រោយការត្រួតត្រារបស់ចរន្តវេទនាក្នុងខ្លួនដូចមុនឡើយ ។ នេះជាអាថិកំបាំងដ៏អស្ចារ្យដែលព្រះពុទ្ធលោករកឃើញ គឺបានដល់ការបោសសំអាតដល់ផ្លូវចិត្តតាមការរវាំងពិនិត្យជាប់ជានិច្ច ។

ជាក់ស្ដែងអ្នកប្រតិបត្តិសមាធិពិនិត្យទៅក្នុងខ្លួនជាប់ជានិច្ច ពេលដែលកំហឹងលេចមក គេធ្វើការកត់សំគាល់ថា កំហឹងចេញមកហើយ ។ ត្រង់នេះអ្នកខ្លះគេពង្រឹងការ **កត់សំគាល់** នេះ ដោយប្រើពាក្យកំហឹង កំហឹង កំហឹង កំហឹងមួយសន្ទុះមក កំហឹងក៏រលាយបាត់ទៅ ។ មួយសន្ទុះមកទៀត ភាពត្រេកអរលេចឡើង គេក៏កត់សំគាល់ដោយប្រើពាក្យត្រេកអរ ត្រេកអរ ត្រេកអរ បន្ទាប់មកវេទនាត្រេកអរនេះក៏រលាយទៅ ។ ស្រាប់លេចវេទនា ភ័យមកទៀត គេក៏កត់សំគាល់ថា ភ័យ ភ័យ ភ័យ ភ័យ រហូតដល់វេទនាភ័យនោះបាត់ទៅទៀត ។ល។ និង ។ល។ វិធីកត់សំគាល់ប្រភេទវេទនានេះ មានប្រសិទ្ធ-ភាពណាស់ អ្នកប្រតិបត្តិសមាធិអាចធ្វើគ្រប់ពេលគ្រប់ទីកន្លែង ។ ធ្វើដូច្នេះយូរទៅអ្នកប្រតិបត្តិពុំបាច់ខំប្រឹងទេ ព្រោះគេបានបង្កើតឧទាហរណ៍សំរាប់គ្រប់គ្រងចិត្ត ឬបានសំអាតចិត្តគ្រប់ពេលវេលា ។

v. **ខន្ធទី៣ :** សញ្ញាខន្ធ (Sanna) :

តើអ្វីទៅដែលហៅថា សញ្ញាខន្ធ ? នៅក្នុងក្របខ័ណ្ឌចិត្តមនុស្សមានកន្លែងមួយសំរាប់កត់ត្រារាល់ពិសោធន៍របស់មនុស្សយើងម្នាក់ៗ ។ កំណត់ត្រាទាំងអស់នោះ គឺជាការចងចាំរបស់មនុស្សជាឃ្លាំងចំណេះ ជាឃ្លាំងពិសោធន៍សព្វយ៉ាង ។

**-ឧទាហរណ៍ទី១ :** ក្មេងប្រុសអាយុ៣ឆ្នាំ វាពុំស្គាល់សត្វខ្ទួយទេ ពេលវាឃើញខ្ទួយវាចំឡែកណាស់ តាមចាប់ លុះចាប់បានខ្ទួយទិចម៉ាត់ (សញ្ញាខន្ធក្នុងខ្លួនវាកត់ត្រាភ្លាម ថាខ្ទួយជាសត្វមានពិសគ្រោះថ្នាក់) ថ្ងៃក្រោយពេលវាឃើញសត្វដដែលដើរពីមុខវា ក្មេងនោះស្គាល់ថា ជាខ្ទួយ ហើយនាំឱ្យមានគ្រោះថ្នាក់ផង ដូច្នេះវាខ្លាចមិនហ៊ានចូលជិតទៀត ។

**-ឧទាហរណ៍ទី២ :** ខន្ធសញ្ញានេះ ពុំមែនមានតែក្នុងមនុស្ស សត្វក៏មានដែរ ។ កសិករបានចងស្មៅបំពាក់ខោអាវដូចរូបមនុស្សដាក់បញ្ឈរពាក់កណ្ដាលស្រែបណ្ដេញចាបកុំឱ្យស៊ីស្រូវ ។ ដោយសញ្ញានេះចាបសំគាល់ថា នេះជាមនុស្សកំពុងធ្វើការវាពុំហ៊ានចូលជិតឡើយ ។

**-ឧទាហរណ៍ទី៣ :** មនុស្សខ្វាក់តាំងពីកំណើតពុំដែលស្គាល់រាងសត្វដំរីដូចម្ដេចសោះតែហៅថាដំរី ។ ពេលមួយគេឱ្យគាត់ពាល់ជើងដំរី គាត់ក៏និយាយថា ដំរីដូចសសរផ្ទះណា ។ នេះព្រោះសញ្ញាខន្ធរបស់គាត់គ្មានអ្វីសោះពីមុនមក ។

**-ឧទាហរណ៍ទី៤ :** ចាស់បុរាណបានប្រៀបធៀបសញ្ញាខន្ធនេះ ទៅនឹងករណីជាងឈើគាត់យកខ្មៅដៃគូសចំណាំលើកំណាត់ឈើក្នុងណាមួយសំរាប់គាត់កាត់ចោល ឬរក្សាទុក ។ នៅពេលគាត់ឃើញសញ្ញានេះ គាត់ដឹងថាត្រូវធ្វើអ្វីហើយ ។

ដូច្នេះ សញ្ញាខន្ធគឺជាឃ្លាំងចំណេះដឹង ឃ្លាំងពិសោធន៍ ឬការចងចាំរបស់បុគ្គលម្នាក់ៗគេចងចាំអំពីរបៀបដាំស្ល អំពីព្រឹត្តិការណ៍ធំៗក្នុងជីវិត... ការចងចាំនេះពុំមែនតែរឿងល្អប៉ុណ្ណោះ ទាំងរឿងអាក្រក់ស៊ីជម្រៅក៏អនុស្សាវរីយ៍អាក្រក់ ។ល។

តើសញ្ញាខន្ធនេះ មានគុណសម្បត្តិ និងគុណវិបត្តិយ៉ាងណា ?

**១-គុណសម្បត្តិ :** ដោយសារសញ្ញាខន្ធនេះទើបមនុស្សអាចដឹកនាំជីវិតបាន អាចរៀនសូត្រ អាចស្រាវជ្រាវ អាចទៅជាអ្នកវិទ្យាសាស្ត្រ ទៅជាអ្នកប្រាជ្ញ ទៅជាមេសាសនា អាចមានសមត្ថភាពកែច្នៃសំភារៈសព្វយ៉ាង ឬអាចមានប្រកាសគ្រោះថ្នាក់...

តទៅលេខក្រោយ...

# ហាងខ្មែរផលិតនំក្រូហ្សង់

-មានគុណភាពទុកបាន៣០ថ្ងៃ
-ដឹកជញ្ជូនដោយមិនគិតថ្លៃពីថ្ងៃចន្ទ-សុក្រ
-ហាងយើងខ្ញុំមានលក់ដុំតែប៉ុណ្ណោះ
-អ្នកទិញត្រូវឲ្យដឹងមុន១ថ្ងៃ

## C & B CROISSANTS

WHOLESALE ONLY

ORDER BY PHONE:
(562) 495-5713
(800) 974-3888
Cell: (562) 607-3258
Fax: (562) 495-7544

FREE DELIVERY

We guarantee our products up to 30 days. Order must be made 1 day in advance.

WHOLE SALE ONLY





| Item | Net Wt Each | Packaging | Price/Package |
|---|---|---|---|
| Butter Croissant | 4.50 oz | 50 | $17.00 |
| Triangle Croissant | 5.00 oz | 50 | $17.00 |
| Square Croissant | 5.00 oz | 50 | $17.00 |
| Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Blueberry Cream Cheese Croissant | 6.oo oz | 50 | $22.00 |
| Strawberry Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Raisin Cinnamon Croissant | 6.00 oz | 50 | $22.00 |
| Raisin Custard Croissant | 6.00 oz | 50 | $22.00 |
| Apple Croissant | 6.00 oz | 50 | $22.00 |
| Chocolate Croissant | 6.00 oz | 50 | $22.00 |
| Chocotate Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Pineapple Cream Cheese Croissant | 6.00 oz | 50 | $22.00 |

1339 W. Gaylord Street• Long Beach, CA 90813

# Kenជីវិតក្មេងយូកូងក្លាយជាអ្នក...

អំពើអបាយមុខនោះ ។ តួយ៉ាងដូចជា Kenneth Young ហៅ Ken ពីអតីតកាលនៃជីវិតរបស់គេ ដែលធ្លាក់ទៅក្នុងអន្លង់ដ៏គ្រោះថ្នាក់នៃអំពើអបាយមុខ តាមផ្លូវសាធារណៈក្លាយខ្លួនជាក្មេងយូកូង (Gangsteet) ដែលគ្មានជម្រើសអ្វីក្រៅពីអាជីពការលួចប្លន់ និងប្រព្រឹត្តិអំពើហិង្សានានា គឺជាវិធីតែមួយគត់ ដើម្បីរស់សំរាប់ជីវិត ។ ប៉ុន្តែបច្ចុប្បន្ន គេមិននឹកស្មានថា អតីតជីវិតក្មេងពាលមួយនេះ បានប្រែក្លាយជីវិតដែលមិនគួរឱ្យជឿថា យុវជនដែលមានវ័យជាង៣០ឆ្នាំ ធំដឹងក្តីនៅសហរដ្ឋអាមេរិក ផ្លាស់ប្តូរជីវិតទៅជាអ្នកឈឺឆ្អាលជួយថែរក្សា និងផ្សព្វផ្សាយអរិយធម៌ និងវប្បធម៌ខ្មែរ នៅក្នុងអន្ទាក់យុគសម័យវប្បធម៌បច្ចឹមប្រទេស ក្នុងការបង្ហាញដល់ពិភពលោកឱ្យយល់ដឹងពីតំលៃនៃជនជាតិខ្មែរ ឬវប្បធម៌ជាតិអាស៊ីអាគ្នេយ៍ តាមរយៈគេហទំព័រនៃប្រព័ន្ធ Internet ក្នុងរយៈពេលពីរបីខែកន្លងមកនេះ ដែលគេបានបង្កើតឡើងដោយខ្លួនឯង។

-Ken និទានថា បំណងដែលរុញច្រានជីវិតគេឱ្យមានចំណង់ផ្នែកខាងប្រព័ន្ធសារព័ត៌មានវិទ្យា បង្កើតនូវ Website (គេហទំព័រ) នោះឡើង គឺខ្លួនគេចង់ធ្វើឱ្យប្រសើរនៃជីវិតកូនខ្មែរជំនាន់ក្រោយៗ ប្រែក្លាយជាជនជាតិ Asian ក្នុងសង្គមអាមេរិក ក៏ដូចសង្គមពិភពលោក ។

-ប្រឡូកខ្លួនចូលជាលក្ខណៈអន្តរជាតិទៅតាមជំនាញ និងទេពកោសល្យរបស់ពួកគេជាអ្នកចម្រៀងតារាភាពយន្ត ឬអ្នកល្បីៗផ្នែកដ៏ទៃទៀត ដែលចេញពីត្រកូលពូជខ្មែរ ក្នុងការប្រកួតប្រជែងទីផ្សារពិភពលោក ដើម្បីឱ្យសង្គមនៃជាតិសាសន៍ដ៏ទៃ បានយល់ដឹងកាន់តែច្បាស់នូវអ្វីដែលជាតម្លៃនៃវប្បធម៌ខ្មែរ ។

-Ken និយាយថា បើយើងជាក្មេងៗជំនាន់ក្រោយដែលធំដឹងក្តី ឬកើតនៅអាមេរិក និងប្រទេសដ៏ទៃទៀត មិនបាននាំគ្នាគិតចំពោះជាតិសាសន៍របស់ឪពុកម្តាយខ្លួននោះទេ ទៅអនាគតយើងពិតជាមិនអាចដឹងថាខ្លួនមានតំណរកំណើតមកពីតំបន់ណា ឬជាតិសាសន៍អ្វីទេ ។

-Ken ថា ការបង្កើតប្រព័ន្ធ Internet គេហទំព័រនោះឡើង គឺបំណងក្នុងផលរបររកស៊ី និងជួយដល់ការផ្សព្វផ្សាយនូវអរិយធម៌ខ្មែរឱ្យពិភពលោកកាន់តែយល់ច្បាស់ ដើម្បីលប់លាងកំហុសអតីតកាលមួយ ដែលធ្លាក់ទៅក្នុងរណ្តៅនៃការកាប់សម្លាប់ពូជសាសន៍ពីរបបវាលពិឃាត Killing Field នោះ។

-កាលពីឆ្នាំ១៩៨៧ Ken បានជួបប្រទះនូវជីវិតដ៏គ្រោតគ្រាតលើដងវិថីនាក្រុង Los Angeles ព្រោះតែរូបគេមិនមានការត្រួវរូវគ្នាជាមួយឪពុកចុង ដោយកាត់ផ្តាច់ចេញពីក្រុមគ្រួសារទាំងវ័យក្មេង ។

-ការដើរហើរដោយសេរីលើដងវិថីក្នុងអាយុត្រឹមតែ១៣ឆ្នាំ បានធ្វើឱ្យ Ken ត្រូវបានជួបបញ្ហាជាច្រើន គឺការលួចប្លន់ព្រមទាំងអំពើហិង្សានានា ជាវិធីតែមួយគត់ដើម្បីរស់ បើទោះបីជាគាត់មានមាឌតូចយ៉ាងណាក៏ដោយ ក៏ Ken មិនដែលដកថយពីការប្រយុទ្ធគ្នាម្តងណាសោះឡើយ ។ Ken និយាយថា "ខ្លួនសុខចិត្តស្លាប់ជាអ្នកក្លាហានប្រសើរជាងរស់នៅជាជនកំសាក" ។ ភាពក្លាហានរបស់ Ken បានធ្វើឱ្យមនុស្សដែលធំជាងខ្លួនក្នុងក្រុម និងអ្នកដែលធំជាងស្ញើចកោតសរសើរ Ken គ្រប់ៗគ្នា ។

-ក្នុងក្រុមយូកូងខ្មែរតាំងពីឆ្នាំ ១៩៨៧មកនោះ ដំបូងក្រុមនេះមានតែមិត្តភក្តិក្រុមគ្រួសារ និងអ្នកដែលចូលចិត្តចូលបារ ស៊ីផឹកតែប៉ុណ្ណោះ ជាមួយបទភ្លេងដែលកំពុងតែពេញនិយម គឺបទភ្លេងកន្ទ្រាក់ញាក់ ដែលអង់គ្លេសថា New Wake ដែលប្រុសៗចូលចិត្តទុកសក់វែងបះជ្រោងទៅលើ ដោយសារលាបថ្នាំបាញ់សក់ និងខោអាវពណ៌ខ្មៅជាមួយស្បែកជើងចងខ្សែ ដែលហៅថា វល្លីជាតិ ។

-ក្រុមយូកូងខ្មែរ-អាស៊ីចំនួន៥ក្រុមធំៗជាអាទិ៍ក្រុម Asian Boyz, ( ABZ), Tiny Rasakals Gang (TRG), Crazy Bros Clan (CBC), Exotic Foreign Creation Conterie (EFCC) និង Suicidal ដែលបានកាន់កាប់ទីកន្លែងនានាក្នុងទីក្រុង Long Beach ពីអតីតកាលនោះ មិនដូចសព្វថ្ងៃនេះទេ ក្រុមទាំង៥នោះបានរក្សានូវសន្តិភាពជាមួយគ្នា ហើយរស់នៅជាមួយគ្នាទៀតផង ។ ក្រុមយូកូងខ្មែរមានសត្រូវប្រយុទ្ធច្រើនជាងក្រៅពីខ្លួនគេ ។

-ក្នុងអំឡុងពេលនោះ ជនភៀសខ្លួនខ្មែរបាននឹងកំពុងចាប់ផ្តើមរស់នៅទីក្រុង Long Beach រដ្ឋ California ហើយពួកស្ពែនីស (Mixican) មានការខឹងសម្បាជាមួយនឹងជនជាតិភាគតិច ដែលទើបនឹងមកថ្មី ចូលមករស់នៅលើទឹកដីរបស់ពួកគេជាហូរហែរ បានធ្វើឱ្យមានការប្រយុទ្ធគ្នាបន្តិចបន្តួចបានបង្កទៅជាជំលោះ ហើយជំលោះបានឈានទៅរកការបាញ់ប្រហារកាំភ្លើងដាក់គ្នា ។

-Ken និយាយថា ដំណាក់កាលនោះ ការបង្ហូរឈាមដំបូងនៃសង្គ្រាមរវាងក្រុមខ្មែរ និងពួកអេស្ប៉ាញ៉ុល បានកើតឡើងនៅពេលដែលមានឡានមួយដែលផ្ទុកដោយក្រុម TRG បានឈប់ទល់មុខគ្នាជាមួយឡានដែលផ្ទុកដោយក្រុមយូកូងស្ពែនីស ឈ្មោះ ESL ដោយបង្កសង្គ្រាមពាក្យសំដី ហើយការបាញ់ប្រហារក៏កើតមានឡើង ស្របគ្នាដែលចេញពី TRG កាំភ្លើងឆ្ពោះទៅកាន់ក្រុម ESL បណ្តាលឱ្យពួកគេម្នាក់ជាសមាជិកក្រុមបានស្លាប់ ដែលចាប់ពីពេលនោះមកសង្គ្រាមប្រយុទ្ធគ្នានៃក្រុមទាំងពីរបានឆាបឆេះឡើងជាលំដាប់ ក្នុងការប្រឈមមុខដាក់គ្នា នៅពេលដែលពួកគេប្រទះឃើញគ្នា ។ កាលវាលដាលពីសង្គ្រាមនៃក្រុមយូកូង ក៏បានក្លាយទៅជាសង្គ្រាមប្រឆាំងពូជសាសន៍ទៅវិញ ។

-Ken បានចូលរួមយ៉ាងជ្រាលជ្រៅដូចជាទាហានក្នុងសមរភូមិកាត់ត្រាប់រំសេវ ខាងក្រុមយូកូងខ្មែរម្នាក់ នៅក្នុងសង្គ្រាមចុងក្រោយបានឈានទៅរកភ្លើងពណ៌ខៀវនៃជនជាតិអាស៊ី ដែលជាប់ក្នុងពន្ធនាគារពីពួកម៉ាហ្វីយ៉ាម៉ិកស៊ិកូ ដែល Ken ស្ទើតែបាត់បង់ជីវិត ពេលដែលខ្លួនគេ និងគូកន២-៣នាក់ បានបើកឡានចូលក្នុងទឹកដីសត្រូវរបស់ខ្លួន ហើយឡានដែលមានផ្ទុកដោយក្រុមយូកូង ESL បានបាញ់ស្រោចសំដៅមករកឡានរបស់ Ken ដែលនេះ មិនមែនជាលើកទី១ និងចុងក្រោយ ដែល Ken និងមិត្តភក្តិស្ទើតែបាត់បង់ជីវិតនោះទេ ។ ការបន្តសង្គ្រាមគូប្រយុទ្ធជម្លោះបដិបក្ខត្រូវទទួលរងគ្រោះជាច្រើន ។ ថ្ងៃមួយមានក្មេងប្រុសខ្មែរម្នាក់បានរងការបាញ់ប្រហារ និងសប្តាហ៍ខាងអេស្ប៉ាញ៉ុលក៏ត្រូវបានស្លាប់វិញដែរ ។

-Ken បានក្លាយទៅជាជនដែលប្រព្រឹត្តិបទឧក្រិដ្ឋជាមុខរបរ រហូតដល់ខ្លួនគេបានចាកចេញពីមធ្យមសិក្សា ហើយបន្តចូលទៅរៀននៅក្នុងឧត្តមសិក្សា ដែលឱកាសនោះមានទូរស័ព្ទមកប្រាប់គេថាពួកអេស្ប៉ាញ៉ុលមិនមែនសុទ្ធតែសត្រូវទាំងអស់នោះទេ ។ សំដីនេះ ហើយបានទាញចិត្ត Ken ឱ្យប្រែចិត្តកាចសាហាវមកជាចិត្តមានមេត្តាធម៌ជាបណ្តើរៗ រហូតធ្វើឱ្យជីវិតគេផ្លាស់ប្រែទៅរកភាពល្អប្រសើរទទួលកិត្តិយសធំធេងក្នុងការសិក្សា។

-បុគ្គលិកលក្ខណៈប្រកបដោយភាពទាក់ទាញ និងស្មោះត្រង់របស់ Ken ចំពោះមិត្តភក្តិធ្វើឱ្យគាត់ទទួលបានប្រជាប្រិយភាពជាខ្លាំងក្នុងក្រុង Long Beach រហូតត្រូវបានគេបោះឆ្នោតជ្រើសរើសប្រធានសម្ព័ន្ធនិស្សិតខ្មែរក្នុងសាលារៀនទៀតផង ។ ប៉ុន្តែទោះបីជាយ៉ាងនោះក៏ដោយ Ken មិនដែលបានទទួលស្គាល់ពីសំណាក់ពួកស្បែកស ឬពិភពអ្នកមានអាជីពនោះទេ ។ ហើយពេលនោះដែរ ក៏គ្មានអ្នកដឹកនាំខ្មែរណាម្នាក់ដែលគាត់ត្រូវទាក់ទាញនោះទេ ។ អ្វីដែល Ken ដឹងនោះ គឺជីវិតលើផ្លូវថ្នល់ដែលក្មេងប្រុសខ្មែរជាច្រើនបានចំរើនដឹងក្តី ។ ទំនាក់ទំនងជិតស្និតជាមួយមិត្តភក្តិរបស់គាត់បាននាំឱ្យគាត់មានភាពជិតស្និតនឹងជីវិតជាក្មេងនៅតាមចិញ្ចើមថ្នល់ ។

-Ken បានគេចផុតជីវិតពីរបបខ្មែរក្រហមក្នុងវ័យដ៏ក្មេងខ្ចីជាមួយម្តាយ និងបងស្រីពីរនាក់ទៀត ក្នុងឆ្នាំ១៩៧៩ ទៅកាន់ជំរុំជនភៀសខ្លួន ។ ឪពុករបស់គេត្រូវបានពួកខ្មែរក្រហមសម្លាប់ ដូចជាប្រជាជនទាំងឡាយ ដែលបានបាត់បង់សមាជិកគ្រួសារ និងអ្នកដែលជាទីស្រលាញ់ដែលជីវិតពោរពេញទៅដោយការឈឺចាប់ និងការលំបាកលំបិន ។ នៅទីនោះក្រុមគ្រួសារ Ken បានជួបនូវបទពិសោធន៍នៃការរើសអើងពីប្រជាជនមូលដ្ឋាន ដែលមិនចង់ឱ្យពួកគេចូលក្នុងជំរុំជនភៀសខ្លួនដោយមានរបាយការណ៍ខ្លះថា ទាហានថៃបានទទួលបញ្ជាឱ្យបាញ់សម្លាប់អ្នកភៀសខ្លួនណាដែលចង់ស្វែងរកឋានសួគ៌សុវត្ថិភាពក្នុងជំរុំជាយដែនថៃ ។

-ដោយសារតែការខ្វះខាតចំណីអាហារដ៏ធ្ងន់ធ្ងរ ព្រមទាំងរស់នៅដោយភាពក្រីក្រគ្រួសាររបស់គាត់អាចរស់រានមានជីវិតដោយសារតែបុណ្យព្រេងសំណាង ដែលម្តាយគាត់បានជួបជាមួយបុគ្គលិកអង្គការសហប្រជាជាតិវ័យក្មេងដ៏សង្ហាម្នាក់ ដែលបានមកធ្វើការជួយជនភៀសខ្លួន ហើយបានប្រសព្វគូគ្រង ដោយទទួលស្គាល់នូវកូនទាំងបីរួមរស់នៅជាមួយគ្នារហូតពីតាមជំរុំមកកាន់សហរដ្ឋអាមេរិក ក្នុងរដ្ឋផែនស៊ីវែនញៀ ។

-ជីវិតរស់នៅលើទឹកដីអាមេរិក មិនមែនជាវិថីមាសដែលគេគ្រប់គ្នាគិតស្មាននោះទេ ដោយការរស់នៅជាមួយអ្នកដែលជួយគាំទ្រក្នុងក្រុង Libanon គ្រួសាររបស់ Ken បានបាត់ការទាក់ទងជាមួយសហគមន៍ខ្មែរនៅទីនោះក្នុងភាពឯកកោ ដោយមិនមានប្រវត្តិនៃវប្បធម៌របស់ខ្លួន ក៏បានសម្រេចចិត្តផ្លាស់លំនៅដ្ឋានពីរដ្ឋផែនស៊ីវែនញៀមកកាន់ក្រុងខ្មែរ Long Beach ចាប់តាំងពីឆ្នាំ១៩៨២ រហូតមកដល់បច្ចុប្បន្ន ដែលជីវិត Ken កំពុងតែវិវឌ្ឍន៍កាន់តែល្អប្រសើរៗជាបណ្តើរៗហើយនោះ ។ បច្ចុប្បន្ន Ken បានក្លាយខ្លួនជាអ្នកនិពន្ធសរសេរអត្ថបទ និងស្រាវជ្រាវរឿងរ៉ាវចំរុះជាតិសាសន៍ ដើម្បីបំពេញភារកិច្ចការងាររបស់គេ ក្នុងគេហទំព័រ Website របស់គេ គឺ www.ranzz.com លោកអ្នកអាចចូលមើលតាមដាន ឬស្រាវជ្រាវ ដើម្បីការផ្តល់គំនិតយោបល់ ឬការរិះគន់ដើម្បីស្ថាបនា ៕

# ញត្តិសុំហត្ថលេខាប្រឆាំងរដ្ឋាភិបាល ហ៊ុន សែន...

គណបក្សរណបយួន ដែលបានកាន់កាប់អំណាចផ្តាច់ការមានការសំលាប់មនុស្សក្នុងយុទ្ធសាស្ត្រ ក.៥ កាប់ព្រៃឈើតាមតំបន់ព្រំដែនក្នុងរបបយួនគ្រប់គ្រងឆ្នាំ១៩៧៩-១៩៨៩ ការសំលាប់មនុស្សក្នុងរដ្ឋប្រហារបង្ហូរឈាម នាថ្ងៃ៥-៦កក្កដា ឆ្នាំ១៩៩៧ និងបង្ក្រាបការរំលោភសិទ្ធិមនុស្សបាញ់សម្លាប់ ឧបាសក ឧបាសិកា និងព្រះសង្ឃ ក្នុងព្រឹត្តិការណ៍បង្ក្រាបការធ្វើបាតុកម្មប្រឆាំងការបោះឆ្នោតនាឆ្នាំ១៩៩៨ ជាមួយការក្តាប់អំណាច ដោយឥទ្ធិពលការកាប់បំផ្លាញព្រៃឈើ ប្រព្រឹត្តិអំពើពុករលួយជាដើម។ ប៉ុន្តែអ្នកកាន់អំណាចបច្ចុប្បន្នអះអាងថា របបខ្លួន កំពុងតែធ្វើការកែទម្រង់ជាបណ្តើរៗហើយដែរ ។

●តើវាជាទម្លាប់បែបប្រជាធិបតេយ្យ ឬដែលត្រូវតែមានអ្នកប្រឆាំងចង់ឱ្យរាជរដ្ឋាភិបាល ហ៊ុន សែន ខិតខំកែទម្រង់អំណាចខ្លួន ដើម្បីអនុវត្តការគោរពច្បាប់ និងកិច្ចការនៃអំណាចទាំងបីមាន អំណាច នីតិបញ្ញត្តិ នីតិប្រតិបត្តិ និងអំណាចតុលាការ បានជាគេសង្កេតឱ្យតែឃើញមានឥស្សរជនជាន់ខ្ពស់របស់រដ្ឋាភិបាលមកពីគណបក្សប្រជាជនកម្ពុជា មកកាន់ទឹកដី Long Beach គឺបាតុកម្មប្រឆាំងតវ៉ាតែងតែកើតមាន ដែលអតីតកាលមុន ឈុន យ៉ាសិទ្ធិ ប្រធានចលនាកងទ័ពខ្មែរសេរី CFF មិនទាន់ត្រូវចាប់ខ្លួនបាន នាំគ្នាស្រែកជេរអគ្គស្នងការ Police ហុក ឡង់ឌី ជាសាធារណៈនៅតាមដងផ្លូវ Anaheim ដែលជាកណ្តាលបេះដូងនៃក្រុងខ្មែរកាលពីឆ្នាំ២០០១ ៕

# ថ្ងៃ ៧មករា និងការកើតមានជនភៀសខ្លួន...

មួយមានឈ្មោះថា "សង្គ្រាម" ដែលរៀបរាប់ពីសង្គ្រាមដែលមានចំនួន៥៦ គួរឱ្យចង់ឡែក គួរឱ្យភ័យខ្លាច ហើយនឹងគួរឱ្យសោកស្តាយខ្លាំងណាស់ នូវការត្រូវបាត់បង់ប្រទេស និងជនជាតិខ្មែរ ដោយសារគម្រោងផែនការនៃសង្គ្រាមប្រជាក់របស់ជនជាតិយួន ដែលប្រវត្តិសាស្ត្រខ្មែរបានចារិកកត់ត្រាទុកឱ្យកូនចៅខ្មែរជំនាន់មួយទៅជំនាន់មួយ ពីសម័យមួយទៅសម័យមួយផងថា ហើយខិតខំរកវិធីថែរក្សាប្រទេស និងជាតិឱ្យបានគង់វង្ស ។

សរុបសេចក្តីទៅ ជនជាតិគ្រប់ពូជសាសន៍ទាំងអស់តែងតែមានប្រទេសរបស់ខ្លួនរៀងៗខ្លួន ហើយពុំមានជាតិសាសន៍ណាមួយដែលមិនចង់ឃើញប្រទេស និងជាតិខ្លួនឯងរីកលូតលាស់គ្រប់វិស័យ និងជនជាតិបានសេចក្តីសុខសាន្តសប្បាយរីករាយ មានជីវភាពខ្ពង់ខ្ពស់នោះទេ គឺចង់ឃើញ ហើយចង់បានណាស់ ។ ចុះបើចង់ឃើញចង់បាន ហើយឥឡូវនេះ ប្រទេស និងជនជាតិខ្មែរ ក្រោមការដឹកនាំរបស់មេដឹកនាំសព្វថ្ងៃ ហេតុអ្វីបានជាមានជនជាតិ ខ្មែរខ្លះត្រូវឡប់ទៅនិយាយប្រឆាំងនឹងមេដឹកនាំនោះទៅវិញ ដែលជាមេដឹកនាំមានបញ្ញាវាងវៃឈ្លាសវៃឆ្លាតខ្លាំងពូកែ ពុំមានមេដឹកនាំណាមួយមកប្រៀបផ្ទឹមឱ្យស្មើបានឡើយនាសម័យនេះ មិនមានន័យថា ជនប្រឆាំងនេះ ជាជនមានគោលបំណងបំផ្លាញចង់ឱ្យប្រទេស និងជាតិនៅតែគ្មានរីកចំរើនលូតលាស់ និងត្រូវគោកយ៉ាករហេមរហាមទេឬអី ?

ពាក្យសុភាសិតមួយបានចែងថា "ស៊ូមានតែបាយក្រៀមមួយដុំបរិភោគសំរាប់ចំអែតពោះ ជាជាងមានម្ហូបដ៏មានរសជាតិឆ្ងាញ់ពិសេសបរិភោគ ប៉ុន្តែទៅក្នុងផ្ទះពោរពេញទៅដោយមនុស្សប្រកបដោយអំពើចិត្តវៀចវេរកលល្បិចបោកប្រាស់បញ្ឆោតគ្មានអត់អោនអាណិតស្រឡាញ់គ្នាសោះ" ។

មិនខុសគ្នាទៅក្នុងប្រទេសខ្មែរសព្វថ្ងៃនេះទេ សូមបងប្អូនរួមឈាមខ្មែរ ខិតខំតាំងចិត្តស្មោះស្វែងរកការពិតឱ្យឃើញច្បាស់មែនទែនថា តើមេដឹកនាំខ្មែរ សព្វថ្ងៃមានបុគ្គលិកលក្ខណៈដូចម្តេច ?

តើរឿងរ៉ាវអ្វីទាំងអស់ ដែលសកម្មជនស្នេហាជាតិពិតប្រាកដបានលើកឡើង ហើយប្រឆាំងនឹងមេដឹកនាំសព្វថ្ងៃនេះត្រឹមត្រូវឬទេ ? ពីព្រោះសកម្មជនស្នេហាជាតិទាំងអស់មានសេចក្តីព្រួយបារម្ភ និងតក់ស្លុតខ្លាំងណាស់ ចំពោះវាសនាអនាគតនៃប្រទេស និងកុលបុត្រកុលធិតា កូនចៅខ្មែរទៅថ្ងៃមុខ ប្រាកដនឹងត្រូវជួបប្រទះនូវទុក្ខវេទនាខ្លោចផ្សារ ដោយសារតែមេដឹកនាំសព្វថ្ងៃនេះបានដឹកនាំប្រទេស និងជនជាតិខ្មែរឱ្យធ្វើដំណើរទៅកាន់រណ្តៅមហន្តរាយមួយ ដែលជនជាតិខ្មែរសម័យនេះបណ្តោយឱ្យមេដឹកនាំនាំទៅ ហើយគិតតែនាំគ្នាសប្បាយរីករាយ មិនចាប់ខ្លួនទៅរកិលចូលទៅរកសេចក្តីវិនាសហិនហោចបាត់បង់ប្រទេស និងជនជាតិទៅថ្ងៃមុខឡើយ ។

ជនជាតិខ្មែរសម័យនេះ សប្បាយរីករាយណាស់ដោយបានឃើញការលូតលាស់រីកចំរើនគ្រប់វិស័យ សប្បាយរីករាយដោយបានធ្វើមេឃុំធំ សប្បាយរីករាយណាស់ដែលបានធ្វើឧកញ៉ាធំ សប្បាយរីករាយណាស់ដែលបានធ្វើម្ចាស់ក្រុមហ៊ុនធំៗសប្បាយរីករាយណាស់ដែលបានប្រកបមុខរបរបានទទួលកម្រៃច្រើនក្នុងមួយថ្ងៃៗសប្បាយរីករាយណាស់ដោយបានឃើញទេសភាពល្អ សោភ័ណភាពនៃទីក្រុងហាងលក់ដូរទំនើបធំៗ ផ្លូវថ្នល់ធំៗ ស្ពានថ្នល់ធំៗ អគារសង្ហារិមរដ្ឋ និងឯកជនធំៗ សណ្ឋាគារទំនើបធំៗស្អាតៗជាដើម ។ល។

ចំណែកកូនចៅជំនាន់ក្រោយប្រាកដជាពុំបានសប្បាយរីករាយដូច្នេះទេ បើចង់សប្បាយរីករាយដូចគ្នា ត្រូវតែចេះគិតថា ខ្លួនឯងជាជាតិខ្មែរពិតប្រាកដ គឺគ្រាន់តែកាន់អត្តសញ្ញាណប័ណ្ណខ្មែរ ប៉ុន្តែកុំឱ្យមើលឃើញផលប្រយោជន៍ប្រទេសជាតិខ្មែរខ្លាំងពេកទុកឱ្យមេដឹកនាំគ្រប់ជាន់ថ្នាក់ ធ្វើអ្វីស្រេចតែចិត្តគេ ធ្វើទៅចុះកុំចាំបាច់ថានេះជាជាតិខ្មែរ នោះជាជាតិយួនឡើយ នៅឱ្យស្ងៀមៗទៅ ទើបសប្បាយរីករាយរស់បានយូរ ការធ្វើខ្លាំងពិតជាឆេះខ្លោចហើយ រួចហើយឆេះសុះទៅផេះតែម្តង ។

ការធ្វើរបៀបនេះ ល្អវិសេសម្យ៉ាងដែរ បើជនជាតិយួនគេខ្លាំងពូកែជនជាតិខ្មែរត្រូវតែធ្វើជាជនជាតិយួនទាំងអស់គ្នាទៅ ទើបខ្លាំងពូកែដូចគ្នា បើអ្នកជាជាតិខ្មែរ ជាតិជាតិខ្មែរខ្សោយត្រូវតែរលាយពីព្រោះសត្វពស់តូចវាពុំអាចស៊ីលេបសត្វពស់ធំកើតបានទេ ។

កូនឈ្លូសវាពុំអាចខាំអូសសត្វខ្លាទំពារស៊ីបានទេ ។ នេះជាឧទាហរណ៍ជាក់ស្តែងរបស់សត្វ ប៉ុន្តែជាការជាក់ស្តែងរបស់មនុស្សក៏ដូចគ្នាដែរ ។ មានតួយ៉ាងមានក្រុមអ្នកតស៊ូស្នេហាជាតិនៃរណសិរ្សកងទ័ពរំដោះប្រទេស និងប្រជាពលរដ្ឋខ្មែរចំនួនពីរក្រុម និងក្រុមខ្មែរក្រហមប្រឆាំងយួន បានចុះហត្ថលេខាលើកិច្ចព្រមព្រៀងគ្នា ដើម្បីចូលទៅរួបរួមគ្នា ដើម្បីកសាងប្រទេសខ្មែរឡើងវិញ ក្នុងសន្តិភាពជាមួយក្រុមដឹកនាំខ្មែរ បន្ទុបដោយកងទ័ពយួនកាន់អំណាចពីឆ្នាំ១៩៧៩មក ។

លុះបានចូលទៅរួបរួមគ្នាទៅហើយ មកដល់សព្វថ្ងៃនេះ តើសន្ធិសញ្ញាផានាការរួបរួមនោះនៅគង់វង់រហូតមកដល់សព្វថ្ងៃនេះឬទេ ? ហើយអំណាចគ្រប់គ្រង និងដឹកនាំប្រទេស និងជាតិខ្មែរសព្វថ្ងៃត្រូវធ្លាក់ទៅក្នុងកណ្តាប់ដៃអ្នកណា ?

ពិតប្រាកដណាស់ សត្វពស់ធំរបស់យួនក្រហមជាពស់មានពិសត្រូវតែលេបសត្វពស់របស់ក្រុមអ្នកតស៊ូស្នេហាជាតិ ជាពស់ព្រលិតឥតមានពិសដ៏តូចអស់រលីងគ្មានសល់មួយឡើយមកដល់ថ្ងៃនេះ ។

នេះហើយដោយសារការធ្វេសប្រហែស និងការលោភលន់ចង់បានអំណាចកំពូលនៃមនុស្សគ្មានសតិសម្បជញ្ញៈ សតិបញ្ញា និងវិចារណញ្ញាណចេះគិត គួរឱ្យត្រូវទៅតាមគតិបណ្ឌិតបានបង្ហាត់បង្ហាញប្រៀនប្រដៅឱ្យមនុស្សមានគុណធម៌ និងសិលធម៌ពិតប្រាកដមានន័យថា មេដឹកនាំខ្មែរសម័យនេះ គេបានទៅសិក្សារៀនសូត្រពីអ្នកប្រាជ្ញជាអគតិបណ្ឌិត មានមហិច្ឆតាលោភលន់ ហើយប្រើកលល្បិចដើម្បីពង្រីកទឹកដីមកលើប្រទេសខ្មែរតែម្តង ដូច្នេះ ហើយជាជាតិខ្មែរត្រូវប្រុងប្រយ័ត្នឱ្យមែនទែន ចំពោះការដឹកនាំរបស់មេដឹកនាំខ្មែរសម័យនេះ បើពុំនោះសោតទេ ប្រទេស និងជាតិខ្មែរត្រូវជួបប្រទះនឹង រឿងពិតទាំងនេះជាពិតប្រាកដជៀសពុំរួចឡើយ ។ "គឺសត្វពស់ធំលេបសត្វពស់តូច" ។

នៅក្នុងបញ្ហាទាំងអស់នេះ ខណៈដែលទិវា ៧ មករា ខួបលើកទី ២៩ ដែលជាថ្ងៃរំដោះប្រទេសចេញពីរបបប្រល័យពូជសាសន៍កន្លងទៅប៉ុន្មានថ្ងៃនេះ លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បានថ្លែង

( តនៅទំព័រទី៣៤ )

# សហគមន៍គ្រីស្ទានខ្មែរនៅហ្វីឡាដែលហ្វីយ៉ា

ដោយ : ពិន សំខុន

នៅហ្វីឡាដែលហ្វីយ៉ា មានសហគមន៍ខ្មែរប្រមាណបីម៉ឺននាក់ រស់នៅទីនោះ នៅទីនោះមានមណ្ឌលសំរាប់ថ្វាយបង្គំព្រះគ្រីស្ទរបស់សហគមន៍ខ្មែរ គ្រីស្ទានបីកន្លែងធំៗដែលនាចុងឆ្នាំ ២០០៧នេះ មានសកម្មភាពមមាញឹកដោយសារបុណ្យកំណើតរបស់ព្រះ នាថ្ងៃបុណ្យ "Christmas" ផង និងបុណ្យចូលឆ្នាំថ្មីផង ។

នារសៀលថ្ងៃទី២២ ខែធ្នូ "ថ្ងៃទទួលបុណ្យកំណើតព្រះ " សមាគមន៍ខ្មែរគ្រីស្ទាននៃក្រុងហ្វីឡាដែលហ្វីយ៉ាខាងជើង ប្រមាណជាង១០០ នាក់ រាប់ទាំងកុមារ និងយុវជនផង បានជួបជុំគ្នានៅវិហារផ្លូវ OLD York ដោយទឹកមុខរីករាយ សំលៀកបំពាក់ថ្មីៗល្អស្អាត និងរង្វាន់ពេញដៃ ។ នារសៀលនោះ លោកគ្រូគង្វាលបាននិយាយថា "នៅខាងជើងនេះមានវិហារតែមួយទេ តែនៅខាងត្បូងមានវិហារពីរផ្សេងទៀតសំរាប់សមាគមន៍គ្រីស្ទាន" ។ លោក វិបុល ទូច ជាគ្រូគង្វាលវ័យក្មេង ថ្ងៃនេះរីករាយដោយឃើញថា សមាគមន៍ខ្មែរមកចូលរួមយ៉ាងកកកុញ បង្ហាញភាពរាក់ទាក់បង្ហាញនូវការជួយយកអាសារគ្នា បង្ហាញភាពគោរពគ្នាតាមការណែនាំរបស់ បណ្តាំព្រះគ្រីស លោកបាននិយាយបន្តថា "នៅវិហារគ្រីសបរិស័ទដំណឹងល្អខ្មែរនេះពុំមែនទំនាស់អ្វីជាមួយសមាគមន៍ខ្មែរជាទូទៅនោះទេ នេះដោយសារតែខ្មែរយើងមានការយល់ដឹងច្រើន ហើយមានការជ្រើសរើសសាសនាណាមួយដោយខ្លួនឯងពុំមានការបង្ខិតបង្ខំណាមួយឡើយ" ។ ការពីពេលមុនទំនាស់អាចនឹងមានដោយសារតែសមាគមន៍ខ្មែរភាគច្រើននៅប្រកាន់ទំនៀមទំលាប់ជាពុទ្ធសាសនិកនៅឡើយហើយអ្នកប្រកាន់សាសនាគ្រីស្តបានប្រកាន់ឥរិយាបថ មិនទទួលព្រះឯ ទៀតៗបានឡើយ ។



អ្នកស្រី សារ៉ាវី



លោក ទូច វិបុល

ប្រធាននារីនៃគ្រីស្តបរិស័ទ ឈ្មោះ សារ៉ាវី ប្រ៊ិស បានឧទ្ទានប្រកបដោយជំនឿយ៉ាងជ្រាលជ្រៅទៅលើព្រះគ្រីស្ត ដោយការអាក់អន់ស្រពន់ចិត្តចំពោះវិបត្តិក្នុងការអប់រំកូនចៅ នៅក្នុងសមាគមន៍ខ្មែរ ដែលអ្នកស្រីរស់នៅអ្នកស្រីបានឧទ្ទានថា "ស្រុកនេះ ពុំមែនជាស្រុកយើងទេ បញ្ហាភាសាជាបុព្វហេតុធំពុំឱ្យយើងជាម្តាយឪពុកអប់រំកូនចៅបាន" អ្នកស្រី សារ៉ាវី ប្រ៊ិស បានឃើញបុព្វហេតុគួរឱ្យសោកស្តាយមួយទៀតថា "អ្នកស្រីពុំមានវិធីសាកសិទ្ធណាមួយសំរាប់ជួយកូនចៅខ្មែរដ៏ច្រើនលើសលប់ឱ្យបានចាកផុតពីអវិជ្ជានេះទេ ហើយក៏ពុំមានទទួលព័ត៌មានថា នៅទីណាគេមានទទួលកុមារដែលបានបោះបង់សាលាឱ្យចូលរៀនវិញបានទេដែរ" ។

សមាគមន៍គ្រីស្ទានខ្មែរនៅមានចំនួនសមាជិកតិចតួចនៅឡើយ ក៏ប៉ុន្តែបានត្រូវគេទទួលស្គាល់ថា មានសហការណ៍ក្នុងការទប់ស្កាត់វិបត្តិនានាក្នុងគ្រួសារបានច្រើនហើយការគ្រប់គ្រងវិហាររបស់ ពួកគេគ្រីស្ទានខ្មែរទាំងនោះនៅពុំទាន់លេចឮការប្រព្រឹត្តិអំពើមិនគប្បីខុសវិន័យព្រះ-វិហាររបស់គ្រីស្តបរិស័ទដែរ នេះក៏ដោយសារតែវិហារនេះជាកម្មសិទ្ធិរបស់ខ្មែរ ក៏ដោយក្តីពួកគេក៏នៅតែមានការទទួលគ្រប់គ្រងពីព្រះវិហារធំនៅក្នុងតំបន់ និងគណៈកម្មការវិហារយ៉ាងខ្ជាប់ខ្ជួនដែរ ៕

# ខៀវ សំភេត : នយោបាយ...

ទស្សនាចរ ដែលស្ដែងចេញពីតំបន់រមណីយដ្ឋាន ដំណើរការនិវឌ្ឍន៍នៅក្នុងព្រះរាជាណាចក្រកម្ពុជា បងប្អូនមានការពេញចិត្ត ហើយតែងតែសួរថា តើកម្ពុជាពិតជាមានសន្តិភាព និងសុវត្ថិភាពល្អ ប្រាកដទេ ។ ត្រង់នេះយើងបញ្ជាក់ប្រាប់គាត់ថា




អ្វីដែលបងប្អូនគិតខ្លាច ព្រោះតែរបបខ្មែរក្រហម និងសង្គ្រាមជាច្រើនជំនាន់នាអតីតកាលនោះ ដែលបន្សល់ទុកឱ្យគាត់បាត់បង់ស្មារតីទន់ខ្សោយតក់ស្លុតអារម្មណ៍ខ្លាចសង្គ្រាម ខ្លាចការកាប់សម្លាប់នោះ ដែលបច្ចុប្បន្នបានប្រែត្រឡប់ខុសគ្នាស្រឡះនូវការអភិវឌ្ឍន៍ជាមួយស្ថានភាពនយោបាយមានការប្រែប្រួលល្អប្រសើរ ។

នៅក្នុងសំនួរបន្តចំពោះការមកកាន់សហរដ្ឋអាមេរិក តើមើលឃើញបងប្អូនខ្មែរផ្សារភ្ជាប់នឹងជីវិតសិល្បៈនៃវប្បធម៌ខ្មែរយ៉ាងដូចម្ដេចដែរ ?

សំភេត ថ្លែងថា ការពិតទៅដែលគាត់បានកំពុងតែជួបនោះ គឺរំភើបហួសទៅនឹងការស្មានទៅទៀត ព្រោះមុនដំបូងឡើយ គាត់មិននឹកស្មានថាបងប្អូនខ្មែរយើងមានការគាំទ្រវិស័យសិល្បៈដល់ម្លឹងទេ ដោយគ្រាន់តែថា ជាការកែកំសាន្តតែប៉ុណ្ណោះ ។ ហើយទើបតែនៅពេលដែលគាត់បានមកដល់ទីនេះ (សហរដ្ឋអាមេរិក) ផ្ទាល់បានដឹងថាបងប្អូនមិនត្រឹមតែទទួលយកសិល្បៈជាការកំសាន្តប៉ុណ្ណោះទេ គឺបងប្អូនលោកជួយលើកស្ទួយ ជួយជំរុញជួយលើកទឹកចិត្តផ្ដល់នូវកំលាំងចិត្តទៅដល់បណ្ដាសិល្បៈករ-សិល្បៈការិនីដទៃទៀត ឱ្យបន្តខិតខំប្រឹងប្រែង ដើម្បីជំរុញវិស័យសិល្បៈរបស់ខ្មែរយើងឱ្យខ្ពស់ត្រដែតដូចបណ្ដាអរិយ វប្បធម៌បរទេស ក៏មានអារម្មណ៍ និងសេចក្ដីចង់បានឱ្យប្រទេសកម្ពុជាវិស័យសិល្បៈខ្មែរដែលយើងតែងឱ្យន័យថា "សិល្បៈព្រលឹងជាតិខ្មែរ គឺលេចធ្លោបោះជំហ៊ានទៅមុខមិនឱ្យចាញ់បណ្ដាប្រទេសទាំងនោះឆ្ងាយពេកដែរ" ទាំងតារាចម្រៀង ខៀវ សំភេត និង កញ្ញា ទូច ស្រីលក្ខ័ បានអះអាងថា តាមរយៈបទចម្រៀងរបស់ពួកគេសំរាប់សម្ដែងច្រៀងឱ្យបងប្អូនខ្មែរនៅសហរដ្ឋអាមេរិក តាមសហគមន៍ខ្មែរ នានាបានស្ដាប់គឺទាក់ទងទៅនឹងប្រវត្តិនៃទិដ្ឋភាពនៅកម្ពុជា ដើម្បីទាក់ទាញអារម្មណ៍ពួកគាត់ឱ្យមានការនឹករលឹកស្រុក និងចង់ទៅលេងស្រុកកំណើតនៅក្នុងដំណាក់កាលដែលសន្តិភាពកំពុងកើតមាន ។

បច្ចុប្បន្ននៅតាមទីភ្នាក់ងារខ្មែរលក់សំបុត្រយន្តហោះ នៅក្រុង Long Beach និងតំបន់ខ្មែរដទៃទៀត ជាមួយការប្រទះភ្នែកនៅព្រលានយន្តហោះ L.A.X ខ្មែរជាច្រើនបានទិញសំបុត្រទៅលេងស្រុក និងធ្វើដំណើរទៅកាន់កំណើតខ្លួនគួរឱ្យកត់សំគាល់ក្នុងរយៈពេលប៉ុន្មានឆ្នាំចុងក្រោយនេះ ៕

# KING KONG
STUDIO & DIGITAL LAB
*Photography*

*"Capturing Moments..."*

1617 E. Anaheim St. | Long Beach, CA 90813 | Tel.: (562) 591-2296

Hours: Monday - Sunday (9:30am - 6:00 pm)

## Passport & Immigration Photo, Notary

ជាមួយហាងយើងខ្ញុំដែលមានបទពិសោធន៍ជាង ១៥ ឆ្នាំ មានបច្ចេកទេសខ្ពស់ និងទំនើបទាន់សម័យសំរាប់អស់លោក អ្នកដែលមានបំណងចង់ភ្ជាប់នូវរូបថតទុកជាអនុស្សាវរីយ៍សំរាប់មើលកំសាន្ត ។

ថតភ្លាមយកភ្លាមត្រឹមតែ៥នាទី



*Wedding*
មានថតរូបពិធីមង្គលការ



*Glamour*
តុបតែងសម្ផស្សឱ្យកាន់តែប្រសើរ



*Family*
ថតរូបជាលក្ខណៈគ្រួសារ



*Children*
តុបតែងថតសំរាប់កុមារ



*Restoration*
កែលំអរូបថតចាស់ៗឱ្យស្អាតឡើងវិញ

សូមអញ្ជើញ ដោយមេត្រីភាព !

www.kksphotostudio.com

មានថតរូបសំរាប់ធ្វើលិខិតឆ្លងដែន ទិដ្ឋាការ និងកិច្ចការអន្តោប្រវេសន៍





**King Kong**
ជាទីសម្រស់ដ៏ល្អប្រណិត គ្មានពីរបស់អស់លោកអ្នក!













**Photography | Videography | Film | Digital Media | Frames**

មានម៉ាស៊ីនថតសន្លឹក ម៉ាស៊ីនថតវីដេអូ ផ្តិតរូបថត ផ្តិតរូបដោយកុំព្យូទ័រ Digital បែបទំនើប បញ្ចូន Frame ស៊ុមរូបថត

KKS

1617 E. Anaheim St. | Long Beach, CA 90813 | Tel.: (562) 591-2296



# ហោរាសាស្ត្រប្រចាំខែ មករា ថ្ងៃទី ១៦_៣១

### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វើប្រហែសឱ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់នូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាពនិងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏មិនត្រូវធ្វើទាំងចិត្តតក់ក្រហល់ដោយខ្វះការពិចារណានោះឡើយ ព្រោះការបើមានការភ្លាំងភ្លាត់តែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕

### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វី១ក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ។ បើជាមេធាវីគ្រូបង្រៀន ឬ ពិធីករ-ពិធីការិនី នឹងអាចរកប្រាក់ចំណូលបានច្រើន ព្រោះតែពូកែថ្វីមាត់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះ មានជោគល្អកម្រកបាន ព្រោះមានប្រុស១ចោមរោមស្រលាញ់ ៕

### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តីតែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះការចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំដែរ គឺបានត្រឹមតែចំណាយពេលវេលា និងកម្លាំងឥតអំពើ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ទាល់តែចេះអត់ធ្មត់ ទើបបានសេចក្តីសុខ ៕

### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងារ រកស៊ីជួញដូរជួបនឹងបញ្ហាលំបាក១ច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់ទំនិញសព្វសារពើ ចូរចេះពិនិត្យគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវ ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍មានរឿងរកាំរកូសច្រើន ។

### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងារ រកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺត្រូវធ្វើដោយសន្សឹម១កុំបំបោលទើបអាចឈាន ទៅដល់គោលដៅតែបើធ្វើទាំងងងឹតងងុលខ្វះការ គិតគូពិចារណា និងធ្វើទាំងចិត្តក្តៅក្រហាយ គឺពិតជាអាចរលាយទ្រព្យឆាប់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញីក បើរពួកកុំទៅញួយ ទើបសេចក្តីស្នេហាទទួលបានសេចក្តីសុខ ៕

### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែ ទើបឈានចូលឆ្នាំថ្មី ហើយរាល់កិច្ចការងាររកស៊ីនៅជួននឹងឧបសគ្គខ្លះ១ក្តីតែកុំភ័យព្រួយអ្វីឡើយ ព្រោះលោកអ្នកអាចរកដំណោះស្រាយបានជ្រះស្រឡះទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលជ្រៀតជ្រែក ៕

### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីរបស់លោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងចំពោះជនខិលខូចដែលនៅក្បែរ១លោកអ្នក ព្រោះពួកគេមានគំនិតប៉ុនប៉ងធ្វើអំពើអាក្រក់ដោយមិនចេញមុខដូច្នេះត្រូវមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕

### ឆ្នាំវក : (ពពួកទេវតាប្រុស ធាតុដែក )

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ រាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គត្រូវបានសាបរលាបបាត់ស្រមោលអស់រលីងដូច្នេះលោកអ្នកអាចរកស៊ីជួញដូរបានពេញដៃពេញជើងហើយទោះជាបានជួបនឹងគូប្រជែងជើងខ្លាំងចេញមកតតាំងក៏មិនភ័យព្រួយដែរ ព្រោះលោកអ្នកអាចយកប្រៀបឈ្នះជានិច្ច ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេមក្សាន្ត ៕

### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចដំណើរការបានស្រួលដែរ ។ ចំពោះអ្នករកស៊ីជួញ ដូរក្នុងរយៈពេលនេះ នឹងមានទ្រព្យហូរចូលប្រៀបដូចត្រូវឆ្នោត ព្រោះមានទំនិញលក់ចេញទិញ ចូលឥតទំនេរដៃ ។ ចំពោះគូស្នេហ៍ក្នុងឆ្នាំថ្មីនេះកាន់តែប្រកបដោយភាពផ្អែមល្ហែម ៕

### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររក ស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ លោកអ្នកនឹងបានជួបនូវគូប្រជែងជើងខ្លាំងចេញមុខមកតតាំង ដូច្នេះចូរចេះរៀបចំជើងព្រួលទុកសម្រាប់ទប់ទល់ជាមុន ទើបមិនលិចលង់ទាន់តែបាមដាច់ខាតការប្រើកម្លាំងបាយដោះស្រាយបញ្ហា ព្រោះវាបានត្រឹមតែខាតបង់ទាំងសងខាងតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកល្អជាធម្យម ។ រាល់កិច្ចការងារ រកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ដោយសារតែលោកអ្នកមានសុខភាពមិនសូវល្អជា និងមានការភ្លេចភ្លាំងច្រើនដូច្នេះមុនចុះហត្ថលេខា និងផ្តិតស្នាមមេដៃលើលិខិតស្នាមផ្សេង១ តោងចេះពិនិត្យមើលឱ្យបានល្អិតល្អន់ ព្រោះកាលបើមានការធ្វេះធ្វោយតែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អធម្មតា ៕

## ថ្ងៃ ៧មករា និងការកើតមានជនភៀសខ្លួន...

ក្រើនរំលឹកដល់ប្រជាជនកុំឱ្យបំភ្លេចថ្ងៃ ៧មករា ដែលជាថ្ងៃមួយរំដោះខ្លួនឱ្យរួចចាកផុត ពីខ្នោះឃ្នៀងនៃរបបអាវខ្មៅប្រល័យពូជសាសន៍ ។ លោកហ៊ុន សែន បានរំលឹកទៀតថា ការបំភ្លេចណាមួយចំពោះ ៧ មករា ប្រៀបដូចជាការបំភ្លេចឪពុកម្តាយ ព្រោះអីយើងពិនិត្យខ្លួនឯងមើលលោកយាយលោកតាញាតិញោមទាំងឡាយ កាលនោះបើកុំរំដោះទាន់ពេលកុំអីរស់មកដល់ថ្ងៃនេះឬអត់? គឺមិនបានរស់ទេ ? ទិវា ៧ មករានេះ ត្រូវបានរដ្ឋាភិបាលចាត់ទុកជាបុណ្យជាតិមួយហើយ បានអនុញ្ញាតិឱ្យមន្ត្រីរាជការបុគ្គលិកក្រុមហ៊ុនឯកជនជាកម្មកររោងចក្របានឈប់សំរាកមួយថ្ងៃ ។

មានការយល់ឃើញខុសគ្នាពីអត្ថន័យនៃថ្ងៃ ៧ មករា នេះ ខាងគណបក្សប្រជាជនកម្ពុជា និងអ្នកគាំទ្របានចាត់ទុកថ្ងៃ ៧មករា នេះ ជាថ្ងៃផ្តួលរំលំរបបខ្មែរក្រហម និងជាទិវាផ្តល់កំណើតសារជាថ្មីដល់ប្រជាជនឱ្យរួចផុតពីការកាប់សម្លាប់នៃរបបនេះ ។ ឯខាងគណបក្សប្រឆាំងចាត់ទុកថ្ងៃ ៧មករាថាជាថ្ងៃយួនឈ្លានពានចូលកម្ពុជាដើម្បីត្រួតត្រា ។

ពួកអ្នកវិភាគនយោបាយបានអះអាងថា អ្នកដឹកនាំខ្មែរកំពុងធ្វើប្រជាភិថុតនយោបាយ ដើម្បីកេងយកចំណេញប្រយោជន៍សំរាប់គណបក្សនយោបាយរបស់ខ្លួន ខណៈពេលដែលការបោះឆ្នោតជិតឈានចូលមកដល់នាខែកក្កដាឆ្នាំ២០០៨ ។ ក្រុមអ្នកវិភាគទាំងនោះបានអះអាងទៀតថា ការវិនិច្ឆ័យពីកំហុសឆ្គងគឺស្ថិតនៅលើប្រវត្តិសាស្ត្រជាអ្នកសម្រេចដែលគ្មានអ្នកណាមួយក្រឡៃទំព័រប្រវត្តិសាស្ត្របានឡើយ ។/

# ភោជនីយដ្ឋានឋានសួគ៌ថ្មី

## New Paradise Restaurant

1350 EAST ANAHEIM STEET , LONG BEACH ,CA 90813

TEL: (562) 218-0066





ជួបជាមួយអ្នកចំរៀងច្រៀងពិរោះៗ















សូមអញ្ជើញមកពិសារម្ហូបពិសេសសំរាប់គ្រួសារ ពេលបាយ ថ្ងៃត្រង់ និងពេលល្ងាច ចាប់ពីថ្ងៃ ច័ន្ទ ដល់ ថ្ងៃ ព្រហស្បត្តិ៍

### A : $ 19.95

- សម្លម្ជូរត្រី ( Hot & Sour Fish Soup )
- សាច់គោអាំង ( Beef Stick )
- ប្រហុកខ្ទិះ ( Ground Pork Curry & Fresh Vegetable )

### B : $ 29.95

- សម្លម្ជូរគ្រឿងឆ្អឹងជំនីជ្រូក ( Spare Rib Green Hot & Sour Soup )
- ញាំមាន់តាំងហ៊ុន ( Chicken Salad )
- ត្រីប្រម៉ាចំហុយ ( Steam Pork Cake & Fresh Vegetable)
- សាច់គោអាំង ( Beef Stick)

### C : $ 19.95

- សម្លម្ជូរត្រី ( Hot & Sour Fish Soup )
- សាច់គោអាំង ( Beef Stick )
- អាម៉ុក (Steam Fish Cake with Coconut Milk)
- សាច់មាន់ឆាប៊ឺរ (Sauteed Chicken with Butter Sauce )

### D : $ 59.95

- សម្លម្ជូរបង្គង និង ត្រី ( Hot & Sour Langostinos & Fish Soup )
- សាច់គោអាំង ( Beef Stick)
- ក្តាមឆាប៉ោរ ( Crab with Special Sauce)
- ងាវឆាជីរនាងវងម្ទេស ( Clam w/Sweet Basil & Jalopenos )
- ត្រីខ្ញីចំហុយ ( Tilapia Steamed with Ginger Sauce)
- មាន់ឆាគ្រឿង ( Sauteed Chicken with Green Herb & Spices )

### E : $ 78.95

- សម្លម្ជូរបង្គង និងត្រី ( Hot & Sour Langostinos & Fish Soup )
- ភ្លាជើងទា (Bonelees Duck Feet Salad )
- សាច់គោអាំង ( Beef Stick )
- ងាវឆាជីរនាងវងម្ទេស ( Clam w/Sweet Basil & Jalopenos )
- ត្រីក្រហមឆាម្នាស់ម្ទេសប្លោក ( Sauteed Rock Cod w/Pineapple & Bell Pepper)
- សាច់គោឡុកឡាក់ ( Beef Cub Salad )

### F : $ 119.95

- ញាំមាន់តាំងហ៊ុន ( Chicken Salad )
- សម្លម្ជូរបង្គង និង ត្រី ( Hot & Sour Langostinos & Fish Soup )
- ត្រីប្រម៉ាចំហុយ ( Steam pork Cake & Fesh Vegetable )
- ឆាក្តាម ( Sauteed Crab )
- សាច់គោឡុកឡាក់ ( Beef Cub Salad )

## BEER , WINE , COCKTAIL

ភោជនីយដ្ឋានយើងខ្ញុំមានទីកន្លែងស្អាត មានអនាម័យល្អ មានផាសុខភាព សេវាកម្មប្រកបដោយទឹកចិត្ត មានមុខម្ហូបឆ្ងាញ់ៗ